សារព័ត៌មាន ខ្មែរប៉ុស្ដិ៍ ស.រ.អា
# KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

មាតិការឿង Issue 150 March 21th -April 03th, 2014 Free



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## ទស្សនៈប្រចាំថ្ងៃ

**ដោយ : ពិន សំខុន**



**ថ្ងៃនេះខ្ញុំមានកង្វល់ ពីរ:**

**១**-កង្វល់ច្រើនជាងគេ សំដៅទៅរឿងស្រុកខ្មែរ ដែលបងប្អូនរួមជាតិបានផ្ទើលផ្ទើបស្រុះគ្នាទាមទារសិទ្ធជាម្ចាស់ទឹក ដី ផ្ទះ គ្រួសារ ដែលកាលពីដើមឡើយ ទាល់តែមានបញ្ហា ទើបហ៊ានចេញមកសម្ដែងឆន្ទៈម្ដងម្កាល តាមពេលនឹងគំនិតដែលថ្នាក់ដឹកនាំ(អ្នកធំ) គេកំណត់ឱ្យ។ ការផ្ទុះព្រឹត្តិការណ៍របៀបនេះជាអព្ភូទហេតុអស្ចារ្យមានកម្លាំងពហុគុណជ្រែកទម្លាប់ប្រកបដោយគ្រោះថ្នាក់ប្រឈមមុខនឹងស្ដេចអំណាចរដ្ឋដ៏មហិមាដែលអាចផ្ដល់សេចក្ដីស្លាប់ដល់ពលរដ្ឋក្លាហានណាមួយបានគ្រប់វិនាទី ។ ខ្ញុំតែងតែគិតថា "យកជីវិតទៅប្ដូរធ្វើអីយួនមិនងាយនឹងមកយកទឹកដីយើងបានទេ រក្សាជីវិត

**តទៅទំព័រទី ២៩**

## សមាគមខ្មែរអាយុបាន៣០ឆ្នាំ និងកំពុងប្ដូរទីតាំង

## In its 30th anniversary year, CMAA is on the move



អ្នកស្រី បុប្ផា មេឡូន ប្រធានសមាគមខ្មែរ

**ដោយ : ចេម អលទីស**

**ប្រែសម្រួលដោយ : សុខា**

**ឡូវែល:**៥ខែកន្លងទៅជាពេលដែលមមាញឹក **តទៅទំព័រទី ១៦**

It has been a busy five months at the Cambodian Mutual Assistance Association since Bopha Malone took over as the president of the CMAA board in November 2013. The organization is looking for a new executive director, has begun a series of community exchange events, and earlier this month finally began the process of moving into their new headquarters on School St. Through all the changes and the challenges, Malone remains above all else truly optimistic about the organization as it approaches its 30th anniversary, "There's so many exciting things going on in the Cambodian community and we're excited to be a part of it."

The welcome news of the move into the new head quarters comes after a period of delay that was even a topic of discussion at the KhmerPostUSA Press Club Event in January. In March, CMAAreceived the necessary permits to begin work on renovating and moving into the building on School Street that the organization purchased a little over a year ago. The work on the building is being overseen by Sor construction and is moving along at a solid pace. The anticipated move -in date is April 6th with

**Continued to page 16**

## សាកលវិទ្យាល័យអូហៃយ៉ូ ក្រុងអាតែនប្រារព្ធកម្មវិធីសន្និសីទខ្មែរលើកទី៦

**អត្ថបទដោយ : សុខា**

**ក្រុងអាតែន រដ្ឋអូហៃយ៉ូ:** ចុងសប្ដាហ៍នៃពាក់កណ្ដាលខែមីនា ចាប់ពីថ្ងៃទី១៤ ដល់១៦ សាកលវិទ្យាល័យអូហៃយ៉ូបានរៀបចំកម្មវិធីសន្និសីទខ្មែរលើកទី៦ ក្រោមការចូលរួមពីស្ថាប័នរដ្ឋ និងឯកជននៃព្រះរាជាណាចក្រកម្ពុជា និងសហរដ្ឋអាមេរិក។

ក្នុងឆ្នាំនេះ សន្និសីទខ្មែរលើកទី៦ មានវត្ថុបំណងក្នុងការជជែកពិភាក្សាទៅលើបច្ចុប្បន្នភាពនៃប្រទេសកម្ពុជាក្រោយថ្ងៃបោះឆ្នោត២៨ កក្កដា។ ក្រោយពីការិយាល័យកម្មវិធីសិក្សាតំបន់អាស៊ីអាគ្នេយ៍នៃសាកលវិទ្យាល័យនេះ បានកោះអញ្ជើញវាគ្មិន សិស្ស និស្សិត ឱ្យផ្ញើនូវសំនេររបស់ខ្លួន ដើម្បីចូលរួមធ្វើបទបង្ហាញរួចមកភ្ញៀវកិត្តិយស វាគ្មិន



បណ្ឌិត គ្រីស ស្ទីនស៊ូ

ពលរដ្ឋ សិស្ស និស្សិតជាតិ និងអន្តរជាតិបានអញ្ជើញមកពីប្រទេសខ្មែរ និងរដ្ឋនានានៃសហរដ្ឋអាមេរិក ចុះចតនៅអាកាសយានដ្ឋាន កូឡុំប៊ីស និងបន្តដំណើរដោយឡានប្រហែល១ម៉ោង កន្លះ ទើបដល់សាកលវិទ្យាល័យអូហៃយ៉ូនៃក្រុងអាតែន ដែលជាក្រុងតូចមួយនៅលើកូនភ្នំ។

វាគ្មិន និងភ្ញៀវកិត្តិយសដែលអញ្ជើញមកពីព្រះរាជាណាចក្រកម្ពុជារួមមានសាកលវិទ្យាធិការនៃសាកលវិទ្យាល័យបាត់ដំបង លោកជំទាវ សៀង ឯមទទឹម រដ្ឋលេខាធិការក្រសួងអប់រំ ឯកឧត្តម អ៊ឹម កុច អ្នកបំពេញការងារអញ្ជើញមកពីមជ្ឈមណ្ឌលឯកសារកម្ពុជា **តទៅទំព័រទី ២៣**

# KhmerPost USA

*4th Annual Media & Community Gala Celebrate the*

## Asian/Pacific American Heritage Month



**Friday, May 2nd, 2014**
**6:30PM- 12:00AM**
**Hong Kong Restaurant, Lowell, MA**

*Join us for an exclusive evening of celebration and inspiration with our*

**Keynote Speaker, US Ambassador Sichan Siv**

former US Ambassador to U.N. (2001-2006) & International Best-Selling Author of "Golden Bones"

For Sponsorship & ticket information contact
Soben Pin at **978-677-7163** or sobenpin@khmerpost.us

**Tickets: $35**

**Multicultural Fashion Shows | Silent Arts Auctions | Cultural Performances**
**Cash-Bar | Sit-down Dinner | Live Band | Social Dancing**




Cambodian-American Biweekly Newspaper Serving Lowell, Lynn, and Beyond
www.khmerpostusa.com

# វិបត្តិបន្តនៅវត្តសហគមន៍ព្រះសង្ឃខ្មែរនៅឡូវែល

## News from Community Bouddhist Monks Temple

**ដោយ : ពិន សំខុន**

ប្រជាពលរដ្ឋក្រុងឡូវែលបានឃើញនៅក្នុងកម្មវិធីទូរទស្សន៍សហគមន៍ព្រះសង្ឃខ្មែររបស់ "LTC" នៅរៀងរាល់ថ្ងៃអង្គារមានព្រះសង្ឃមួយអង្គនាម ញ៉ែម គិមតេង ចេញមកបកស្រាយបញ្ហានានាដែលពលរដ្ឋមួយចំនួនមានជំនឿថា សង្ឃរូបនេះ បានបរាជិកទៅ ហើយដោយសារតែមានខ្សែវីដេអូមួយបានចម្លងចែកផ្សព្វផ្សាយយ៉ាងទូលំទូលាយ ថាជារឿងអាសអាភាសនៅក្នុងរង្វង់អ្នកកាន់ពុទ្ធសាសនាខ្មែរទាំងមូល ។ ក៏ប៉ុន្តែរឿងព្រះសង្ឃបរាជិកនេះ បានត្រូវព្រះគ្រូ ចៅអធិការសៅ ឃន នឹងគណសង្ឃដែលជាចៅអធិការវត្តទីដ៏ទៃចេញសេចក្តីថ្លែងការណ៍ការពារ ថាជារឿងប្រឌិត ហើយរក្សាសង្ឃរូបនេះឱ្យនៅជាព្រះសង្ឃគ្រងស្បង់ពណ៌លឿងដ៏ដែលរហូតដល់សព្វថ្ងៃ បើទោះជាដឹងថា ពលរដ្ឋមានការសង្ស័យថា "រឿងអាស្រូវបានរំលោភវិន័យនៃវត្តអារាមយ៉ាងធ្ងន់ធ្ងរ" ក៏ដោយ ។




ព្រះសង្ឃក្នុងក្តីសង្ស័យ ញ៉ែម គិមតេង មានតួនាទីសំខាន់ខាងផ្នែកអប់រំសង្ឃជំនាន់ក្រោយនៅមហាវិទ្យាល័យកម្ពុជាបានឃើញខ្សែវីដេអូភ្លាមក្រសួងធម្មការខ្មែរបានចេញសេចក្តីសម្រេចដកតួនាទីអប់រំដ៏សំខាន់នេះចេញភ្លាមដែរ ហើយស្នើទៅសម្តេចសង្ឃរាជឱ្យបកស្បង់ពណ៌លឿងផ្សឹកពីសង្ឃរូបនេះថែមទៀត ចុងក្រោយបង្អស់នាសប្តាហ៍នេះ យើងទទួលបានពីក្រសួងធម្មការបញ្ជាក់ពីភាពពិតនៃឯកសារភស្តុតាងពិនិត្យដោយអ្នកឯកទេសខ្សែរភាពយន្តដែលធ្វើឱ្យយើងឆ្ងល់ថា "តើគណកម្មការសហគមន៍ព្រះសង្ឃនៅឡូវែលមានអ្វីជាសំអាងដើម្បីការពារសង្ឃ យែម គិមតេង ដែរ?"។ បន្ថែមពីលើនេះ សាមីខ្លួនខាងស្រីបានសារភាពនៅមុខតុលាការរួចទៅហើយថា "រូបក្នុងវីដេអូនោះពិតជារូបរបស់ខ្លួន"ដែលរឹតតែធ្វើឱ្យសហគមន៍ព្រះសង្ឃខ្មែរស្ថិតនៅក្នុងភាពមិនច្បាស់លាស់ គួរឱ្យសង្ស័យពីតួនាទី "ការពារវិន័យព្រះសង្ឃក្នុងព្រះពុទ្ធសាសនាខ្មែរនៅក្រៅប្រទេស" កាន់តែខ្លាំងឡើងៗ ។




សហគមន៍ព្រះសង្ឃខ្មែរក្នុងការផ្សព្វផ្សាយរបស់ខ្លួន មានទូទស្សន៍ មានឯកសារផ្សេង មានប្រក្រដីទិន មានបុណ្យទាន ។ល។ អំពើដែលគួរតែប្រកបដោយធម៌ដោយគោរពទាំងវិន័យនេះប្រាកដជាមិនមែនរឿងឯកជននោះទេ គឺជារឿងសាធារណការធ្វេសប្រហែសបំភ្លៃការពិតណាមួយគឺប៉ះពាល់ដល់សហគមន៍ពុទ្ធសាសនិកទាំងមូល... នៅពេលដែលរឿងដ៏គួរឱ្យសង្ស័យទាំងអម្បាមាណកើតឡើងបានត្រូវយកមកផ្សព្វផ្សាយ គឺធ្វើឱ្យប៉ះពាល់ដល់ការឈឺចាប់ដល់ជំនឿរបស់ពលរដ្ឋខ្លួន...គ្មានអ្វីដែលឃើតយ៉ាវនឹងជួសជុលការភ្លាំងភ្លាត់គ្មានអ្វីគួរឱ្យខ្មាស់អៀននឹងកសាងរឿងពិតជូនជាប្រយោជន៍ដល់ពលរដ្ឋឱ្យបានត្រជាក់ប្រសើរឡើងវិញនោះទេ វានឹងជួយដល់អារម្មណ៍ស្ងប់ស្ងៀមរបស់សហគមន៍ដែលម្នាក់ៗតាំងខ្លួនថា ជាអ្នកបំរើនោះ...ហើយជួយឆ្លើយប្រាប់យើងវិញផងថា "តើវាអាចជាបច្ច័យបុណ្យកុសលទៀតផង"នោះ មែនឬទេ? ៕

***សូមអានលិខិតក្រសួងធម្មការនៅទំព័រទី១៧***

## វត្តត្រៃរតនារាមបន្តរកដំណោះស្រាយ

**ខ្មែរផុសស.រ.អា.**

**ឡូវែល:** មធ្យោបាយដ៏ល្អបំផុតសម្រាប់ដោះស្រាយបញ្ហាបង្រួបបង្រួមវត្តត្រៃរតនារាមដោយសន្តិវិធីនៅពេលគេនិយាយគ្នាជាភាសាខ្មែរ ហើយស្តាប់គ្នាមិនបាន គឺការប្តឹងផ្តល់គ្នាឡើងតុលាការ។ មកទល់ថ្ងៃនេះ ការណែនាំរបស់តុលាការ ដើម្បីបញ្ចប់វិវាតដែលប្តឹងដោយវត្តក្រោម **តទៅទំព័រទី ១៧**




**តពីលេខមុន**

**ដកស្រង់ពីសៀវភៅផ្សេងៗ -សម្រាយដោយខ្មែរផុស ស.រ.អា.**

នៅក្នុងវគ្គទី៤នេះ ជាវគ្គដែលលោកអ្នកអាចចាប់ផ្ដើមអនុវត្តន៍ទ្រឹស្ដីជា"អ្នកមាន"នេះពេលណាក៏បានគ្មានអ្វីរំខាន ឬក៏យឺតពេលនោះទេ ទោះជាយើងគ្មានសម្បត្តិទាល់តែសោះ ឬក៏មានខ្លះហើយ ឬក៏មានច្រើនហើយក្ដីការមិនយកចិត្តទុកដាក់ធ្វើតាមទ្រឹស្ដីនេះទេ គឺមិនអាចក្លាយជាអ្នកមាន ឬបើទោះជាមានហើយក៏ដោយក្ដី ក៏អាចបាត់បង់សម្បត្តិនៅទៅវិញបានដែរ ។ នៅក្នុងពិភព"អ្នកមាន"នៃស.រ.អា.សព្វថ្ងៃនេះ សកម្មភាពលក់-ទិញ-វិនិយោគ-ហ៊ុហារ-មុខមាត់ បានធ្វើឱ្យពលរដ្ឋជាច្រើនលើសលុបមានរូបរាងជា "អ្នកមាន"តែជំពាក់ធានាគារវ៉ាន់ករជំពាក់រដ្ឋស្អិតដោះមិនរួចនេះក៏ដោយសារគោលការណ៍ចំបងដ៏ងាយស្រួលនៃ"ការសន្សំតក់ៗ"មិនមានភាពរឹងមាំអាចទប់ទ្វរ"ចំណង់"ចាយវាយឱ្យជាប់បាន ។ ដូច្នេះការសន្សំតក់ៗ គឺត្រូវពឹងផ្អែកទាំងស្រុងទៅលើភាពច្បាស់លាស់នៃចំណេះក្នុងការចាយវាយដែលនឹងបរិយាយក្នុងភាគទី៤នោះហើយ ។

**៤-កិច្ចការពារកុំឱ្យសម្បត្តិនោះចេញទៅវិញដោយខ្ជះខ្ជាយ :** ការពារផ្ទះសម្បែងដែលគ្មានទ្វារគ្មានសោជាសញ្ញាច្បាស់លាស់ថា មិនមានអ្វីដែលអាចរក្សាបានគង់វង់ទេ នៅផ្ទះទៀតសោតក៏ត្រូវមានកន្លែងសម្ងាត់នឹងមាំទាំសម្រាប់ទុកដាក់លុយដែរ បើមិនដូច្នោះទេត្រូវទុកដាក់លុយនឹងរបស់មានតម្លៃ ដូចជាមាសពេជ្រជាដើមនៅធានាគារ ។ ការបាត់បង់បើទោះជាតិចតួចក្ដីត្រូវឱ្យដឹងថាបាត់ពេលណា? ដោយសារអ្វី? ចំនួនប៉ុន្មាន? ហើយរកវិធានការកែរតម្រូវ កុំឱ្យវាកើតឡើងទៀតបាន ។

ការសន្សំសំចៃរាល់ថ្ងៃត្រូវគិតឱ្យបានត្រឹមជាទីបំផុត ពីព្រោះលុយមួយកាក់មួយសេនដែលរើសទុករាល់ថ្ងៃ ក៏អាចក្លាយជាសេដ្ឋីបានដែរ តែក៏មិនត្រូវខើចហួសពីសន្តិសុខនឹងសុខភាពជាប្រចាំក្នុងគ្រួសារទេ ។ ការសន្សំនេះរាប់ទាំងការសំគាល់ទីផ្សារដែលមានរបស់ល្អតម្លៃថោកដែលត្រូវទៅទិញម្ហូបអាហារ ឬឥវ៉ាន់ប្រើប្រាស់ដែលធ្វើឱ្យចំណាយចុះតិចថែមពីលើនោះក្រុមពាណិជ្ជករគេចែកប័ណ្ណរង្វាន់"គូប៉ុន"ជូនភ្ញៀវដែលសន្សំសំចៃបានច្រើនរយដុល្លាបានក្នុង១ខែៗទៀតផង។



ត្រូវតាមដានពីប្រាក់ចំណាយឱ្យបានប្រកិតដូចជាថ្លៃផ្ទះ ថ្លៃទឹកភ្លើង ថ្លៃទិញម្ហូបអាហារកុំឱ្យគេដកលុយលើសពីត្រូវចំណាយចាំបាច់។ នៅមានលុយចេញពីហោប៉ៅផ្សេងទៀតដែលចាំបាច់ដែរនោះ គឺសន្សំប្រាក់ចំណាយអាសន្នសន្សំប្រាក់ចូលនិវត្តិ៍ប្រាក់សន្សំឱ្យកូនរៀន... ប្រាក់ទាំងនេះបើឆាប់សន្សំពេលវ័យក្មេងឱ្យបានទៀងទាត់កាន់តែល្អ។

ត្រូវមើលបញ្ជីចំណាយចំណូលជាមួយគ្រួសារ



ឱ្យបានរាល់ថ្ងៃ ឬហោចណាស់រាល់អាទិត្យ ដើម្បីស្វែងរកការកាត់បន្ថយចំណាយឥតប្រយោជន៍ដែលអាចមានជាយថាហេតុ ។ ការទិញរបស់ថ្មីដាក់ផ្ទះដោយចាយលុយតិច ឬច្រើនត្រូវរួមពិគ្រោះរវាងប្ដីប្រពន្ធនឹងកូន ដើម្បីឱ្យមានការចុះសម្រុងគ្នាក្នុងគ្រួសារ ។

ការសុំ ឬខ្ចីគេត្រូវគិតជាសំណងថ្ងៃណាមួយបើកំណត់ថ្ងៃមិនបាន រឺឯភាពទៀងទាត់ គឺជាសម្បត្តិមួយដ៏ថ្លៃថ្លាសម្រាប់ធានានូវការទុកចិត្ត គឺការទុកចិត្តនេះហើយដែលអាចឱ្យអ្នកដ៏ទៃហ៊ាន

**តទៅទំព័រទី ១៥**

ព័ត៌មានខ្លីៗ

# ប្រទេសយូក្រែន

**យូក្រែន:** នៅ២សប្ដាហ៍បន្ទាប់ពីកងទ័ពរុស្សីចូលលុកតំបន់ភាគខាងត្បូងនៃប្រទេសយូក្រែនមានឈ្មោះ"គ្រេមីយ៉ា"ដោយគ្មានបង្ហូរឈាម(ចុងខែកុម្ភៈ)ទ័ពឈ្លានពាននេះមិនមានបំណងត្រឡប់ថយក្រោយទៅប្រទេសខ្លួនវិញទេ រុស្សីបន្តរពង្រាយដាក់ទ័ពប្រដាប់អាវុធធុនធ្ងន់រាប់ម៉ឺននាក់តាមព្រំប្រទល់ដែនរុស្សី-យូក្រែនទៀតផង ពីសេសទៅទៀតនោះពលរដ្ឋ "គ្រេមីយ៉ា"ភាគច្រើននិយាយភាសារុស្សីចង់នៅក្រោមការគ្រប់គ្រងរដ្ឋបាលរុស្សីទៅវិញ។ ខុសគ្នានឹងពលរដ្ឋខាងជើង"យូក្រែន"វិញ ពលរដ្ឋរាប់ម៉ឺននាក់ចេញមកសំដែងការប្រឆាំងនឹងវត្តមានរុស្សីយ៉ាងខ្លាំងក្លារាប់ទាំងបានទម្លាក់ប្រធានាធិបតីរបស់ខ្លួនឈ្មោះ"យ៉ានូកូវិច"ដែលបានក្បត់ចុះចូលនឹងរដ្ឋបាលរុស្សីផង។ សហគមន៍អន្តរជាតិជាពិសេសអឺរ៉ុបតវ៉ាភ្លាមៗប្រឆាំងនឹងការចូលលុកលុយរបស់រុស្សីទៅលើប្រទេសអធិបតេយ្យមួយទៀត **តទៅទំព័រទី២៧**

# បាត់យន្តហោះម៉ាឡេស៊ី ប៊ូអ៊ីង ៧៧៧

(Missing Malaysia Air line) អាកាសចរស៊ីវិល"ម៉ាឡេស៊ាអ៊ែឡាញ"កាលពីថ្ងៃ៩ ខែមិនា អាកាសចរ"ម៉ាឡេស៊ានអ៊ែឡាញ"ជើងMH370 ផ្ទុកអ្នកដំណើរ៣៣៩នាក់បានចេញដំណើរពី "គូឡាឡាំពួរ"សំដៅទៅ"បេយ៉ីង"នៃប្រទេសចិនដីគោក។ មកដល់ចំណុចក្បែរកោះត្រល់ក៏បាត់ដំណឹងសូន្យឈឹង ។ ការស្រាវជ្រាវបានឱ្យដឹងថា យន្តហោះMH370បានត្រឡប់មកក្រោយវិញដោយគ្មានបញ្ហា ឬឱ្យតំណឹងទៅ"តួកុងត្រូល"ទេ អ្នកឯកទេសមិនអាចសន្និដ្ឋានបានថា យន្តហោះត្រូវគេពង្វាងត្រូវផ្ទុះខូចខាត ឬក៏ចុះចតត្រង់ណានោះទេ ។ ចូលរួមសហការណ៍រកតួរទាំងមូលឬក៏បំណែកនៃយន្តហោះនៅក្នុងសមុទ្រ ឬនៅលើគោកមាន១៣ប្រទេសប្រទេសរាប់ទាំងស.រ.អា.ផង ។ កន្លងជាងមួយសប្តាហ៍ហើយនៅតែពុំមានដំណឹងអ្វីប្លែកក្រៅពីរកមិនឃើញនោះទេ អ្នកវិភាគចាប់ផ្ដើមសង្ស័យថា ការបាត់ដានយន្តហោះMH370នេះ ប្រាកដ

**តទៅទំព័រទី ២៧**




យូក្រែនក្នុងរូបភាពបែងចែកពណ៌ខៀវទោទៅរុស្សី លឿងទុំទោខាងសហភាពអឺរ៉ុប




យន្តហោះម៉ាឡេស្យាអ៊ែឡាញ MH370 មុននឹងបាត់ខ្លួន

# ដំណើរទៅ"ឡុងប៊ិច"ក្រុងដែលមានខ្មែររស់នៅច្រើនជាងគេនៅស.រ.អា. (ភាគ៣)

**ពិន សំខុនៈ សម្រាប់ខ្មែរផុសស.រ.អា.**

លេខនេះ ខ្ញុំសូមលើកយកពិធីរបស់គ្រួសារខ្មែរមួយនៅ"ឡុងប៊ិច"មកពិចារណានឹងកំសាន្តជាមួយគ្នាវិញម្តង។

ដូចដែលយើងបានជម្រាបលោកអ្នកអាន



"សែនអ្នកថែររក្សាភូមិ"ពេលនាំកូនក្រមុំចូលផ្ទះកូនកម្លោះ



សំពះ"សែនមេបា"នៅក្នុងផ្ទះ



ពីធីចាក់ទឹកតែជូនជីដូន



ពិធីចាក់ទឹកតែជូនមាតាបិតា



គ្រួសារខ្មែរតំណាវប្បធម៌ចៅចិននៅស.រ.អា.ក៏មកជួបជុំគ្នាជាមង្គលដែរ

ពីដើមទីមកថា គ្រួសារខ្ញុំធ្វើដំណើរតាមជើងយន្តហោះមកចូលរួមពិធីមង្គលការក្មួយនៅទីក្រុង "ឡុងប៊ិច"នេះ នៅថ្ងៃសុក្រ ថ្ងៃសៅរ៍ នឹងថ្ងៃអាទិត្យចំថ្ងៃបុណ្យស្នេហា"វ៉ាឡង់ថាញ"ឆ្នាំ២០១៤នេះ បន្ទាប់ពីទស្សនាតំបន់ជុំវិញ "កាលីហ្វ័ញ៉ា" នឹងបានជួបជុំដល់អស់បងប្អូនអស់រយៈ៣ថ្ងៃកន្លងមក ។ ពិធីមង្គលការកូនក្មួយមួយនេះ កើតឡើងស្ទើរតែជារឿងព្រេងនិទានដ៏វែងអន្លាយមួយរវាង គូរស្វាមីភរិយាអាយុច្រើនបន្តិចហើយ គឺកូនប្រុសឈ្មោះនាយបិច នឹងកូនស្រីឈ្មោះ នាងវិច ដែលពិធីមង្គលនេះតាមពិតទៅគួរតែកើតឡើង កាលពី១០ឆ្នាំមុនឯណោះ **តទៅទំព័រទី ០៩**

# ហូល ទស្សនាវដ្តីថ្មីនៅឡូវែល

**ដោយ : ចេម អសទីស**

**ប្រែសម្រួលដោយ : សុខា**

**ឡូវែល:** ថ្ងៃទី១៣ខែមីនា ឆ្នាំ២០១៤ ការិយាល័យសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក មានកិត្តិយសទទួលសំនេះសំណាលជាមួយអ្នកតំណាងដែលអញ្ជើញមកពីទស្សនាវដ្តីហូលដែលជាទស្សនាវដ្តីថ្មីនៅឡូវែល។ អ្នកតំណាងនោះជាអតីតមន្ត្រីបម្រើការនៅសាលាក្រុងឡូវែល ហើយជាអ្នកនិពន្ធសម្រាប់ទំព័រស្តីពីសកម្មភាពអភិបាលក្រុងក្នុងគេហទំព័រ រូមហ្វីហ្វធី។ អ្នកតំណាងនោះ គឺអ្នកនិពន្ធ ចេននីហ្វើ មីយី។ អត្ថបទដែលចេននីហ្វើ ធ្លាប់បានផ្សាយនៅក្នុងគេហទំព័រសាលាក្រុងនាឆ្នាំ២០១៣ ក៏ធ្លាប់ត្រូវបានបំពេញប្រយោជន៍ដល់សហគមន៍ខ្មែរ តាមរយៈការបកប្រែជាភាសាខ្មែរផ្សព្វផ្សាយក្នុងសារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិក។

បច្ចុប្បន្នក្នុងនាមជាអ្នកនិពន្ធទស្សនាវដ្តី ចេននីហ្វើ បានលើកឡើងអំពីលក្ខណៈរបស់ទស្សនាវដ្តីហូល គឺជាទស្សនាវដ្តីស្តីពីសិល្បៈ និងវប្បធម៌។ ទស្សនាវដ្តី ហូល នឹងក្លាយជាទស្សនាវដ្តីថ្មីផ្តល់ដល់អ្នកអានកំសាន្តអំពីឡូវែល ហើយបោះពុម្ពជារៀងរាល់ខែ។

ដើមឡើយទស្សនាវដ្តី ហូល បានក្លាយខ្លួនជាទស្សនាវដ្តីលើប្រព័ន្ធអីនធឺណិតនៅខែមិនា ឆ្នាំ ២០១២ ដោយមានផ្តល់ព័ត៌មានស្តីពីសិល្បៈតន្ត្រី និងវប្បធម៌ឡូវែល។ **តទៅទំព័រទី ២០**



នាយកខ្មែរផុស សុបិន្ត ពិន ស្វាគមន៍អ្នកនិពន្ធ ជេនីហ្វើ មៃយើ នៃទស្សនាវដ្តីហូល

# Hearing the Howl of a new print media resource in Lowell

**By James Ostis**

On March 13th, the office of KhmerPostUSA welcomed a familiar face who was representing an exciting new endeavor. Jennifer Myers, whose posts in the Room 50 Blog occasionally were cross-posted in this newspaper in 2013, stopped by in her new role as the Arts and Culture Editor for Howl Maga- zine, a new monthly publication covering the arts and entertainment scene of Greater Lowell.

Howl Magazinewas originally launchedin March 2012 as Howl in Lowell, a digital arts and entertainment magazine celebrating the music, art and culture of Lowell.After two years as an online-only news source, Howlreleased its first print edition earlier this month. The premiere issue included stories on several local bands, events, and restaurants as well as a Women's History Month inspired article entitled "Fight Like a Girl" highlighting some of Lowell's most 'extraordinary local ladies.' The upcoming April edition will include a feature on Cambodian New Year in Lowell and KhmerPostUSA will be among the local organizations and individuals highlighted in the issue.

Howl is a free full-color "guide to living in Greater Lowell" printing monthly and available while supplies last at over 20 locations throughout Greater Lowell including Brew'd Awakening Coffeehaus, K Pharmacy, and the Lowell National Historical Park Visitors Center. More information on Howl Magazine can be found at the www.howlmag.com. The April edition with the feature on Cambodian New Year hits newsstands on March 27th.

# "ច្បាប់" ឈ្នានីស និងរើសអើង


លឹម គិមយ៉ា

មន្ត្រីជាន់ខ្ពស់គណបក្សប្រជាជនកម្ពុជាប្រកាសថា រដ្ឋាភិបាលកំពុងពិចារណាធ្វើសេចក្តីព្រាងច្បាប់ហាមឃាត់អ្នកនយោបាយដែលមានសញ្ជាតិពីរមិនឱ្យឈរឈ្មោះជាបេក្ខជននាយករដ្ឋមន្ត្រីសម្រាប់ការបោះឆ្នោតអាណត្តិក្រោយៗ។

លោកជាមយៀបតំណាងរាស្ត្រជាន់ខ្ពស់គណបក្សប្រជាជនកម្ពុជាលោកនេះដែលបានបណ្តាលឱ្យមនុស្សពីរនាក់ស្លាប់មានប្រសាសន៍ថាមូលហេតុដែលសមាជិកសភាគណបក្សប្រជាជនកម្ពុជាចង់ហាមឃាត់អ្នកនយោបាយដែលមានសញ្ជាតិពីរធ្វើជានាយករដ្ឋមន្ត្រីដោយសារបារម្ភថាអ្នកទាំងនោះមិនគិតប្រយោជន៍ជាតិជាធំ។

ការដែលសមាជិកសភាគណបក្សប្រជាជនកម្ពុជាបារម្ភយ៉ាងនេះមិនដឹងជាគេសំអាងទៅលើអ្វីទេ។

លោកជាមយៀបបន្តថាច្បាប់នេះទាមទារវេលាសិក្សាលម្អិតជាមុនសិន: "យើងពិនិត្យមើលការរីកចម្រើននៅក្នុងប្រទេសបច្ចុប្បន្នយើងពិនិត្យគ្រប់ជ្រុងជ្រោយដូចថាច្បាប់ឧបមាថានាយករដ្ឋមន្ត្រីដែលមានសញ្ជាតិ២ដូចថាសញ្ជាតិខ្មែរនិងថៃ។ ប្រសិនបើយើងឈ្លោះគ្នាជាមួយថៃតើនាយករដ្ឋមន្ត្រីអាចកាន់ជើងខាងណាមានជំហរខាងណា? អីចឹងបញ្ហានេះពិបាកណាស់ម្ល៉ោះហើយយើងចង់បាននាយករដ្ឋមន្ត្រី និងសភាមានសញ្ជាតិតែមួយ។

ហេតុអ្វីបានជាលោកជាមយៀបលើកឧទាហរណ៍តែជាមួយថៃតែប៉ុណ្ណោះម្តេចលោកមិនលើកពីខាងយួនផង បើតាមប្រវត្តិសាស្ត្រយួនបានរំលោភលើខ្មែរជាច្រើនលើកច្រើនសារហើយនៅពេលថ្មីៗក៏មាន។

លោកប្រធានសមរង្ស៊ីដែលមានសញ្ជាតិពីរត្រៀមនឹងលះបង់សញ្ជាតិមួយប្រសិនបើរដ្ឋាភិបាលបង្កើតច្បាប់ដើម្បីហាមឃាត់លោកមិនឱ្យក្លាយជាមេដឹកនាំប្រទេសទៅថ្ងៃក្រោយ។ ហើយលោកបានបន្ថែមពីករណីព្រះមហាក្សត្រយើងដែលមានសញ្ជាតិ២ ដោយថា: ខ្ញុំយល់ថា លោកជាមយៀបមិនមែនសំដៅមកលើខ្ញុំទេលោកជាមយៀបដែលជាតំណាងរាស្ត្រគណបក្សប្រជាជនកម្ពុជាចង់សំដៅលើព្រះមហាក្សត្រពីព្រោះព្រះមហាក្សត្រព្រះនរោត្តមសីហមុនីលោកមានសញ្ជាតិ២លោកមានលិខិតឆ្លងដែនបារាំងដូចនេះរឿងខ្ញុំមិនសំខាន់ទេគឺគាត់និយាយនេះគឺប៉ះពាល់ព្រះមហាក្សត្រតែម្តង។ប៉ុន្តែអ្វីដែលសំខាន់យើងមើលខាងលើសិនបើថា ព្រះមហាក្សត្រមានសញ្ជាតិ២បានលោកធ្វើស្តេចបានដូច្នេះរឿងដទៃទៀតមិនសំខាន់ដូចព្រះមហាក្សត្រទេ...។

តើលោកជាមយៀប និងសមាជិកសភាគណបក្សប្រជាជនកម្ពុជាមានលេសអ្វីផ្សេងទៀតដើម្បីហាមឃាត់អ្នកនយោបាយដែលមានសញ្ជាតិពីរ ? យើងយកលេសត្រឹមនេះមកធ្វើការវិភាគសិនពីព្រោះលោកជាមយៀបបាននិយាយតែត្រឹមនេះ។

ដើម្បីវិភាគរឿងអ្វីមួយយើងត្រូវតែសំអាងទៅលើការពិតដែលមានមិនត្រូវសំអាងទៅលើការយល់អ្វីដលែគេចង់យល់នោះទេ។

នៅលើលោកនេះមានឧទាហរណ៍យ៉ាងច្រើនមិនមែនតែនៅប្រទេសខ្មែរទេដែលអ្នកដឹកនាំបានភៀសខ្លួនទៅនៅបរទេសដោយប្រការណាមួយហើយត្រឡប់មកស្រុកវិញហើយខ្លះបានទទួលតំណែងដឹកនាំស្រុក។ ខ្លះបានសញ្ជាតិដទៃខ្លះក៏មិនព្រមយកដោយប្រការណាមួយ។អ្នកខ្លះដែលបានសញ្ជាតិគេភាគច្រើនដើម្បីសំរួលក្នុងការរស់នៅ។

យើងលើកឧទាហរណ៍មួយយ៉ាងច្បាស់ គឺប្រទេសអីស្រាអែលដែលប្រជាពលរដ្ឋគេបែកខ្ញែកពេញពិភពលោកដោយសារគេបាត់បង់ប្រទេសគេ។ ប្រទេសអីស្រាអែលចាប់កំណើតឡើងវិញកាលតែពីឆ្នាំ១៩៤៨តែប៉ុណ្ណោះ។ ប្រទេសអីស្រាអែលមានសត្រូវរបស់ខ្លួនគឺប្រទេសអារាប់ដែលនៅជុំវិញ។ ភាគច្រើនអ្នកដឹកនាំប្រទេសនេះមានកំណើតនៅបរទេសហើយខ្លះក៏ធ្លាប់នៅក្នុងប្រទេសអារាប់អស់នេះហើយមានសញ្ជាតិជាបរទេសថែមទៅទៀតតែគេមិនដែលចោទសួរពីកិរិតទឹកចិត្តស្រឡាញ់ជាតិរបស់គេនោះទេ។ តែយើងសង្កេតឃើញពួកអ្នកដឹកនាំអស់នេះគេការពារជាតិគេយ៉ាងមុតមាត់និងអង់អាច។

យើងបែរមកមើលប្រទេសខ្មែរយ៉ាងដូចម្តេចទៅវិញ ? មួយចំនួនធំប្រជាពលរដ្ឋខ្មែរឃ្លាតពីប្រទេសទៅជ្រកកោននៅប្រទេសដទៃជាច្រើននៅក្នុងពិភពលោកដោយសារតែពួកខ្មែរក្រហមដែលមានអ្នកដឹកនាំខ្លះរបស់គណបក្សប្រជាជនកម្ពុជាដូចជាហេងសំរិនជាសុិមហ៊ុនសែនជាដើមបានរួមដៃមួយរយ:ជាមួយពួកប៉ុលពតដែលវាសំលាប់ខ្មែរ។ ហើយខ្លះបានទៅមុនឆ្នាំ១៩៧៥ដោយមូលហេតុផ្សេងៗ។តែពួកខ្មែរនៅឯបរទេសអស់នេះជាច្រើនមានចិត្តស្រឡាញ់ស្រុកដោយស្មោះបានធ្វើពលិកម្មដើម្បីរំដោះស្រុកពីការត្រួតត្រាយួនដែលមានហេងសំរិនជាសុិមហ៊ុនសែនជាដើមដែលចូលដៃ។ពួកខ្លះដែលចូលដៃជាមួយយួនមិនច្បាស់ជាស្រឡាញ់ស្រុកដោយស្មោះនោះទេហើយខ្លះយួនវាចាប់ដាក់ឡានទ្រុងត្រឡប់មកវិញទេ។

មួយរយ:ពេលដែលយួនត្រួតស្រុកយួនកំចាត់ខ្មែរដែលការពារប្រយោជន៍ជាតិជាជាងគិតប្រយោជន៍យួន ។ លោក ប៉ែន សុវណ្ណ បានទទួលរងគ្រោះដោយសារតែលោកការពារផលប្រយោជន៍ជាតិ ។ ហើយយួនបានសំលាប់អ្នកដឹកនាំខ្មែរជាច្រើនដែលមិនព្រមឱ្យប្រយោជន៍ខ្មែរបាត់បង់ ។ រហូតមកដល់ ហ៊ុន សែន បានយួនវាមិនសំលាប់ នេះបានសេចក្តីយ៉ាងដូចម្តេច? ឬមួយត្រឹមតែ ហ៊ុន សែន អរគុណយួនបានវាមិនសំលាប់ ។ ហ៊ុន សែន មានសញ្ជាតិខ្មែរតែមួយពិតតើហ៊ុនសែនបានការពារផលប្រយោជន៍ខ្មែរ **តទៅទំព័រទី ២១**

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាសយដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម Advertising
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ Editorials
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Kim Sos, Mao Chan Somnom, Mam Yin,
Richard Howe Esq. Sengly Kong, Ph.D. James Ostis
ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
ជំនួយការរដ្ឋបាល **Administrative Assistant**
Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

## តមកពីទំព័រទី ៦ ដំណើរទៅ"ឡុងប៊ិច"ក្រុងដែលមានខ្មែរ...

ដោយសារអ្នកទាំងពីរនាក់នេះបានត្រូវដង ត្រូវផ្ដែត្នាតាំងពីយុវវ័យមកម្លេះ... ដូច្នេះថ្ងៃសេរីមង្គលពេលនេះ គឺជាពរជ័យដ៏មានតម្លៃនៃការតស៊ូដើម្បីសេចក្ដីស្នេហាដ៏ស្មោះស្ម័គ្រធ្វើឱ្យយើងងាយយល់ថា "បានរត់លូនឆ្លងកាត់ឧបសគ្គដែលលាយឡំរីករាយនឹងឈឺចាប់រាប់មិនអស់ រហូតបានមកដល់មេឃស្រឡះឃើញពន្លឺព្រះអាទិត្យនៃថ្ងៃនេះ"។

គ្រួសារលោកសាមៀងជាឪពុកខាងកូនស្រីមាន"សែខុត"ឥតលាយជាចាស់ស្រុក "ឡុងប៊ិច" នេះ តែនៅពេលចូលនិវត្តន៍ កាលពី៤-៥ឆ្នាំមុន បានប្ដូរកន្លែងទៅរស់នៅរដ្ឋ"អារីហ្សូណា"វិញម្ដង ។ រីឯខាងកូនប្រុសមានអ្នកស្រីឡាជាម្ដាយត្រូវជាប្អូនជីដូនមួយនឹងខ្ញុំ បានប្ដីជាកូនចៅចិនមាន "សែ...សីហា" បានកំណត់យកថ្ងៃសុក្រជាថ្ងៃ "សែនមេបា"តាមទំនៀមទំលាប់ចិននៅគេហដ្ឋានខាងប្រុសនៅផ្លូវ"អាឡា-ឡុងប៊ិច" ដែលក្នុងពិធីរបស់គ្រួសារចិននោះគេប្រកាន់ថា "ដង្ហែកូនស្រីមកតែម្នាក់ឯង ចូលផ្ទះកូនប្រុស ហើយមិនត្រឡប់ទៅផ្ទះវិញជារៀងរហូត រីឯនាយប៊ិចជាកូនប្រុសបងគេបង្អស់នឹងមានកិត្តិយសជាអ្នកស្នងត្រកូលកាន់ជើងធូបគ្រួសារជាបន្តទៅទៀត ទាំងប្រុសឆ្ងាយជិតពិធីតាមទំនៀមទំលាប់ខ្មែរ បានត្រូវប្រារព្ធបន្តពីមួយទៅមួយកំដរដោយភ្លេងការដ៏ចំណានពេញមួយថ្ងៃសៅរ៍មានទទួល



អាហារថ្ងៃត្រង់ដល់ភ្ញៀវប្រមាណ៧០នាក់ទៀតផង ហើយល្ងាចឡើងទើបកូនក្រមុំ កូនកំឡោះអញ្ជើញក្រុមគ្រួសារទាំងអស់ពិសារភោជនាហារល្ងាចទៀត នៅហាងចិនមួយនៅក្បែរនោះមិន

តាអាណា"។ នារាត្រីនោះមានក ារបង្ហាញខ្លួនស្វាមីភរិយាថ្មីថ្មោង ចំពោះភ្ញៀវនៃគ្រួសារស្រីប្រុសប្រមាណ៣០០នាក់ ដ៏ស្រស់ស្អាតគ្រប់ៗរូបដែលមករីករាយអបអរសាទរ និងប្រសិទ្ធីពរជ័យដល់គូរព្រេងថ្មីស្រឡាងក្នុងសំលៀកបំពាក់គ្រឿង



ប្រពៃណីផង សំលៀកបំពាក់រាត្រីសម័យផង ។ នារាត្រីដ៏នក្ខត្តឬកនេះភ្ញៀវខាងប្រុសម្ខាងភ្ញៀវខាងស្រីម្ខាងមកពីតំបន់ឆ្ងាយជិតតែនាំគ្នារាំកំសាន្តជុំគ្នាមានទាំងចាស់ៗខ្លះ បង្ហាញស្នា

គ្រួសារ"ចៅកេត"មួយក៏កើតឡើងថ្មីទៀត នៅរដ្ឋ"កាលីហ្វ័ញ៉ា-អារីហ្សូណា"។ គេហៅសាមញ្ញថាជាគ្រួសារ"ចៅកេត" គឺជាខ្មែរ-អាមេរិកាំងគំរូធម្មតាមួយទៀតបានចាប់កំណើតនៅរាយពេញ ស.រ.អា.កាន់តែច្រើនទៅហើយ តែគ្រួសារខ្មែរឆាប់ដាច់ឫសគល់ជាងខាងគ្រួសារចិនដោយសារទំនៀមទំលាប់ចិនមានកូនស្រីជាមេផ្ទះគេមកជាអ្នកជួយពង្រឹងគ្រួសារខាងកូនប្រុសលែងគិតគូរពីគ្រួសារខាងខ្លួនឯងទៀតហើយ ហើយការកាន់ជើងធូបបន្តត្រកូលរបស់កូនប្រុសច្បង គឺជាការចងចាំនឹកគុណបន្តបានច្រើនជំនាន់បានយូរជាង



"សែនអ្នកថែរក្សាភូមិ"ពេលនាំកូនក្រមុំចូលផ្ទះកូនកម្លោះ



របាំជូនពរប្រពៃណីស្ដេចបូរាណខ្មែរ រាំដោយសិល្បការិឯកជាគ្រួសារជូនជាកិត្តយសដល់គូរស្វាមីភរិយាថ្មី



ជូនពរនឹងចងដៃក្ងយប្រុសស្រី ជំនូសភ្ញៀវទាំងអស់នៃគុរបស់ខ្លួន



រាំកំសាន្តនារាត្រីមង្គលការក្មួយ ឱ្យអស់ដៃម្ដង!





ប៊ុណ្ណារ៉ូ ត្រូវជាជីដូនមួយជាមួយកូនកម្លោះក៏ទៅពីឡវែលចូលរួមជប់លៀងនារាត្រីនោះជាមួយម្ដាយដែរ

នៅពេលមាតាបីតាចែកឋានទៅ"។

ដល់ថ្ងៃសៅរ៍គេរៀបពិធីមង្គលការតាមទំនៀមទំលាប់ខ្មែរវិញម្ដង នៅគេហដ្ឋានខាងស្រីអាគិតាដែលលោកសាមៀងជួលមួយអាទិត្យនៅឡុងប៊ិចនៅទីនោះ ជាមួយក្រុមគ្រួសារទាំងស្រីឱ្យមានអ្វីខ្វះខាតឡើយ ។

ថ្ងៃអាទិត្យបន្ទាប់មកក្រុមគ្រួសារនឹងញាតិមិត្តទាំងខាងស្រីខាងប្រុសទាំងអស់បានត្រូវអញ្ជើញទៅជប់លៀងយ៉ាងអ៊ឹកធឹកនៅភោជនីយដ្ឋានមួយទៀតឈ្មោះ"ម៉ុងណាមូរ" នៅ "សង់ដៃរាំរែក"បូលរូម" ជំនួសការហាត់ប្រាណសម័យថ្មីដ៏សង្ហារអស្ចារ្យកំដរក្មេងៗនឹងដោយក្រុមតន្ត្រីភ្លេងសម័យដ៏ពីរោះ គួរឱ្យកោតសសើរនឹងចង់គយគន់។

រាត្រីបានបញ្ចប់ទៅយ៉ាងរីករាយនឹងបរិបូរណ៍ខាងគ្រួសារខ្មែរដែលច្រើនភ្លេចត្រកូលខ្លួនត្រឹមជំនាន់ជីតាជីដូនបង្កើតរបស់ខ្លួនតែប៉ុណ្ណោះ ពីព្រោះគ្មានក្បួនសំរាប់ការចងចាំនឹងនឹកគុណបន្តពូជទេ។

តទៅទំព័រទី ២១

# ជម្ងឺបាក់ស្បាត : បញ្ហាសុខភាពសាធារណៈដែលមនុស្សគ្រប់គ្នាគួរយកចិត្តទុកដាក់

# PTSD: A Public Health Issue Should Be in Everyone’s Mind

**តពីលេខមុន**

**ដោយ : ជិន វិសាល, អនុបណ្ឌិតសុខភាពសាធារណៈ**

ដូច្នេះការយកចិត្តទុកដាក់ថែទាំសុខភាពផ្លូវចិត្ត ជាពិសេសជម្ងឺបាក់ស្បាត គឺជាកតព្វកិច្ចដែលមនុស្សគ្រប់គ្នាត្រូវយកចិត្តទុកដាក់ឱ្យដូចជាការថែទាំសុខភាពរាងកាយដែរ ។

ការមិនដឹងឬមិនទទួលស្គាល់ជម្ងឺបាក់ស្បាតថា ជាបញ្ហាសុខភាពបានចោទជាបញ្ហាដល់បុគ្គលផ្ទាល់ខ្លួនដល់គ្រួសារនិងសង្គមទាំងមូល ។ មានមនុស្សតិចតួចណាស់ដែលធ្លាប់ឮឬស្គាល់ជម្ងឺបាក់ស្បាត។ ដូច្នេះយើងគួរស្វែងយល់អំពីជម្ងឺនេះនិងបញ្ហាផ្លូវចិត្តដទៃទៀត ហើយជួយផ្សព្វផ្សាយអប់រំក្រុមគ្រួសារ និងសហគមន៍របស់យើងឱ្យយល់ដឹងកាន់តែច្រើនថែមទៀត ។



យើងខ្ញុំនឹងនាំយកមកផ្តល់ជូនប្រិយមិត្តអ្នកអាននូវព័តិមានថ្មីៗ និងលទ្ធផលនៃការសិក្សាស្រាវជ្រាវនានាពាក់ព័ន្ធនឹងជម្ងឺបាក់ស្បាតវិធីព្យាបាល និងការថែទាំមួយចំនួនដែលអ្នកឯកទេសចិត្តសាស្ត្រនិងគ្រូពេទ្យផ្នែកផ្លូវចិត្តនៅលើពិភពលោកកំពុងអនុវត្តសព្វថ្ងៃ ។ លើសពីនោះទៀតយើងខ្ញុំក៏លើកយកមកពិភាក្សាផងដែរនូវវិធីព្យាបាលរោគផ្លូវចិត្ត តាមប្រពៃណីបុរាណមួយចំនួនសម្រាប់មិត្តអ្នកអានពិចារណាថ្លឹងថ្លែង និងទាញសេចក្តីសន្និដ្ឋានដោយខ្លួនឯង។

តាមន័យទូទៅពាក្យថាបាក់ស្បាត ឬចាញ់ច្រាប គឺជាស្ថានភាពដែលបុគ្គលម្នាក់មិនអាចប្រឈមមុខ ឬធ្វើសកម្មភាពអ្វីមួយកើតនៅចំពោះមុខហេតុការណ៍ឬព្រឹត្តិការណ៍ដ៏ភ័យរន្ធត់មួយដែលមានលក្ខណៈស្រដៀងគ្នានឹងហេតុការណ៍ដែលគាត់ធ្លាប់បានជួបប្រទះកាលពីពេលមុន។ ហេតុការណ៍ដ៏តក់ស្លុតនោះអាចជាគ្រោះថ្នាក់ធម្មជាតិ ឬហេតុការណ៍បង្កឡើងដោយមនុស្ស ។ ជាឧទាហរណ៍ប្រសិនបើគាត់ធ្លាប់ជួបប្រទះគ្រោះថ្នាក់រថយន្តដែលបង្កឱ្យគាត់មានរបួសធ្ងន់ធ្ងរ គាត់ក៏មិនហ៊ានបើកបរ ឬជិះរថយន្តទៀតដោយសារគាត់យល់ថា គ្រោះថ្នាក់រថយន្តអាចនឹងកើតឡើងជាថ្មីទៀតដល់រូបគាត់។ ជនជាតិខ្មែរនិយមប្រើពាក្យប្រដូចថា "ឆ្មាធ្លាប់ត្រូវទឹកក្តៅ ទោះបីឃើញទឹកត្រជាក់ក៏វាគិតថាជាទឹកក្តៅដែរ" ហើយវាក៏នឹងដើរចៀសឱ្យឆ្ងាយពីទឹកនោះ។

វិជ្ជាពេទ្យបស្ចិមប្រទេសបានប្រើពាក្យថា PTSDដើម្បីសម្គាល់ជម្ងឺបាក់ស្បាត។ ពាក្យទាំងនេះមានន័យថា បញ្ហាសុខភាពបង្កមកពីការតានតឹងអារម្មណ៍ក្រោយព្រឹត្តិការណ៍ដ៏រន្ធត់មួយ ។នៅក្នុងបរិបទនេះជម្ងឺបាក់ស្បាត គឺជាបញ្ហាថប់បារម្ភមួយប្រភេទដែលបុគ្គលម្នាក់បានទទួលរងបទពិសោធន៍នៃព្រឹត្តិការណ៍ប៉ះទង្គិចផ្លូវចិត្តម្តង ហើយម្តងទៀត រួមផ្សំទាំងការពិបាកចិត្ត, ការយល់សប្តិអាក្រក់ ឬមមាល,ការនឹកឃើញឡើងវិញដុំៗដែលកើតឡើងក្រោយហេតុការណ៍នៃការរំលោភផ្លូវភេទឡព្រឹត្តិការណ៍ដែលគម្រាមកំហែងដល់អាយុជីវិតឬការរងរបួសធ្ងន់ធ្ងរ ឬគ្រោះធម្មជាតិ។

## តើជម្ងឺបាក់ស្បាតគឺជាអ្វី ?

ការមានអារម្មណ៍ភ័យខ្លាច ឬខឹងសម្បារនឹងហេតុការណ៍មួយ ឬមនុស្សណាម្នាក់ដែលបុគ្គលនោះបានជួបប្រទះ គឺជាអារម្មណ៍កើតឡើងតាមធម្មជាតិ ។ បើគ្មានអារម្មណ៍ទាំងនោះទេនោះមនុស្សម្នាក់នឹងក្លាយទៅជាគ្រឿងយន្ត ។ ប៉ុន្តែប្រសិនបើអារម្មណ៍នោះកើតឡើង ហើយស្ថិតនៅរយៈពេលច្រើនសប្តាហ៍ ឬច្រើនខែជាប់គ្នាពេលនោះលោកអ្នកគួរទៅជួបពិគ្រោះជាមួយគ្រូពេទ្យឯកទេស ។ បុគ្គលនោះប្រហែលមានបញ្ហាជម្ងឺបាក់ស្បាត ឬចាញ់ច្រាប ។ យោងតាមវិជ្ជាស្ថានជាតិនៃជម្ងឺផ្លូវចិត្ត (NIMH) ជម្ងឺបាក់ស្បាត គឺជាជម្ងឺផ្លូវចិត្តមួយប្រភេទ ។ លោកអ្នកអាចកើតជម្ងឺបាក់ស្បាតក្រោយពីបានរស់នៅ ឬបានឃើញផ្ទាល់ភ្នែក **តទៅទំព័រទី១១**

តមកពីទំព័រទី ១០

# ជម្ងឺបាក់ស្បាត : បញ្ហាសុខភាព...

នូវព្រឹត្តិការណ៍ដ៏គ្រោះថ្នាក់មួយ ដូចជា សង្គ្រាម ព្យុះសង្ឃរា ឬគ្រោះថ្នាក់ធ្ងន់ធ្ងរ ។ ជម្ងឺបាក់ស្បាតធ្វើឱ្យលោកអ្នកបន្តមានអារម្មណ៍តានតឹង និងភ័យខ្លាច ទោះបីហេតុការណ៍គ្រោះថ្នាក់នោះបានរំលងផុតបាត់ទៅហើយក៏ដោយ ។ ជម្ងឺនេះប៉ះពាល់ដល់ជីវិតរបស់លោកអ្នក និងមនុស្សនៅក្បែរលោកអ្នកទាំងមនុស្សនៅក្នុងរង្វង់គ្រួសារ និងមនុស្សធ្វើការងារជាមួយ ។ ប្រសិនបើលោកអ្នកមានជម្ងឺបាក់ស្បាតលោកអ្នកអាចទទួលបានការព្យាបាល និងមានអារម្មណ៍ធម្មតាឡើងវិញ ។

**តើនរណាខ្លះអាចកើតជម្ងឺបាក់ស្បាត ?**

ជម្ងឺបាក់ស្បាតអាចកើតលើមនុស្សគ្រប់ភេទ និងគ្រប់វ័យ ។ កុមារតូចៗក៏អាចកើតជម្ងឺបាក់ស្បាតដែរ ។ ទោះបីលោកអ្នកមិនទទួលរងការឈឺចាប់ដោយផ្ទាល់ ក៏លោកអ្នកអាចកើតជម្ងឺបាក់ស្បាតដែរ ឧទាហរណ៍លោកអ្នកឃើញមិត្តភក្តិ ឬសមាជិកគ្រួសារទទួលរងការធ្វើទារុណកម្មលើរាងកាយ ។ ទិដ្ឋភាពដ៏សាហាវនោះ ចេះតែបន្តលេចឡើងនៅក្នុងខួរក្បាល និងអារម្មណ៍របស់លោកអ្នកមិនឈប់ឈរប្រៀបដូចជាខ្សែភាពយន្តដែលលោកអ្នកបានទស្សនា ហើយបន្តរូបភាពនៃសកម្មភាពនៅក្នុងខួរក្បាលជានិច្ចដូច្នោះដែរ ។ ចំណុចខុសគ្នាគឺនៅត្រង់ថា ទិដ្ឋភាពនៅក្នុងខ្សែភាពយន្ត ទោះបីអាក្រក់សហាវយ៉ាងណា ក៏វា មិនបានបន្ទាច ឬបង្អាក់រាល់ការសម្រេចចិត្ត ឬសកម្មភាពរបស់លោកអ្នកដែរ ព្រោះខួរក្បាលរបស់លោកអ្នកចេះទាត់ចោល ឬមិនខ្វល់ចំពោះទិដ្ឋភាពនៅក្នុងខ្សែភាពយន្តនោះ ព្រោះវាមិនមែនជាការពិត ។ ចំណែកទិដ្ឋភាពនៃព្រឹត្តិការណ៍ដែលបានកើតឡើងក្នុងឆាកជីវិតផ្ទាល់របស់លោកអ្នកវិញ វាចេះតែតាមមកលងរំខានដល់សកម្មភាពរបស់លោកអ្នកធ្វើឱ្យលោកអ្នករួញរាខ្លាចរអារ ។

**កត្តាចូលរួមបង្កឱ្យកើតជម្ងឺបាក់ស្បាត**

ការរស់នៅក្នុងស្ថានភាពមួយ ឬការបានជួបប្រទះព្រឹត្តិការណ៍មួយដែលបណ្តាលឱ្យអ្នកមានអារម្មណ៍មួរម៉ៅ ឬធ្វើឱ្យអ្នករងគ្រោះថ្នាក់អាចបង្កឱ្យកើតជម្ងឺបាក់ស្បាត ។ ស្ថានភាពចូលរួមបង្កឱ្យកើតជម្ងឺបាក់ស្បាតមានដូចជាបុគ្គលនោះ គឺជាជនរងគ្រោះផ្ទាល់ ឬបានឃើញផ្ទាល់នឹងភ្នែកនូវអំពើហិង្សា.មរណភាព ឬជម្ងឺធ្ងន់ធ្ងររបស់មនុស្សជាទីស្រឡាញ់ណាម្នាក់.ឆ្លងកាត់សង្គ្រាម ឬចូលរួមក្នុងចម្បាំងនៅសមរភូមិដោយផ្ទាល់.គ្រោះថ្នាក់រថយន្ត ឬយន្តហោះធ្លាក់. គ្រោះធម្មជាតិ ដូចជា ខ្យល់ព្យុះកំបុតត្បូង ខ្យល់គួច ឬ ភ្លើងឆេះ.អំពើឧក្រិដយ៉ាងសាហាវ ដូចជាអំពើប្លន់ ឬបាញ់សម្លាប់ ។ មានហេតុការណ៍ផ្សេងទៀតជាច្រើនដែលអាចបណ្តាលឱ្យកើតជម្ងឺបាក់ស្បាត ។ ដូច្នេះវិធីដ៏ប្រសើរបំផុត សូមអ្នកអញ្ជើញទៅជួបគ្រូពេទ្យដើម្បីពិគ្រោះយោបល់ ប្រសិនបើអ្នកមានបញ្ហារំខានអារម្មណ៍របស់អ្នក ឬមនុស្សណាម្នាក់ដែលអ្នកចង់ជួយ ។

**វិធីសម្គាល់ជម្ងឺបាក់ស្បាត**

វេជ្ជបណ្ឌិតរបស់អ្នកអាចជួយអ្នកបាន ។ សូមទូរស័ព្ទ ឬទៅជួបវេជ្ជបណ្ឌិតរបស់អ្នកដោយផ្ទាល់ប្រសិនបើអ្នកមានបញ្ហាណាមួយដូចជា មានសុបិន្តអាក្រក់.នឹកឃើញឡើងវិញនូវហេតុការណ៍អាក្រក់ ឬមានអារម្មណ៍ថា ព្រឹត្តិការណ៍ដ៏រន្ធត់មួយនោះហៀបនឹងកើតឡើងជាថ្មីម្តងទៀត. កើតមានគំនិតដ៏គួរឱ្យខ្លាចជាច្រើនដែលអ្នកមិនអាចត្រួតត្រាបាន.ចៀសឆ្ងាយពីទីកន្លែង ឬវត្ថុដែលរំលឹកដល់ហេតុការណ៍ដែលអ្នកធ្លាប់ជួបប្រទះ, បារម្ភច្រើន, មានវិប្បដិសារី, ស្រងូតស្រងាត់, មានអារម្មណ៍ឯកោ, ដេកមិនលក់, ឆេវឆាវ, ខឹង ច្រឡោត ឬនឹកគិតចង់ធ្វើបាបរាងកាយខ្លួនឯង ឬអ្នកដទៃ ។ ចំណែកកុមារដែលមានជម្ងឺបាក់ស្បាតបង្ហាញអាការៈរោគខុសប្លែកពីមនុស្សពេញវ័យដូចជាបង្ហាញអាក្យកិរិយា ដូចជាកាលពីនៅអាយុក្មេង.មិនអាចនិយាយចេញ, តួញត្អែរថាចេះតែ ចុកពោះ ឬឈឺក្បាល, បដិសេធមិនព្រមទៅកន្លែង ផ្សេងៗ ឬចូលរួមលេងជាមួយនឹងមិត្តភ័ក្តិដទៃទៀត ។

**តើជម្ងឺបាក់ស្បាតចាប់ផ្តើមនៅពេលណា ?**

មនុស្សម្នាក់ៗកើតមានជម្ងឺបាក់ស្បាតនៅពេលខុសៗគ្នា ។ សញ្ញានៃជម្ងឺបាក់ស្បាតចាប់ផ្តើមភ្លាមៗបន្ទាប់ពីព្រឹត្តិការណ៍ដ៏រន្ធត់មួយ រួចហើយវាក៏បន្តមានជាប់រហូតទៅ ។ មនុស្សខ្លះទៀត ចាប់ផ្តើមមានសញ្ញាថ្មី ឬសញ្ញាធ្ងន់ធ្ងរបន្ថែមទៀត នៅក្នុងរយៈពេលច្រើនខែ ឬច្រើនឆ្នាំក្រោយមក ។

**តើអ្នកជម្ងឺបាក់ស្បាតអាចជាសះស្បើយ របៀបណា ?**

វេជ្ជបណ្ឌិត ឬអ្នកឯកទេសផ្នែកផ្លូវចិត្តដែលមានបទពិសោធន៍ខាងព្យាបាលមនុស្សមានជម្ងឺបាក់ស្បាតអាចជួយអ្នកបាននៅក្នុងបញ្ហានេះ ។ វិធីព្យាបាលអាចរួមបញ្ចូលទាំងវិធីព្យាបាលដោយ "ការបណ្តោយឱ្យអ្នកជម្ងឺរៀបរាប់រឿងរ៉ាវ", ការប្រើថ្នាំពេទ្យ ឬវិធីរួមផ្សំចម្រុះនៃវិធីទាំងពីរខាងដើម ។ ការព្យាបាលអាចត្រូវចំណាយពេលចាប់ពី៦ទៅ១២សប្តាហ៍ ។ មនុស្សខ្លះត្រូវការរយៈពេលវែងជាងនោះ ។ វិធីព្យាបាលមិនមែនសុទ្ធតែដូចគ្នាសម្រាប់មនុស្សគ្រប់គ្នានោះទេ ។ វិធីព្យាបាលដែលកបនឹងជម្ងឺរបស់អ្នកអាចនឹងមិនកបជាមួយនឹងមនុស្សផ្សេងទៀត ។ ការផឹកស្រា ឬប្រើគ្រឿងញៀនផ្សេងៗនឹងមិនជួយបន្ធូបញ្ហាជម្ងឺបាក់ស្បាតឡើយ ហើយជូនកាលវាអាចនឹងបង្កឱ្យបញ្ហានោះកាន់តែធ្ងន់ធ្ងរឡើងក៏មាន ។ (**នៅមានត**)

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី២១ ខែមីនា ឆ្នាំ២០១៤

# កូនស្រី ប៉ុល ពត រៀបការនៅអតីតមូលដ្ឋានរឹងមាំរបស់ខ្មែរក្រហម

By Khy Sovuthy and Alex Willemyns | March 17, 2014

ស្រុកម៉ាឡៃ,ខេត្តបន្ទាយមានជ័យ-ស ផត្ឋតា ដែលជាកូនស្រីតែមួយគត់របស់សពមេដឹកនាំខ្មែរក្រហម ប៉ុល ពត បានរៀបអាពាហ៍ពិពាហ៍ក្នុងអតីតមូលដ្ឋានរឹងមាំរបស់ខ្មែរក្រហមកាលពីម្សិលមិញក្នុងពិធីមង្គលការរយៈពេលពីរថ្ងៃក្នុងសួនផ្កាមួយដែលត្រូវបានកាត់តម្រឹមយ៉ាងស្រស់ស្អាតនៅអតីតទឹកដីរបស់ក្រុមឧទ្ទាមនេះ។

តទៅទំព័រទី ១៣



# Pol Pot's Daughter Marries in Former Stronghold

By Khy Sovuthy and Alex Willemyns | March 17, 2014

MALAI DISTRICT, Banteay Meanchey province - Sar Patchata, the only daughter of deceased Khmer Rouge leader Pol Pot, was married Sunday after a two-day ceremony held in a neatly trimmed flower garden in this former rebel stronghold.

Ms. Patchata was born in 1986 to Pol Pot and his second wife, Mea Som, and was adopted after the communist leader's death by Tep Khunnal, a diplomat who had served as an aide to Pol Pot and ambassador to the U.N. for the Khmer Rouge after their overthrow by Vietnamese forces in 1979.

The wedding in Malai district, whose Khmer Rouge rebels defected en masse in 1996 to the Phnom Penh government, began on Saturday evening with a select group of friends and family observing four monks from Wat Malai bless Ms. Patchata and her groom, Sy Vicheka.

Ornate wooden armchairs padded with stitched floral patterns seated the group of about 50.

The chairs, and Ms. Patchata's European-style family home and its carefully curated gardens, were the only obvious flourishes of wealth throughout the two days of the ceremony, until seven glass chandeliers were carried out and attached to the large pink-and-white wedding tents shortly before last night's dinner.

Imported liquor from France, such as Ricard pastis de Marseille, was served at select tables, while Heineken beer was available at others.

"It looks completely European," said prominent Cambodia historian Henri Locard, 74, who attended both days of the ceremony, as he took a photograph of a laughing So Socheat, the wife of former Khmer Rouge head of state Khieu Samphan, who was seated nearby.

Khieu Samphan is currently on trial in Phnom Penh for crimes against humanity.

Mr. Khunnal, Ms. Patchata's stepfather, who has had two further children with

Continued to page 20

# ក្រុមហ៊ុនរថយន្តស្ព័រ Porsche ចាប់ផ្តើមសកម្មភាពសាងសង់មជ្ឈមណ្ឌលនៅក្នុងរាជធានីភ្នំពេញ

By Simon Henderson | March 18, 2014

ក្រុមហ៊ុន Porsche ដែលជាក្រុមហ៊ុនផលិតរថយន្តស្ព័រដ៏ធំមួយនៅប្រទេសអាល្លឺម៉ង់ បានចូលមកទីផ្សារប្រទេសកម្ពុជាជាផ្លូវការហើយកាលពីម្សិលមិញដោយមានពិធីចាប់ផ្តើមសកម្ម-ភាពសាងសង់មជ្ឈមណ្ឌលរថយន្ត Porsche ភ្នំពេញ (Porsche Center Phnom Penh) ជាហេតុនាំឱ្យចំនួនក្រុមហ៊ុនផ្គត់ផ្គង់រថយន្តទំនើបៗកើនឡើង ជាការឆ្លើយតបទៅនឹងតម្រូវការអ្នកប្រើប្រាស់ដែលមានទ្រព្យធនច្រើននៅក្នុងប្រទេសនេះ។

សាលតាំងលក់រថយន្តថ្មីដែលស្ថិតនៅទល់មុខអាកាសយានដ្ឋានភ្នំពេញនេះ នឹងមានទំហំជិត ២.000ម៉ែត្រក្រឡា នៅពេលសកម្មភាពសាងសង់ចប់សព្វគ្រប់ដោយត្រូវចំណាយប្រាក់ពីរលានដុល្លារ។

ក្នុងពេលដែលសាលតាំងលក់រថយន្តនេះមិនទាន់សាងសង់រួចរាល់រហូតដល់ខែតុលាក្រុមហ៊ុន Porsche នៅរំពឹងថា ខ្លួននឹងអាចលក់រថយន្តថ្មីរបស់ខ្លួនបានយ៉ាងតិច៣0គ្រឿងក្នុងឆ្នាំនេះនេះបើយោងតាម លោក ហ្គ្រេម៉េ ហាន់ធ័រ (Graeme Hunter) អគ្គនាយកក្រុមហ៊ុន Precision Cars (Cambodia) ដែលនឹងតំណាងឱ្យក្រុមហ៊ុន Porsche នៅកម្ពុជា។

លោក ហាន់ធ័រ បានមានប្រសាសន៍ក្នុងពិធីបញ្ចុះបឋមសិលាកាលពីម្សិលមិញថា "ក្រុមហ៊ុន Porsche មិនមែនជាក្រុមហ៊ុនទ្រង់ទ្រាយធំមួយទេ ពោលគឺយើងលក់រថយន្តប្រហែល២00.000 គ្រឿងក្នុងមួយឆ្នាំ បើធៀបជាមួយក្រុមហ៊ុនតូយ៉ូតា ដែលលក់រថយន្តប្រាំមួយលានគ្រឿង"។

លោកបានមានប្រសាសន៍បន្ថែមទៀតថា "ឆ្នាំនេះនៅលើទីផ្សារកម្ពុជា យើងមិនមានមជ្ឈមណ្ឌលរថយន្ត Porsche ទេ ប៉ុន្តែយើងកំពុងតែធ្វើប្រតិបត្តិការនៅក្រៅអគារសាលតាំងលក់ ដូច្នេះយើងរំពឹងថា យើងនឹងលក់បានប្រហែល៣0 គ្រឿង ក៏ប៉ុន្តែនៅពេលដែលយើងមានសាលតាំងលក់ត្រឹមត្រូវយើងនឹងបង្កើនបរិមាណលក់ឱ្យកើនឡើងដល់៨៥គ្រឿងយ៉ាងយូរក្នុងឆ្នាំ២០១៧"។

លោក ហាន់ធ័រ បានលើកឡើងថា ក្រុមហ៊ុន Porsche នៅលើទីផ្សារកម្ពុជា និងផ្តោតសំខាន់ទៅលើរថយន្តប្រភេទ SUV ដែលជារថយន្តទំនើប

តទៅទំព័រទី ១៩

# Porsche Breaks Ground on $2 Million Center

By Simon Henderson | March 18, 2014

Porsche, the iconic German luxury carmaker, officially arrived in Cambodia on Monday with a groundbreaking ceremony of the Porsche Center Phnom Penh, adding to the growing list of high-end automobile companies catering to the country's wealthiest consumers.

The new showroom, opposite Phnom Penh International Airport, will cover almost 2,000 square meters when complete at a cost of $2 million.

While the showroom is not due for completion until October, Porsche still expects to make at least 30 sales of new cars this year, said Graeme Hunter, general director of Precision Cars (Cambodia), which will represent Porsche in the country.

"Porsche is not a big volume brand-we sell about 200,000 cars a year, compared to, say, Toyota, which sells 6 million," Mr. Hunter said at Monday's ceremony.

"This year in Cambodia, we don't have the Porsche center and are operating out of a temporary facility so we expect to sell about 30 vehicles, but with the center open, we will increase volume to 85 by 2017," he said.

Mr. Hunter said that Porsche in Cambodia will be focusing on its range of SUVs as a more luxurious way to navigate the country's less-than-perfect roads.

"The 911 is the iconic sports car, but the Cayenne is in the SUV category and it is as capable of going off-road as it is on-road, with sophisticated adjustable suspension," he said, adding that it may take a few years and an improvement in infrastructure before Porsche's sports cars take off in Cambodia.

When Porsche announced in 2002 that it was developing an SUV, there were rumblings from Porsche purists that the move into Sports Utility Vehicles signaled the demise of the luxury brand-but the strategy worked and its Cayenne model proved a hit, with Porsche selling more SUVs than all its sports cars combined.

In Cambodia, Porsche hopes to muscle in on a market once heavily dominated by Toyota and Lexus, but now showing signs of diversifying: Land Rover, Mercedes and BMW have all recently opened dealerships here, and Audi is set to open later this year.

Mr. Hunter said that it would not be difficult for Porsche to differentiate itself even amid heightened competition.

"Drive one-that's ultimately the sales pitch," he said. "You first have to experience a Porsche, then you will know the difference."

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសំរួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ សុក្រ ទី២១ ខែមីនា ឆ្នាំ២០១៤

# បក្សប្រជាជនផ្តោតលើអព្យាក្រឹតភាពរបស់អង្គការសង្គមស៊ីវិលក្នុងការចរចាជាមួយបក្សប្រឆាំង

By Colin Meyn and Kuch Naren | March 19, 2014

នៅពេលដែលគណបក្សប្រជាជនកម្ពុជា និងគណបក្សសង្គ្រោះជាតិចូលតុចរចាជាលើកទី៣អំពីការកែទម្រង់ការបោះឆ្នោតកាលពីថ្ងៃច័ន្ទ គណបក្សកាន់អំណាចបានផ្តោតលើគោលដៅ គួរឱ្យភ្ញាក់ផ្អើលថ្មីមួយធ្វើជាគោលនយោបាយអាទិភាពរបស់ខ្លួន។

ជំនួសឱ្យការលើកឡើងពីបញ្ជីឈ្មោះបោះឆ្នោតស្ថាប័នរៀបចំការបោះឆ្នោត ឬប្រព័ន្ធផ្សព្វផ្សាយនោះ មន្ត្រីគណបក្សប្រជាជនកម្ពុជាបែរជាចង់និយាយអំពីអព្យាក្រឹតភាពផ្នែកនយោបាយរបស់អង្គការសង្គមស៊ីវិលទៅវិញ ជាពិសេសអង្គការដែលធ្វើរបាយការណ៍អំពីដំណើរការលទ្ធិ-ប្រជាធិបតេយ្យនៅកម្ពុជា។

គណបក្សប្រជាជនកម្ពុជាស្នើឱ្យមានច្បាប់មួយធានាពីអព្យាក្រឹតភាពរបស់អង្គការសង្គមស៊ីវិល និងអ្នកឃ្លាំមើលការបោះឆ្នោតឯករាជ្យដែលធ្វើការនៅក្នុងប្រទេសកម្ពុជា។ អង្គការជាច្រើនបានចេញរបាយការណ៍រិះគន់ខ្លាំងៗដល់ការបោះឆ្នោតជាតិកាលពីខែកក្កដា។

លោក ស៊ិក ប៊ុនហុក តំណាងរាស្ត្ររបស់គណបក្សប្រជាជនកម្ពុជាដែលបានចូលរួមការចរចាអំពីកំណែទម្រង់ការបោះឆ្នោតនេះបានមានប្រសាសន៍ថា កង្វល់របស់គណបក្សកាន់អំណាចអំពីនិន្នាការនយោបាយរបស់អង្គការក្រៅរដ្ឋាភិបាលកើតចេញពីឥទ្ធិពលរបស់ពួកគេមកលើមតិសាធារណៈអំពីការបោះឆ្នោតកាលពីខែកក្កដា។

លោក ប៊ុនហុក បានមានប្រសាសន៍ថា "វាធ្ងន់ធ្ងរណាស់នៅពេលដែលអង្គការសង្គមស៊ីវិលមិនអព្យាក្រឹត ពីព្រោះវាធ្វើឱ្យមានឥទ្ធិពលអាក្រក់លើសាធារណជននិងការបោះឆ្នោត"។ លោកបានមានប្រសាសន៍ថា "យើងមិនផ្តោតលើអង្គការក្រៅរដ្ឋាភិបាល និងអង្គការសង្គមស៊ីវិលណាមួយនោះទេ ប៉ុន្តែយើងចង់ឃើញពួកគេទាំងអស់គ្នាគោរពច្បាប់ និងទទួលខុសត្រូវចំពោះការប្រព្រឹត្តខុសឆ្គង"។

តទៅទំព័រទី ២៤

# Ruling CPP Sees Threat in Civil Society Groups

**By Colin Meyn and Kuch Naren | March 19, 2014**

When the ruling CPP and opposition CNRP sat down Monday for a third round of electoral reform talks, the ruling party took a surprising new direction in its policy priorities.

Rather than bring up voter lists, electoral bodies or access to the media, the CPP delegation wanted to talk about the political neutrality of civil society groups-particularly those who report on the country's democratic process.

-News Analysis

The CPP proposed a law to ensure the neutrality of civil society organizations and a review of independent election monitors working in Cambodia. Many had released reports highly critical of July's national election.

"It is very serious when the civil society groups are not neutral, because it creates a very bad impact on the public and elections," said CPP lawmaker Sik Bunhok.

"We are not targeting on any particular NGOs and civil society organizations, but we want to see them all respect the law and be responsible for doing anything wrong," he said.

"Thus, we need to write in the law a requirement that any civil society groups must be responsible before the law if their claims... cause problems with the election," Mr. Bunhok added.

A group of 12 civil society groups, calling themselves the Electoral Reform Alliance, released in December the Joint-Report on the Conduct of the 2013 Cambodian Elections, the most comprehensive analysis thus far of the July's fiercely disputed national election.

The report, using information gathered **Continued to page 18**

## តមកពីទំព័រទី ១២ កូនស្រី ប៉ុល ពត រៀបការនៅអតីត...

លោក ទេព ឃុនណាល់ ឪពុកចុងកូនក្រមុំ និងលោកស្រី មាស សោម ជាម្តាយបង្កើតរបស់កូនក្រមុំ ស ផត្ថតា យកអំបោះកូចដៃកូនកំលោះកូនក្រមុំក្នុងពិធីមង្គលការនៅស្រុកម៉ាឡៃ ខេត្តបន្ទាយមានជ័យ កាលពីម្សិលមិញ។ Alex Willemyns/The Cambodia Daily

អ្នកនាង ស ផត្ថតា កើតនៅឆ្នាំ១៩៨៦ ជាកូនរបស់ ប៉ុល ពត និងភរិយាទី២របស់គាត់ គឺលោកស្រី មាស សោម ហើយត្រូវបានយកទៅចិញ្ចឹមក្រោយមរណភាពរបស់ ប៉ុល ពត ដោយលោក ទេព ឃុនណាល់ អតីតមន្ត្រីការទូតចេះនិយាយបីភាសាដែលបានបម្រើការងារជាជំនួយការរបស់ ប៉ុល ពត និងជាឯកអគ្គរដ្ឋទូតខ្មែរក្រហមប្រចាំអង្គការសហប្រជាជាតិក្រោយការដួលរលំរបបនេះក្រោមស្នាដៃកងទ័ពវៀតណាមក្នុងឆ្នាំ១៩៧៩។

អាពាហ៍ពិពាហ៍រវាងកូនក្រមុំ ស ផត្ថតា និងកូនកំលោះឈ្មោះ ស៊ី វិច្ឆិកា នៅក្នុងស្រុកម៉ាឡៃ ដែលមានក្រុមឧទ្ទាមខ្មែរក្រហមចុះចូលជាមួយនឹងរដ្ឋាភិបាលក្រុងភ្នំពេញយ៉ាងច្រើននៅក្នុងឆ្នាំ១៩៩៦នេះ បានចាប់ផ្តើមការពីល្ងាចថ្ងៃសៅរ៍ ដោយមានការចូលរួមពីក្រុមគ្រួសារ និងមិត្តភក្តិជិតស្និទ្ធក្រោមការប្រទានពរជ័យពីព្រះសង្ឃបួនអង្គមកពីវត្តម៉ាឡៃ។

កៅអីធ្វើពីឈើប្រណីតដែលមានឆ្លាក់ក្បាច់ក្នុងទម្រង់ផ្កាភ្ញីត្រូវបានរៀបចំសម្រាប់មនុស្សប្រហែល៥០នាក់។ កៅអីធ្វើពីឈើប្រណីត និងផ្ទះសង់តាមរបៀប អឺរ៉ុបរបស់ ស ផត្ថតា និងទីធ្លាមុខផ្ទះដែលត្រូវបានរៀបចំយ៉ាងប្រិតប្រៀង គឺជាទិដ្ឋភាពដែលបង្ហាញយ៉ាងច្បាស់ពីភាពធូរធាររបស់គ្រួសារនាងអំឡុងពិធីមង្គលការរយៈពេលពីរថ្ងៃនេះ ដែលក្រោយមកមានការយកចង្កៀងព្យួរពិដានធ្វើពីកែវយ៉ាងប្រណីតមកភ្ជាប់នឹងរោងការពណិស និងស៊ីជម្ពូមុនពិធីជប់លៀងស្រស់ស្រូបអាហារពេលល្ងាចបន្តិចកាលពីយប់ថ្ងៃម្សិលមិញ។

ស្រានាំចូលពីបារាំង ដូចជា ស្រា Ricard Pastis de Marseille ត្រូវបានដាក់តាមតុសម្រាប់ភ្ញៀវពិសេសៗ ខណៈស្រាបៀរ Heineken ត្រូវបានដាក់នៅតុផ្សេងទៀតសម្រាប់ភ្ញៀវទូទៅ។

លោក Henri Locard អ្នកប្រវត្តិសាស្ត្រកម្ពុជាដ៏លេចធ្លោក្នុងវ័យ៧៤ឆ្នាំ ដែលបានចូលរួមក្នុងពិធីមង្គលការទាំងពីរថ្ងៃនេះបានមានប្រសាសន៍ខណៈថតរូបលោកស្រី សូ សុជាតិ ភរិយាអតីតប្រមុខរដ្ឋក្នុងសម័យខ្មែរក្រហម គឺលោក ខៀវ សំផន ថា "មើលទៅវាជាពិធីដែលមានលក្ខណៈអឺរ៉ុបសុទ្ធសាធ"។ បច្ចុប្បន្ន ខៀវ សំផន កំពុងស្ថិតក្នុងសវនាការនៅក្នុងរាជធានីភ្នំពេញក្រោមការចោទប្រកាន់ពីបទឧក្រិដ្ឋកម្មប្រឆាំងមនុស្សជាតិ។

លោក ឃុនណាល់ ឪពុកចុងរបស់ ស ផត្ថតា ដែលមានកូនពីរនាក់ទៀតជាមួយនឹងអ្នកស្រី មាស សោម ចាប់តាំងពី ប៉ុល ពត បានស្លាប់ក្បែរស្រុកអន្លង់វែងនាខែមេសា ឆ្នាំ១៩៩៨ នោះ បានឱ្យដឹងថា គូស្វាមីភរិយាវ័យក្មេងនេះបានជួបគ្នា ខណៈកំពុងសិក្សានៅក្នុងប្រទេសម៉ាឡេស៊ី។

លោក ឃុនណាល់ បាននិយាយអំពីពិធីមង្គលការនេះថា "គំនិតរបស់យើង គឺថាធ្វើយ៉ាងណាកុំឱ្យពិធីនេះ បុរាណពេក ឬសម័យពេក" ប៉ុន្តែបានបដិសេធមិននិយាយអំពីកូនស្រីចុងរបស់ខ្លួនទេ។ លោកបានមានប្រសាសន៍ថា "វាគ្រាន់តែជាពិធីមង្គលការតូចមួយដែលមានការចូលរួមពីមិត្តភក្តិ និងសាច់ញាតិរបស់យើងប៉ុណ្ណោះ"។

ក្រោមរបបខ្មែរក្រហមបុរស និងស្ត្រីយ៉ាងតិចរាប់ម៉ឺននាក់ ត្រូវបានចាប់បង្ខំឱ្យរៀបការជាមួយអ្នកមិនដែលស្គាល់គ្នាសោះក្នុងពិធីដែលធ្វើឡើងរួមគ្នាក្នុងពេលតែមួយ ។ ទំនាក់ទំនងនាពេលនោះស្ថិតនៅក្រោមការគ្រប់គ្រងយ៉ាងតឹងតែងពីសំណាក់មន្ត្រីបក្ស។

លោក សួង ស៊ីគឿន ជាបញ្ញវន្តកុម្មុយនីស្តម្នាក់ដែលធ្វើការក្នុងក្រសួងការបរទេសខ្មែរក្រហមក្រោមការដឹកនាំរបស់ អៀង សារី និងជាភ្ញៀវកិត្តិយសម្នាក់កាលពីយប់មិញនេះ បានលើកឡើងថា ប្រវត្តិរបស់ ផត្ថតា មិនពាក់ព័ន្ធគ្នាជាមួយនឹងពិធីមង្គលការនេះឡើយ ។

លោកបាននិយាយថា "ពិធីនេះមិនពាក់ព័ន្ធនឹងរឿងនយោបាយទេ យើងគ្រាន់តែមកចូលរួមក្នុងនាមជាមិត្តភក្តិ និងសាច់ញាតិប៉ុណ្ណោះ ព្រោះនេះជាប្រពៃណីខ្មែរ។ នេះជាឧទាហរណ៍បង្ហាញពីរបៀបដែលប្រជាជនខ្មែរ មិនថាមាន ឬក្រអាចជួបជុំគ្នាដោយគ្មានជម្លោះនិងមិនបន្តការគុំគួន... យើងត្រូវតែរក្សាសាមគ្គីភាព"។

សម្លៀកបំពាក់ប្រពៃណីខ្មែរ និងការរៀបចំដែលមានលក្ខណៈទាន់សម័យ គឺជាទិដ្ឋភាពដែលគេបានឃើញនៅផ្លូវដើរ និងកន្លែងរាំក្នុងពិធីជប់លៀងកាលពីយប់មិញនេះ ។ សមាជិកម្នាក់នៃក្រុមអ្នកបម្រើភ្ញៀវបានឱ្យដឹងថា អាហារដែលរួមមានទាំងសាច់ទាផងនេះ គឺត្រូវបានគេដឹកពីរាជ

តទៅទំព័រទី ១៥

# តម្លៃផលិតផលសម្លៀកបំពាក់នាំចេញរបស់ប្រទេសកម្ពុជាកើនឡើង២០ភាគរយកាលពីឆ្នាំ២០១៣

By George Styllis | February 5, 2014

តម្លៃផលិតផលសម្លៀកបំពាក់នាំចេញរបស់ប្រទេសកម្ពុជាកើនឡើង២០ភាគរយ កាលពីឆ្នាំ២០១៣ ទោះបីជាវិស័យនេះត្រូវបានញាំញីដោយភាពចលាចល និងភាពមិនអំណោយផលផ្នែកនយោបាយដែលត្រូវចំណាយប្រាក់ប្រហែល ២០០លានដុល្លារ។

យោងតាមទិន្នន័យបំផុតរបស់ក្រសួងពាណិជ្ជកម្មបានបង្ហាញថា ផលិតផលកាត់ដេរ និងវាយនភណ្ឌបានចូលរួមចំណែក៨០ភាគរយ ក្នុងបរិមាណផលិតផលនាំចេញសរុបរបស់ប្រទេសកម្ពុជា និងមានតម្លៃសរុប៥្យ៥៣ពាន់លានដុល្លារកាលពីឆ្នាំមុន ស្របពេលដែលមានកូដកម្ម ១៣១កើតឡើងអំឡុងរយៈពេល១១ខែដើមឆ្នាំ២០១៣ ដែលនេះជាចំនួនកូដកម្មដ៏ច្រើនបំផុតក្នុងរយៈពេល១០ឆ្នាំកន្លងមកនេះ។ កាលពីឆ្នាំ២០១២ តម្លៃផលិតផលសម្លៀកបំពាក់កាត់ដេររបស់ប្រទេសនេះ មាន៤.៦ពាន់លានដុល្លារ។

លោក កែន លូ អគ្គលេខាធិការសមាគមរោងចក្រកាត់ដេរនៅកម្ពុជា (GMAC) ដែលមានការសោកស្តាយចំពោះផលប៉ះពាល់ដែលកូដកម្មទាំងនេះមានទៅលើវិស័យកាត់ដេរនោះបានលើកឡើងថា អត្រាកំណើននេះមិនឆ្លុះបញ្ចាំងឱ្យឃើញស្ថានភាពរបស់វិស័យនេះពិតប្រាកដទេ ហើយគឺជាអត្រាកំណើនដ៏តិចតួច។

លោក លូ បានមានប្រសាសន៍ថា "ខ្ញុំមិននិយាយថា តួលេខនាំចេញនេះជាតួលេខគួរឱ្យខកចិត្តទេ ក៏ប៉ុន្តែតម្លៃនាំចេញតែឯងមិនមានន័យច្រើនទេ។ ចំនួនរោងចក្របានកើនឡើង ៣០ភាគរយ ដូច្នេះប្រសិនបើបរិមាណនាំចេញកើនឡើង២០ភាគរយ អ្នកប្រាប់ខ្ញុំមើលថា តើវាអាចជាកំណើនដ៏ល្អបានទេ"។ លោកបានមានប្រសាសន៍បន្ថែមទៀតថា "សញ្ញាដែលបញ្ជាក់ពីស្ថានភាពនៃវិស័យនេះ គឺយើងត្រូវពិនិត្យគម្រោងវិនិយោគថ្មីៗ និងចំនួនរោងចក្រដែលបានបិទទ្វា ព្រមទាំងចំនួនថ្ងៃខាតបង់"។

លោក លូ មិនបានផ្តល់តួលេខទាក់ទងនឹងគម្រោងវិនិយោគថ្មីៗ និងចំនួនរោងចក្រឈប់ដំណើរការទេ។ ដោយសារតែកូដកម្មវិស័យកាត់ដេរបានខាតបង់សម្លៀកបំពាក់ដែលត្រូវ

តទៅទំព័រទី ១៧

# Garment Export Value Up 20 Percent in 2013

**By George Styllis | February 5, 2014**

Cambodia's garment exports increased 20 percent in value in 2013, despite the sector being marred by industrial action and political unrest that cost an estimated $200 million.

Garments and textiles accounted for 80 percent of Cambodia's total exports and were worth $5.53 billion last year, according to the latest figures from the Ministry of Commerce, while the sector saw 131 strikes during the first 11 months of the year-a ten-year high. In 2012, garment exports were worth $4.61 billion.

Ken Loo, secretary-general for the Garment Manufacturers Association in Cambodia (GMAC), who has consistently lamented the effect strikes have on the sector, said the growth is not a true reflection of the state of the industry and means very little.

"I wouldn't say the export figure is disappointing, but export value alone doesn't mean much. The number of factories has increased 30 percent, so if exports have increased 20 percent; you tell me if that's a good number."

"A better indication of the sector is to look at new investments and the number of factories that have closed and the number of days lost."

Mr. Loo could not provide figures for the number of new investments and factory closures. The number of lost man-days due to strikes was 825,646 during the first 11 months of last year, an increase of 54 percent on the same period the year before, according to the figures from GMAC.

In December, thousands of garment workers joined CNRP supporters at protests to demand a doubling of the monthly minimum wage to $160. On January 3, protesters in Phnom Penh's Pur Senchey district were met with extreme force when military police opened fire, killing five. GMAC said the unrest during those weeks cost the industry $200 million.

When asked if the industry's growth may lead to meeting workers' minimum wage demands, Ministry of Commerce spokesman Ken Ratha said: "I don't think so," adding that the government is currently working out other ways to resolve the wage dispute.

## តមកពីទំព័រទី ១៣ កូនស្រី ប៉ុល ពត រៀបការនៅអតីត...

ធានីភ្នំពេញមកទទួលភ្ញៀវក្នុងពិធីនៅព្រំដែនខ្មែរថៃនេះ។

លោក ចៅ ឃីម អាយុ៧៦ឆ្នាំ បច្ចុប្បន្នជាភាគីរដ្ឋប្បវេណីនៅសាលាក្តីខ្មែរក្រហមក្នុងរាជធានីភ្នំពេញ និងជាទីប្រឹក្សាមួយរូបនៅរសួងកសិកម្មលើកឡើងថា ជីវិតនយោបាយនិងប្រវត្តិ ប៉ុល ពត គឺមិនពាក់ព័ន្ធនឹងជីវិតរបស់ ផត្ធតា ដែលជាក្មេងស្រីតូចមួយពេលឪពុករបស់នាងទទួលមរណភាពទេ។

លោក ឃីម ដែលបានទៅរស់នៅប្រទេសបារាំងក្នុងឆ្នាំ១៩៧៤ ហើយមិនបានវិលមកកម្ពុជាវិញរហូតដល់ឆ្នាំ២០០៣នោះ បាននិយាយថា "ប្រជាជនកម្ពុជាគឺច្រើនតែមានគំនិតយល់ឃើញថា ជំនាន់មួយជាប់ពាក់ព័ន្ធនឹងជំនាន់មួយទៀត។

ពួកគេជាឪពុក និងកូន ហើយខ្មែរមានទម្លាប់និយាយថា ពួកគេគឺដូចគ្នា។ ក្រោមរបបខ្មែរក្រហមនៅពេលពួកគេឱ្យខ្មែរក្រហមត្រូវសម្លាប់នរណាម្នាក់ពួកគេមិនមែនសម្លាប់តែបុគ្គលនោះទេ គឺសម្លាប់ចោលទាំងគ្រួសារតែម្តង។ ក្នុងករណីនេះវាជារឿងខុសគ្នា ពួកគេជាឪពុក និងកូនមែន តែពុំពាក់ព័ន្ធគ្នារឿងនយោបាយទេ។

បងប្រុសរបស់លោក ឃីម គឺលោក ចៅ សេង ជាអតីតប្រធានខុទ្ទកាល័យព្រះអង្គម្ចាស់នរោត្តម សីហនុ និងស្ថិតនៅក្នុងចំណោមបុគ្គលលេចធ្លោបំផុត ក្នុងរបបនោះនៅចុងទសវត្សរ៍ឆ្នាំ១៩៦០ ហើយលោកត្រូវបានខ្មែរក្រហមធ្វើទារុណកម្ម និងសម្លាប់ចោលនៅគុកស-២១។

ក្នុងបទសម្ភាសមួយកាលពីឆ្នាំ២០០៤ ផត្ធតា បានឱ្យដឹងថា នាងបានប្តូរឈ្មោះរបស់ខ្លួនពី មាស សិទ្ធ នៅឆ្នាំ២០០១ តាមការណែនាំរបស់លោក ទេព ឃុនណាល់ ដែលបានប្រាប់នាងថា នាងមិនគួរលាក់បាំងអត្តសញ្ញាណជាកូនស្រីរបស់ ប៉ុល ពត ដែលមានឈ្មោះពិតប្រាកដថា សាឡុត ស។

អ្នកស្រី អ៊ីម សុមេន អាយុ៥៣ឆ្នាំ ជាផ្នែកមួយនៃក្រុមគ្រួសារដែលមានសមាជិកច្រើនរបស់ ផត្ធតា និងដែលស្ថិតក្នុងចំណោមអតីតកម្មាភិបាលខ្មែរក្រហមជាច្រើនដែលឥឡូវនេះរស់នៅជុំវិញស្រុកម៉ាឡៃនោះ បានឱ្យដឹងថា ផត្ធតា បានផ្លាស់មករស់នៅតំបន់នេះក្នុងឆ្នាំ១៩៩៦ បន្ទាប់ពីបានរស់នៅក្បែរ ប៉ុល ពត ក្នុងស្រុកអន្លង់វែង ក្រោយឆ្នាំ១៩៨៥។

អ្នកស្រីបាននិយាយថា "ក្មួយរបស់ខ្ញុំ គឺជាផ្នែកមួយនៃមនុស្សជំនាន់ថ្មី ហើយមិនបានដឹងអ្វីអំពីរឿងនោះទេ" ដោយបានពន្យល់ថា ផត្ធតា បានទទួលស្វាគស្វាមទុរយសតិចតួចណាស់ក្នុងស្រុកម៉ាឡៃ ក្នុងនាមជាកូនស្រីរបស់ ប៉ុល ពត ព្រោះថា មនុស្សជាច្រើននៅទីនោះគោរពអតីតមេដឹកនាំខ្មែរក្រហមនេះខ្លាំងណាស់។

អ្នកស្រីបានបន្តថា ពេលខ្ញុំរស់នៅជាមួយ ប៉ុល ពត គាត់ជាមនុស្សចេះគួរសម និងសុភាពណាស់។ គាត់មិនដែលឈ្លើយដាក់នរណាម្នាក់ទេ ប៉ុន្តែខ្ញុំមិនដឹងពីសកម្មភាព និងទង្វើរបស់គាត់អំឡុងរបបនោះទេ"។

ព្រះតេជគុណ ស៊ិន សុភាព ព្រះជន្ម៣៨ព្រះវស្សាជាចៅអធិការវត្តម៉ាឡៃដែលបាននិមន្តមកប្រទានពរជ័យដល់កូនកំលោះកូនក្រមុំមួយគូនេះ បានលើកឡើងថា គោលនយោបាយរបស់ខ្មែរក្រហមត្រូវបានកប់បាត់នៅក្នុងស្រុកម៉ាឡៃហើយ។

ព្រះតេជគុណបានមានសង្ឃដីកាពីគោលនយោបាយរបស់ខ្មែរក្រហមដែលដាក់សាសនាឱ្យនៅក្រៅច្បាប់រួមទាំងការលុបបំបាត់ព្រះសង្ឃឱ្យអស់ពីប្រទេសថា "នោះជានិន្នាការនយោបាយរបស់មេដឹកនាំនៃរបបនីមួយៗ ។ របបនេះក្នុងសម័យកាលនេះ គឺរបបដែលប្រកាន់យកនិន្នាការជាតិ សាសនា ព្រះមហាក្សត្រ ហើយមនុស្សគ្រប់គ្នាគោរពសាសនារបស់រដ្ឋ។ របបខ្មែរក្រហមលែងមានទៀតហើយនៅពេលនេះ"។

អតីតក្រុមអ្នកធ្វើបដិវត្តន៍បាននាំគ្នាឡើងរាំតាមចង្វាក់ភ្លេងប្រពៃណីខ្មែរ ដែលប្រគំដោយក្រុមតន្ត្រីថៃកាលពីយប់មិញ ខណៈគូស្វាមីភរិយាថ្មីថ្មោងឈរថតរូបនៅច្រកចូលភូមិគ្រឹះដ៏ធំរបស់ ផត្ធតា៕ **សេរីវុធ**

## តមកពីទំព័រទី ៤ សន្សំតក់ៗ

ចូលមកវិនិយោគជាមួយដែលអាចនាំទុនមកជាដើមសម្រាប់ប្រកបមុខរបរដែលយើងស្គាល់ច្បាស់ការទៀងទាត់នេះហើយដែលធ្វើឱ្យមានជំនឿលើខ្លួនឯងមានការជាក់ច្បាស់ថានឹងធ្វើការអ្វីមួយបានជោគជ័យដោយភាពម៉ាត់យ៉ាត់នឹងព្យាយាម ។

ការបង្ហុយបារីកំដរអប្បរកការទិញស្រាទុកទទួលភ្ញៀវការលេងបៀរស៊ីសងជាប្រាក់កំដរពេល គឺជាឧទាហរណ៍នៃការសន្សំដ៏អាក្រក់បំផុតដែលមិនត្រូវបង់ខាតពេលជាមួយឡើយ ។ ការផ្សងសំណាងដោយទិញឆ្នោត ឬលេងល្បែងនៅ "កាស៊ីណូ" ក៏ត្រូវខំទប់ចំណង់ឱ្យបានជាប់ដែរ។

ផ្ទះត្រូវថែរទាំឱ្យបានស្អាតប្រកបដោយសោភ័ណ្ឌភាព ទោះជាផ្ទះខ្លួនឯងឬក៏ផ្ទះជួលក៏ដោយពីព្រោះវានឹងផ្តល់នូវសុខភាពផ្លូវកាយអារម្មណ៍ស្ងប់ស្ងាត់រីករាយដែលជាកត្តាសំខាន់សំរាប់ទាក់ទងក្នុងគ្រួសារនឹងការងារ -ឱ្យប្រយ័ត្នប្រយែងប្រើភ្លើងនឹងកំដៅល្មមគ្រប់ពេល បើយើងភ្លេចខ្លួនចំណាយធំអាចនឹងធ្លាក់មកដល់ភ្លាម -រថយន្តត្រូវជាប្រភពចំណាយគ្មានចូលវិញទេ ដូច្នេះត្រូវថែរឱ្យស៊ីសាំងតិច ហើយប្រើឱ្យបានយូរ ។

មានគម្រោងរៀបតាមសមត្ថភាពសម្រាប់ចំណាយធំ១ម្តង ឬ២ដងក្នុងមួយឆ្នាំ ទៅតាមគម្រោងដែលសន្សំបានសម្រាប់វិស្សមចំណាយគម្រោងតូចៗតែកើតមានរាល់ខែដូចជាចូលបុណ្យ -ចងដៃពីធីមង្គលការកូនចៅញាតិមិត្រ -ជំនួយមនុស្សចមិផ្សេងៗសមស្របតាមវត្ថុបំណងសង្គ្រោះរបស់គ្រួសារ។

បរិដ្ឋានរស់នៅជាជំនួយដល់ការថែររក្សាទ្រព្យសម្បត្តិ បើមិនជាទីសមប្រកបទេនោះ គួរគិតពីចារណាការរើទីកន្លែងរស់នៅម្តុំអ្នកចូលចិត្តរកលុយចូលផ្ទះអាចគិតពីការដែលលុយហូរចូលបានច្រើនជាងនៅជិតអ្នកដែលបរិច្ចាក ឬអ្នកដែលមិនសូវគិតពីតម្លៃនៃលុយដែលរកបានដោយលំបាក ។ ប្រសិនបើមានកូនចៅ គឺនឹងមានការអប់រំ-ធំធាត់ក្នុងបរិយាកាយខ្ជះខ្ជាយវានឹងមានការលំបាកនឹង "សន្សំតក់ៗ" ជាមិនខានតែនេះ មិនមែនបានន័យថាអប់រំឱ្យមើលងាយសង្គមក្រីក្រទេ តែត្រូវជាអ្នកផ្តល់គំរូល្អឱ្យអាចក្លាយជា "អ្នកមាន" ដល់អ្នកទាំងនោះផង គឺ "ខ្ញុំធ្វើបានអ្នកក៏ធ្វើបានដូចគ្នា"។

ទស្សនៈអ្នកមានទាំងប៉ុន្មាននេះ ថ្វីត្បិតតែមានបញ្ចេញបញ្ចូលឱ្យស្រួលយល់តាមទស្សនៈឬទម្លាប់ខ្មែរសុទ្ធសឹងតែមានលើកឡើងក្នុងសៀវភៅអ្នកស្រាវជ្រាវដូចជា "ឪពុកមាន ឪពុកក្រ" "អារម្មណ៍អ្នកមានលុយលាន" ឬក៏អត្ថបទវីដេអូរបស់ "ស៊ុយស្មី" ជាដើមដែលទាំងអស់មានលក្ខណៈស្រដៀងគ្នាខុសតែព្រឹត្តការណ៍នៃរឿងនឹងស្ថានភាពដែលនាំឱ្យរឿងបត់បែនតែប៉ុណ្ណោះ។

លេខក្រោយយើងនឹងនិយាយអំពីចរិយាសម្បត្តិសុច្ចរិតយុត្តធមិ ជាគុណសម្បត្តិសម្រាប់នាំបុគ្គលនឹងគ្រួសារឱ្យទៅជា "អ្នកមាន" នឹងគេបានវិញម្តង៕ **តទៅលេខក្រោយ**

## តមកពីទំព័រទី ១ សមាគមខ្មែរអាយុបាន៣០ឆ្នាំ...

ខ្លាំងសម្រាប់អ្នកស្រីបុប្ផាមេឡូនបន្ទាប់ពីពេលឡើងកាន់កាប់តំណែងជាប្រធានគណកម្មការនៃសមាគមខ្មែរចាប់តាំងពីខែវិច្ឆិកា ឆ្នាំ២០១៣មក។ សមាគមខ្មែរកំពុងស្វែងរកជ្រើសរើសនាយកប្រតិបត្តិសម្រាប់បម្រើការក្នុងសមាគម។



អគារថ្មីរបស់សមាគមខ្មែរ

ជាមួយគ្នានោះ សមាគមខ្មែរក៏បានរៀបចំកម្មវិធីដោះដូរបទពិសោធន៍នានា ហើយនៅដើមខែមិនាឆ្នាំនេះ សមាគមខ្មែរចាប់ផ្តើមរៀបចំផ្លាស់ប្តូរទីតាំងអគារធ្វើការរបស់ខ្លួនទៅផ្លូវស្តូលស្ទ្រីត។ ឆ្លងកាត់ការផ្លាស់ប្តូរ និងឧបសគ្គជាច្រើន អ្នកស្រីបុប្ផា មេឡូន នៅតែប្រកាន់ខ្ជាប់នូវក្តីសង្ឃឹម និងសុទិដ្ឋិនិយម ចំពោះអង្គការមួយនេះ ហើយដែលអង្គការនេះកំពុងឈានដល់ខួបគម្រប់៣០ឆ្នាំ នៃការបម្រើសេវាសម្រាប់សហគមន៍។ អ្នកស្រីបុប្ផាមេឡូន បានមានប្រសាសន៍ថា មានចំណុចរំភើបរីករាយជាច្រើន ដែលកំពុងកើតឡើងក្នុងសមាគម ហើយយើងខ្ញុំ មានសេចក្តីត្រេកអរដែលបានរួមចំណែកក្នុងសមាគមនេះ និងការបម្រើសហគមន៍។

ពត៌មានស្តីពីការទទួលបានការអនុញ្ញាតឱ្យផ្លាស់ប្តូរទីតាំងបានកើតឡើងនៅដើមខែនេះ ហើយទំនងជាលទ្ធផលដែលបានកើតចេញអំពីកិច្ចពិភាក្សាក្នុងកម្មវិធីក្លឹបសារព័ត៌មានខ្មែរផុស ឬហៅថា ប្រេសក្លឹបនៅពេលដែលអ្នកស្រី បុប្ផាមេឡូន បានពិភាក្សាអំពីបញ្ហានៃការពន្យាពេលប្តូរទីតាំង ដោយសារតែមិនទាន់បានទទួលលិខិតអនុញ្ញាតពីសាលាក្រុង ។ ក្នុងនោះមានអភិបាលក្រុង និងទីប្រឹក្សាក្រុងជាច្រើនបានចូលរួមកម្មវិធីប្រេសក្លឹបដែលរៀបចំដោយសារព័ត៌មានខ្មែរផុស ហើយពួកគេបានទទួលដឹងពីការពន្យារពេល។




បន្ទាប់ពីទទួលលិខិតអនុញ្ញាត្តិឱ្យប្រើប្រាស់អគារដែលសមាគមខ្មែរបានទិញកាលពីឆ្នាំកន្លងទៅសមាគមខ្មែរនឹងប្តូរទីតាំងទៅផ្លូវស្តូលស្ទ្រីត ។ អគារមួយនេះ សាងសង់ដោយក្រុមហ៊ុនសាងសង់យីហោសរ ។ កាលបរិច្ឆេទសម្ភោធការផ្លាស់ទីតាំងអាចនឹងកំណត់នៅថ្ងៃទី៦ ខែមេសា ក្នុងក្តីសង្ឃឹមថា នឹងអាចទទួលស្វាគមន៍ភ្ញៀវជិតឆ្ងាយស្របទៅនឹងឱកាសបុណ្យចូលឆ្នាំខ្មែរនាខែមេសា។ ទីតាំងថ្មីមួយនេះ នឹងដើរតួនាទីជាមជ្ឈមណ្ឌលមួយដែលផ្តល់សេវាចម្រុះដែលប្រជាជនអាចមកកន្លែងតែមួយនេះបាន។

អ្នកស្រី បុប្ផា មេឡូន បានមានប្រសាសន៍ថា ជារួមសមាគមខ្មែរមានការប្រព្រឹត្តទៅជាប្រក្រតី និងស្ថិតក្នុងស្ថានភាពល្អប្រសើរ។

ការជ្រើសរើសទីតាំងថ្មីនេះ កើតឡើងដោយការសម្រេចជារួមពីគណៈកម្មការនាយកនៃសមាគមទាំងមូល ហើយកើតឡើង ខណៈដែលកម្មវិធីយ៉ាំងប្រូហ្វេសសិនណលប្រូហ្គ្រាមកំពុងរីកលូតលាស់រួមជាមួយនឹងកម្មវិធីបកប្រែភាសាក្នុងសមាគម។

អ្នកស្រី មេឡូន បានលើកឡើងអំពីកម្មវិធីដោះដូរបទពិសោធន៍ក្នុងសហគមដែលនឹងប្រព្រឹត្តទៅនៅថ្ងៃទី២០ ខែមេសា ឆ្នាំ២០១៤ នៅ ដឹក្រោន ផ្លូវ៧៤ មិដដលសិក ក្នុងក្រុងឡូវែល ហើយព្រឹត្តការណ៍នេះនឹងប្រព្រឹត្តទៅនៅរៀងរាល់ត្រីមាសនៃឆ្នាំ។

ក្នុងកម្មវិធីដោះដូរបទពិសោធន៍គ្នាទៅវិញទៅមកនេះ គណៈកម្មការនាយក និងសមាគមនឹងបង្ហាញជូនកម្មវិធីនានានិងកាលបរិច្ឆេទស្តីពីការរៀបចំប្រមូលថវិកា និងកម្មវិធីគម្រោងសម្រាប់បង្កើតជំនួញថ្មីៗដែលគម្រោងនេះ ស្តែងចេញពីកម្មវិធី ចេរីកូ រ៉ូដ ប្រូចិច ផ្តល់សម្រាប់រយៈពេល១២ទៅ១៨ខែ ហើយកម្មវិធីនេះ ក៏ជាឱកាសស្វែងយល់ និងដកស្រង់នូវមតិរិះគន់កែតម្រូវដើម្បីភាពល្អប្រសើរនៃសមាគម។

អ្នកស្រី បុប្ផា មេឡូន សង្ឃឹមថា នឹងរួមចំណែកជួយសមាគមបន្តទៀត ហើយអ្នកស្រីអំពាវនាវឱ្យប្រជាជនក្នុងសហគមទាញយកអត្ថប្រយោជន៍ដែលសមាគមផ្តល់ជូន ។ ហើយសមាគមខ្មែររីករាយឆ្លើយនូវសំណួរ និងបើកទូលាយទទួលយកមតិរិះគន់ដើម្បីស្ថាបនា៕



រ៉ូបេដេរ៉ល ភៀវ៉ារ៉េ
អនុប្រធានសមាគមខ្មែរ

## Continued from page 05 In its 30th anniversary

the hope of being able to host visitors during Cambodian New Year. Once fully up and operating, the new building will serve as a one-stop resource center for the Cambodian community.

"Overall it is progressing nicely," Malone said, "We are really looking forward to having a home of our own and being accessible to the Cambodian people."

The physical relocation is just one of the many new initiatives being undertaken by the active board of directorsduring this anniversary year. In addition to growing ongoing projects such as the CMAA Young Professionals Program and expanded translation services,the new leadership at CMAA has made a dedicated effort at transparency and outreach. These effortsin cludemonthly emails and an appearance by board members on a CMAA-produced Khmer television show on LTC Lowell. The emphasis on communication ishighlighted by the regular series of community exchanges the group has committed to hosting. The next community exchange event will be held on April 20th at The Crown, 74 Middlesex St, in Lowell and these events will continue every quarter throughout the year.

At the community exchange event, the board will present its fundraising timeline and new business plan that was created with support by the Jericho Road project, providing a 12-18 month roadmap for the organization. The exchange event will be an opportunity to continue to solicit feedback from the community as well.

Malone hopes that these events help to unify the community and is very pleased with the efforts of the board and the new direction it is shaping for CMAA. Most of all she would like to continue the dialogue between the organization and the people it serves and represents. "We are proud of the CMAA. We want people to ask questions about what we do and we want them to give us feedback. "

For more information about CMAA and the April 20th community exchange event, please visit www.cmaalowell.org.

## តមកពីទំព័រទី ១៤ តម្លៃផលិតផលសម្លៀកបំពាក់នាំចេញរបស់...

ផលិតបានក្នុងមួយថ្ងៃៗ អស់៨២៥.៦៤៦ឯកតា អំឡុងរយៈពេល១១ខែដំបូងកាលពីឆ្នាំមុន ពោលគឺចំនួនខាតបង់នេះបានកើនឡើង៥៤ភាគរយ បើធៀបនឹងរយៈពេលដូចគ្នាក្នុងឆ្នាំ២០១២ នេះបើយោងតាមតួលេខរបស់សមាគម GMAC ។

កាលពីខែធ្នូឆ្នាំមុន កម្មកររោងចក្រកាត់ដេរជាច្រើនពាន់នាក់បានចូលរួមជាមួយអ្នកគាំទ្រគណបក្សសង្គ្រោះជាតិក្នុងសកម្មភាពតវ៉ាទាមទារឱ្យមានការដំឡើងប្រាក់ឈ្នួលអប្បបរមាប្រចាំខែឱ្យឡើងដល់១៦០ដុល្លារ ។ កាលពីថ្ងៃទី៣ ខែមករា ឆ្នាំនេះ ក្រុមអ្នកតវ៉ានៅខណ្ឌពោធិ៍សែនជ័យរាជធានីភ្នំពេញបានប៉ះទង្គិចជាមួយកម្លាំងកងរាជអាវុធហត្ថដែលបានបើកប្រតិបត្តិការបាញ់ប្រហារ ជាហេតុបណ្ដាលឱ្យមនុស្សប្រាំនាក់ស្លាប់ ។ សមាគម GMAC បានលើកឡើងថា ភាពចលាចលកាលពីពេលនោះធ្វើឱ្យមានការខាតបង់ថវិកា២០០លាន-ដុល្លារក្នុងវិស័យកាត់ដេរ ។

នៅពេលសួរថា តើកំណើននៅក្នុងវិស័យនេះអាចនាំឱ្យមានការឆ្លើយតបទៅនឹងការទាមទារប្រាក់ឈ្នួលអប្បបរមារបស់កម្មករដែរឬយ៉ាងណានោះ លោក កែន វដ្ឋា អ្នកនាំពាក្យក្រសួងពាណិជ្ជកម្ម?បានមានប្រសាសន៍ថា "ខ្ញុំមិនគិតអ៊ីចឹងទេ"។ លោកបានលើកឡើងទៀតថា បច្ចុប្បន្នរដ្ឋាភិបាលកំពុងរិះរកវិធីផ្សេងដើម្បីដោះស្រាយវិវាទប្រាក់ឈ្នួលនេះ ៕ **សុធា**

ព្រះរាជាណាចក្រកម្ពុជា
ជាតិ សាសនា ព្រះមហាក្សត្រ

**កំណត់ហេតុអង្គប្រជុំ**

...

អង្គប្រជុំរួមមាន :

...

ជាលទ្ធផល អង្គប្រជុំបានឯកភាពគ្នាលើការសម្រេចដូចខាងក្រោម :

...

រាជធានីភ្នំពេញ, ថ្ងៃទី២១ ខែវិច្ឆិកា ឆ្នាំ២០១៣

លេខាកត់ត្រា

ប្រធានអង្គប្រជុំ

## តមកពីទំព័រទី ៣ វត្តគ្រែរតនារាមបន្តរកដំណោះស្រាយ...

កាលពីឆ្នាំ២០១១មិនទាន់មានប្រសិទ្ធភាពនៅឡើយទេ ។ សវនាការតុលាការកាលពីថ្ងៃទី១១មិនាកន្លងទៅនេះ បានទុកពេល១៤ថ្ងៃ ថែមទៀតដើម្បីឱ្យបើកការចរចារកការចុះសម្រុងគ្នាដោយខ្លួនឯង ឬដោយមានអ្នកសម្របសម្រួលដែលបញ្ជូនពីតុលាការមក ។

គណកម្មការខាងក្រោមបានបង្ហាញយោបល់របស់ខ្លួន ចំពោះការបង្រួបបង្រួមវត្តឱ្យមកនៅតែមួយឡើងវិញថា:

**១- ការបង្រួបបង្រួមវត្តតែមួយ**

ក-និមន្តបព្វជិតទាំងអស់អង្គឱ្យលោកជួបសំណេះសំណាលផ្ទៃកបព្វជិត

ខ-គណកម្មការទាំងអស់នាំគ្នានិមន្តលោកចូលទៅគង់នៅកុដិតូច ២៥ Quigley Ave ។

គ-ជួសជុលកុដិធំ ២១ Quigley Ave ។

ឃ-ដោយមានការខ្វះខាតថវិកាសម្រាប់ជួសជុលកុដិធំគណកម្មការទាំងអស់ត្រូវរៀបចំធ្វើពិធីបុណ្យ ដើម្បីប្រមូលបច្ច័យសម្រាប់ជួសជុល ។

២-គណកម្មការបង្រួបបង្រួមត្រូវជ្រើសរើសគណកម្មការរៀបចំការបោះឆ្នោត

៣-គណកម្មការចាស់ខាងក្រោមនឹងខាងលើអាចមានសិទ្ធឈរឈ្មោះជាបេក្ខជនគណកម្មាធិការ

៤-ការជ្រើសរើសគណកម្មការអចិន្ត្រៃយ៍ថ្មីបានជាស្ថាពរហើយ គណកម្មការខាងក្រោមខាងលើគណកម្មកាបណ្ដោះអាសន្ន១៤នាក់ គណកម្មការសម្របសម្រួល៤នាក់ត្រូវរំអស់សុពលភាពដោយស្វ័យប្រវត្តិ

៥-ការរៀបចំទាំងអស់ ដូចបានរៀបរាប់ខាងលើដោយសង្ខេបនេះ ត្រូវឱ្យស្របតាមលក្ខន្តិកៈដែលមានស្រាប់ ។

៦-ការធ្វើវិសោធនកម្មលក្ខន្តិកៈវត្ត គឺជាភារកិច្ចរបស់គណកម្មាធិការអចិន្ត្រៃយ៍ ។

ដូចបានគោរពជម្រាបជូនខាងលើនេះ គឺជាសេចក្ដីអនុម័តរបស់គណកម្មាធិការខាងក្រោមសម្រាប់ដាក់ជូនគណកម្មកាសម្របសម្រួលពិភាក្សា។

ធ្វើនៅទីក្រុងឡូវែល ថ្ងៃទី ២៦ ខែមករា ឆ្នាំ២០១៤

**ហត្ថលេខា**

ប្រធាន សាន ប៊ីន

យើងពុំបានទទួលឯកសារណាមួយពីគណកម្មាធិការវត្តលើ ដែលស្នើឱ្យមានការបង្រួបបង្រួមវត្តនៅឡើយទេ ។

# ថ្ងៃបុណ្យសេនផាទ្រីកនៅឡូវែល

**ដោយ: រីឆាដ ហូវ**

**ប្រែសម្រួលដោយ : សុខា**

**ឡូវែល:** ថ្ងៃចន្ទទី១៧ ខែមីនា ឆ្នាំ ២០១៤ ច្រើនជាង៤០០នាក់ បានអញ្ជើញចូលរួមនៅឯសាលសន្និសីទ និងសណ្ឋាគារនៃអគាររបស់សាលាយូម៉ាស ហៅកាត់ថា អាយ ស៊ី ស៊ី ចូលរួមពិសារអាហារពេលព្រឹក ដើម្បីប្រារព្ធពិធីបុណ្យសេនផាទ្រីក នៅឡូវែល។ កម្មវិធីនាថ្ងៃនោះ ត្រូវបានទទួលស្វាគមន៍ និងរៀបចំឡើងដោយព្រឹទ្ធសមាជិក អាយលីន ដូណាហ៊ូ និងប្រធានក្រុងថ្មីនៅឡូវែល គឺ ម៉ៃឃីល ហ្គារី ហើយមានការបង្ហាញជូនដល់អ្នកចូលរួមនូវការនិយាយកំផ្លុកកំប្លែងឡកឡឺយគ្នាទៅវិញទៅមករវាងអ្នកនយោបាយក្នុងតំបន់នៅចំពោះមុខសាធារណជន។ វាគ្មិនក្នុងកម្មវិធីរួមមានអគ្គមេធាវី ម៉ាសាខូកលី និងហិរញ្ញិកសម្រាប់រដ្ឋ ស្ទីវ គ្រសមែន ដែលអ្នកទាំងពីរកំពុងប្រកួតប្រជែងសម្រាប់តំណែងអភិបាលរដ្ឋតំណាងគណបក្សប្រជាធិបតេយ្យ។ ក្នុងនោះវាគ្មិនផ្សេងទៀតរួមមានមន្ត្រីរដ្ឋ ឆាលី បេខឺ មកពីបក្សសាធារណរដ្ឋដែលកំពុងប្រកួតប្រជែងសម្រាប់តួនាទីជាអភិបាលរដ្ឋប្រធានស្រុក ក្នុងខោនធីមីដលសិក សេរិហ្វ ភីធី គូទូជីអាន និង មេធាវីស្រុក មេរីយ៉ាន រ៉ាយអិន។ ជាមួយគ្នានោះ វាគ្មិន រួមមានអភិបាលក្រុងឡូវែល រ៉ដនីយ អេលៀត និងតំណាងរដ្ឋាភិបាល ថម ហ្គោលដិន ខេវិន មឺហ្វី និង ដេវ ណេហ្គល។

ងាកមកបុណ្យ សេន ផាទ្រីក វិញ! ចុះ សេន ផាទ្រីក ជានរណា? សេនផាទ្រីក គឺជាអ្នកដែលបានកើតនៅ ប្រ៊ីតុន ឆ្នាំ ៣៨៥ និងស្លាប់ទៅវិញនៅឆ្នាំ៤៦១។ កាលពីក្មេងគាត់ត្រូវបានចោរសមុទ្រចាប់ជំរិតពីប្រទេសអៀរឡែន និងត្រូវបានបង្ខំឱ្យក្លាយជាទាសករនៅប្រទេសនោះ។ លោកបានលួចរត់ត្រឡប់មកប្រ៊ីតុនវិញ និងបានក្លាយទៅជាសម្តេចសង្ឃសាសនាគ្រីស្ត និងបានត្រលប់ទៅប្រទេសអៀរឡែនវិញ ហើយបានផ្សព្វផ្សាយសាសនាគ្រីស្តឱ្យប្រជាជនបានជឿជាក់ និងក្លាយជាសាសនានៃប្រទេសនោះ។ សេនផាទ្រិក បច្ចុប្បន្នក្លាយទៅជា ផាត្រុនសេន នៃប្រទេសអៀរឡែន ហើយដែលនៅក្នុងសាសនាគ្រិស្តមានន័យថា សេនផាទ្រីក គឺជាព្រលឹងឪពុកម្តាយ ឬជាអាណាព្យាបាលនៃប្រទេសនោះ។





ព្រឹទ្ធ សមាជិក អាយលីន ដូណាហ៊ូ ដឹកនាំអង្គប្រជុំនាឱកាសបុណ្យ សេនផាទ្រីក

កន្លងទៅជាយូរថ្ងៃបុណ្យ សេន ផាទ្រីក សម្រាប់តែប្រជាជនមួយភាគតែបច្ចុប្បន្នបុណ្យនេះត្រូវបានប្រារព្ធទូទាំងប្រទេសរក្សាវប្បធម៌ និងបេតិកភណ្ឌនៃប្រជាជនអាយរីសទាំងមូល ។ ដោយសារតែជនអន្តោប្រវេសន៍អាយរីយបានមករស់នៅក្នុងប្រទេសអាមេរិក ហើយក្លាយទៅជាអ្នកនយោបាយសកម្មក្នុងប្រទេសនេះ ការបង្កើតយុទ្ធការគាំទ្រក្នុងឆាកនយោបាយនាថ្ងៃបុណ្យ សេន ផាទ្រីក ក្លាយទៅជាវប្បធម៌។ វិធីផ្សេងទៀតដែលគេប្រារព្ធពិធីបុណ្យនេះ គឺការដើរព្យុះហយាត្រា ជាក្បួនស្លៀកសម្លៀកបំពាក់ពណ៌បៃតងទទួលទានពោត សាច់គោ និងស្ពៃក្តោប ហើយមួយចំនួនទៀតពិសារទឹកស្រវឹងយ៉ាងច្រើននាថ្ងៃនោះ។

តម្លៃចម្បងនៃបុណ្យសេនផាទ្រីកគឺរំឭកដល់បព្វការីជន ដែលមានឈាមជ័យជាជនជាតិអាយរីស ហើយដែលបានមករស់នៅក្នុងទឹកដីនៃសហរដ្ឋអាមេរិក តាមរយៈការលះបង់ឆ្លងកាត់ឧបសគ្គទំរាំបានមកដល់ទឹកដីសុខសាន្តនៃប្រទេសនេះ៕

# St. Patrick's Day in Lowell

**By Richard P. Howe Jr.**

On Monday, March 17, 2014, more than 400 people gathered at the UMass Lowell Inn & Conference Center for the annual Lowell St. Patrick's Day breakfast. The event was hosted by State Senator Eileen Donoghue and City Manager Michael Geary and featured state and local politicians telling jokes and making fun of each other in front of the big crowd. Speakers included Attorney General Martha Coakley and State Treasurer Steve Grossman who are both Democrats running for governor; former state official Charlie Baker who is a Republican running for governor; Middlesex County Sheriff Peter Koutoujian and District Attorney Marian Ryan. Also speaking were Lowell Mayor Rodney Elliott and State Representatives Tom Golden, Kevin Murphy and Dave Nangle.

Many other candidates for statewide office were also present and shaking hands with people in the crowd. They included candidates for Governor Donald Berwick and Joe Avellone; candidates for Lieutenant Governor Mike Lake, Steve Kerrigan, Leland Cheung and James Arena-DeRosa; candidates for Attorney General Maura Healy and Warren Tolman; and candidates for Treasurer Barry Finegold, Deb Grossman and Tom Conway.

Just who is St. Patrick? He was born in Briton in the year 385 and died in 461. As a young man, he was kidnapped by pirates from Ireland and brought to that country as a slave. He escaped back to Briton but after becoming a Christian priest, he returned to Ireland and converted the people of that country to the Christian religion. He is now the patron saint of Ireland which in the Christian religion means he is the spiritual guardian of the country.

Long ago, St. Patrick's Day was a solemn religious event but today it is a time to celebrate the culture and heritage of the Irish people. Because so many Irish immigrants became active in American politics, campaigning for political office on St. Patrick's Day has become part of the tradition. Other ways to celebrate include marching in parades, wearing green clothing, eating corned beef and cabbage and, for some, drinking large amounts of alcohol. The real value of St. Patrick's Day is that it causes those of us whose ancestors came from Ireland to recall the sacrifices they made to give their descendants a better life here in America.

Continued from page 13

# Ruling CPP Sees Threat..

by six election monitoring groups, showed that widespread election irregularities- including flawed voter lists and extensive distribution of temporary identity cards-ultimately favored the CPP, which officially won the election with 68 out of 123 National Assembly seats.

The CNRP has boycotted parliament since it was convened in September, demanding that the CPP either agree to an investigation into the election or hold a new election before 2018.

As the CPP fought off claims from the opposition that its government is illegitimate due to the flawed elections, the ERA report-and its authors-have been placed at the center of Cambodia's ongoing political quarrel.

In a 60-page response to the ERA report in January, the Council of Ministers proclaimed that the civil society groups behind it, which include many of the country's most prominent election and human rights NGOs, were collaborating with the CNRP.

"The Joint-Report which was compiled based on the research by various so-called 'independent organizations,' whose agents are also called 'independent,' does not reflect the adherence to those principles and neither do the current activities of these NGOs in Cambodia," the Council of Ministers response said.

The response went on to say that the post-election efforts by the CNRP to undermine the credibility of July's election "were planned and designed in close cooperation with a number of non-governmental organizations allied **Continued to pgae 25**

តមកពីទំព័រទី ១២

# ក្រុមហ៊ុនរថយន្តស្ព័រ Porsche...

ជាងមុនក្នុងការប្រើប្រាស់នៅតាមស្ថានភាពផ្លូវមិនសូវល្អនៅក្នុងប្រទេសនេះ។ លោកបានមានប្រសាសន៍បន្តទៀតថា "៩១១ គឺជារថយន្តស្ព័រដ៏ទំនើប ក៏ប៉ុន្តែ រថយន្ត Cayenne គឺជារថយន្តប្រភេទ SUV ហើយវាមានសមត្ថភាពធ្វើប្រតិបត្តិការនៅលើដងផ្លូវ និងនៅទីកន្លែងផ្សេងៗ ដែលមិនមែនជាផ្លូវបាន ពោលគឺនៅតំបន់ដែលមានស្ថានភាពលំបាកបត់បែន"។

លោក ហាន់ធ័រ បានលើកឡើងបន្តទៀតថា ដើម្បីឱ្យទីផ្សាររថយន្តរបស់ក្រុមហ៊ុន Porsche នៅលើទីផ្សារកម្ពុជាចាប់ផ្តើមស្ទុះឡើង និងមានស្ថានភាពល្អប្រសើរជាងមុនផ្នែករចនាសម្ព័ន្ធទីផ្សារនេះប្រហែលជាត្រូវការពេលវេលាពីរបីឆ្នាំ។

នៅពេលក្រុមហ៊ុន Porsche បានប្រកាសកាលពីឆ្នាំ២០០២ថា ខ្លួនបានអភិវឌ្ឍរថយន្តប្រភេទ SUV មានការលើកឡើងយ៉ាងច្រើនពីសំណាក់អ្នកនិយមរថយន្តរបស់ក្រុមហ៊ុន Porsche សុទ្ធថា ការឈានជើងចូលទីផ្សាររថយន្តប្រភេទ SUVជាសញ្ញាបង្ហាញពីការបាត់បង់ទីផ្សាររថយន្តទំនើបៗ ប៉ុន្តែយុទ្ធសាស្ត្រនេះមានប្រសិទ្ធភាព ហើយរថយន្ត Cayenne ត្រូវបានលក់ដាច់យ៉ាងច្រើនដោយសារតែក្រុមហ៊ុន Porsche លក់រថយន្តប្រភេទ SUVបានច្រើនជាងរថយន្តស្ព័រគ្រប់ប្រភេទរបស់ខ្លួន ។

នៅលើទីផ្សារកម្ពុជាក្រុមហ៊ុន Porsche សង្ឃឹមថា ខ្លួននឹងដណ្តើមបានចំណែកទីផ្សារយ៉ាងធំ ទោះបីជាទីផ្សារនេះត្រូវបានគ្របដណ្តប់ដោយក្រុមហ៊ុនតូយ៉ូតា និងក្រុមហ៊ុនរថយន្តឡិចស៊ុស ក៏ប៉ុន្តែក្នុងពេលបច្ចុប្បន្នទីផ្សារនេះមានក្រុមហ៊ុនរថយន្តកាន់តែច្រើន ដូចជាក្រុមហ៊ុនរថយន្ត ឡានដ៍ Rover រថយន្ត Mercedes និងក្រុមហ៊ុន BMW ជាដើមដែលបច្ចុប្បន្នបានបើកសាខាចែកចាយនៅលើទីផ្សារនេះ ហើយក្រុមហ៊ុនរថយន្ត Audi គ្រោងនឹងបើកដំណើរការក្នុងឆ្នាំនេះ។

លោក ហាន់ធ័រ បានលើកឡើងបន្ថែមទៀតថា ក្រុមហ៊ុន Porsche មិនមានការលំបាកក្នុងការបង្ហាញចំណុចផ្សេងគ្នានៃផលិតផលរបស់ខ្លួនពីផលិតផលក្រុមហ៊ុនដទៃដែលប្រជែងគ្នានៅលើទីផ្សារកម្ពុជាទេ។

លោកបានមានប្រសាសន៍បន្ថែមទៀតថា "បើកសាកល្បងមួយទៅនោះអ្នកនឹងដឹងថា រថយន្តរបស់ក្រុមហ៊ុន Porsche មានចំណុចខុសគ្នាត្រង់ណាពីរថយន្តដទៃ"៕ **សុធា**

Continued from page 12

# Pol Pot's Daughter Marries...

Ms. Som since Pol Pot died near Anlong Veng in April 1998, said that the young couple met while studying in Malaysia.

"Our idea was to not be too traditional, or too sophisticated," Mr. Khunnal said of the wedding, but declined to otherwise comment on his stepdaughter.

"It's only a small wedding ceremony with our friends and relatives," he said.

Under the Khmer Rouge regime, at least tens of thousands of men and women were forced to marry people they had never met in mass ceremonies. Relationships were tightly controlled by party authorities and couples often separated shortly after marriage.

Suong Sikoeun, a communist intellectual who worked in the Khmer Rouge Foreign Ministry under Ieng Sary and a wedding guest last night, said that the history that Ms. Patchata was born into was not relevant to the festivities.

"This wedding is not about politics. We're just joining as friends and relatives, as this is a Khmer tradition," Mr. Sikoeun said. "It is an example of how the Khmer people, whether rich and poor, can meet without dispute and not continue to hold onto ill-feelings…. We must maintain solidarity."

A mixture of traditional Khmer dresses and far more modern fare graced the aisles and dance area of Ms. Patchata's wedding last night. A member of the catering staff said that the food, which included duck, had been brought all the way to the ceremony on the Thai-Cambodian border from Phnom Penh.

Wedding guest Chau Khim, 76, who is currently a civil party at the Khmer Rouge tribunal in Phnom Penh and works as an adviser in the Ministry of Agriculture, said that the political life and history of Pol Pot had no relevance to the life of Ms. Patchata, who was a young girl when her father passed away.

"Cambodians often have the mind to accuse one generation in connection to the older generation," said Mr. Khim, who moved to France in 1974 and did not return until 2003.

"They are father and daughter, and it is a Khmer habit to say that they affect each other. Under the Khmer Rouge, when they needed to kill one person, they did not only kill them, they would kill their entire family too. In this case, it's different. They have been separated as father and daughter."

Mr. Khim's older brother, Chau Seng, was the cabinet chief for Prince Norodom Sihanouk and one of the largest personalities in his regime in the late 1960s, and was tortured and killed by the Khmer Rouge at S-21 prison.

In an interview in 2004, Sar Patchata said she had changed her name from Meas Sith in 2001 on the advice of Mr. Khunnal, who told her she should not hide her identity as the daughter of Pol Pot, whose real name was Saloth Sar.

Im Somen, 53, is part of Ms. Patchata's extended family and one of many former Khmer Rouge cadres who now live around Malai district, said she moved to the area in 1996 after having lived near Pol Pot in Anlong Veng after 1985.

"My niece is a part of the younger generation, and does not know anything about that," she said, explaining that Ms. Patchata received little negative stigma in Malai as Pol Pot's daughter, as many hold the former leader in high regard.

"When I lived with Pol Pot, he was a very polite and gentle man. He was never rude toward anyone, but I don't know about his actions during the regime."

Sin Sopheap, 38, the head monk of Wat Malai, who blessed the bride and groom, said that the Khmer Rouge's policies were kept in the past in Malai.

"That is the political inclination of the leaders of any regime," he said of Khmer Rouge policies to outlaw religion, which included eradicating monks.

"This regime in this period is one that has nation, religion, and king, and everybody respects the state religion. The Khmer Rouge regime is gone now," he said.

Ensconced in Malai, the former revolutionaries late last night began rising to dance to traditional Cambodian songs played by a Thai band, while the beaming newlyweds posed for more photographs at the entrance to Ms. Patchata's large family home.

តមកពីទំព័រទី ៧

## ហ្វូល ទស្សនាវដ្តីថ្មីនៅឡូវែល...

ពីរឆ្នាំ ក្រោយមកទស្សនាវដ្តីហ្វូលដែលធ្លាប់តែផ្តល់ត្រឹមតែព័ត៌មានក្នុង គេហទំព័រនឹង បោះពុម្ពការ ផ្សាយរបស់ខ្លួន ជាលើកដំបូងនៅខែមិនានេះ។ លេខមួយនេះនឹងចាត់ទុកថា ជាលេខសំខាន់ ហើយដែលមានបញ្ចូលព័ត៌មានបង្ហាញជូនពីក្រុមតន្ត្រីក្នុងតំបន់ ព្រឹត្តិការណ៍នានាភោជនីយដ្ឋាន និងអត្ថបទដែលមានអត្ថន័យទាក់ទងនឹងស្ត្រី ។ ចំពោះអត្ថបទនៅខែក្រោយទស្សនាវដ្តីហ្វូលគ្រោងនឹងបោះពុម្ពផ្សាយអំពីពិធីបុណ្យចូលឆ្នាំខ្មែរ ហើយសារព័ត៌មានខ្មែរផុសនឹងស្ថិតនៅក្នុងចំណោមអង្គការក្នុងតំបន់ឡូវែលដែលទស្សនាវដ្តីហ្វូលនឹងហៅឡើក្នុងលេខនោះ។

ទស្សនាវដ្តីហ្វូលជាទស្សនាវដ្តីកូឡ័រពេញទំព័រផ្តល់ជូនអ្នកអានដោយឥតគិតថ្លៃ ហើយលោកអ្នកអាចទទួលបានទស្សនាវដ្តីហ្វូលនេះ ពីទីតាំងប្រមាណជា២០ក្នុងតំបន់ឡូវែលក្នុងនោះ មានអាហារដ្ឋាន ប្រ៊ូអឺរីខិននឹង ឱសថស្ថាន ខេ ហ្វាមម៉ាស៊ី និងមជ្ឈមណ្ឌល សួនប្រវត្តិសាស្ត្រជាតិទទួលអ្នកទេសចរជាដើម។ លេខដែលនឹងចេញសម្រាប់ខែមេសានឹងពណ៌នាពិធីបុណ្យចូលឆ្នាំខ្មែរ ហើយនឹងចេញនៅថ្ងៃទី២៧ ខែមិនា ខាងមុខនេះ៕

# Celebrating Cambodian Spring

UMass Lowell, Western Avenue Studios, the Cambodia Town, and Lowell Public schools are celebrating the diversity of Lowell from April 13th to June 30th. The events are being sponsored by a creative economy grant from the UMass President's office received by Pat Fontaine, Associate Professor at the Graduate School of Education at UMass Lowell.

The main events are two exhibits at Western Avenue Studios. One exhibit titled, Lowell a city of refugees, a community of citizens, tells the story of the journey of Cambodians to Lowell after escaping from the killing fields of Pol Pot. The other exhibit tells the story of the newcomers to Lowell. The stories behind the first exhibit are told with drawings of young Cambodians who arrived in Lowell in the early 80s. These drawings were preserved by Dorothea Tsapatsaris. The newcomers exhibit is also told by drawings and murals created by recent arrivals to Lowell. These exhibits are open to the public from April 13th to June 22.

The other events celebrating the diversity of Lowell are listed below. All events take place on Sundays in the Onyx Theater at Western Avenue Studios (unless otherwise indicated) and run from 3-5PM.

On the opening day, April 13th, the Honorable Governor Michael Dukakis and his wife Kitty will be honored by the Cambodian community for their extraordinary work with refugees and refugee causes. They were instrumental in facilitating resettlement of many Cambodians to Lowell.

**April 13:** Opening of the exhibits: music provided by Seng Hong, appearance by the Honorable Governor Michael and Kitty Dukakis

**April 27:** Anghor Dance troupe and exhibits by Cambodian artists of Western Avenue.

**May 18th:** Screening of Lost Child: Sayon's Journey; author speak: Terry Farish, author of The Good Braider and the multimedia exhibit Children of War; exhibits open.

**May 23 (Friday):** Refugee Conference at Middlesex Community College (9-3PM)

**May 25:** Screening of Don´t Think I've Forgotten; exhibits open

**June 8:** Blessing of a healing garden in Clemente Park; Screening of A river changes course; a taste of Cambodia Town (food tasting); exhibits open.

**June 22:** Traditional Medicine and Healing: Metta and UMB- Chhan Touch; author speak: Seng Ty; exhibits open.

## Event Sponsors












តមកទំព័រទី ៩

## ដំណើរទៅ"ឡុងប៊ិច"ក្រុងដែលមានខ្មែរ...

ខាងគ្រួសារខ្ញុំមាន "សូបិន"ជាកូនតំណរចិនត្រកូល"យីប"មានការអប់រំតាមវប្បធម៌ចិនពីម្ដាយមកនាងជាអ្នកជួយរំលឹករឿងត្រកូលនេះយ៉ាងរឹងមាំដល់ខ្ញុំហេតុនេះហើយបានជាយើងត្រូវទៅ "ឡុងប៊ិច"ដើម្បីឱ្យ"ប៊ុណ្ណារ៉ូ"អាចជួបហើយស្គាល់គ្រួសាររបស់ខ្លួនដែលនៅរាយពាសពេញស្រុកអាមេរិក ឬនៅស្រុកខ្មែរឱ្យបានគ្រប់គ្នាតាំងពីតូចទៅនេះជាទម្លាប់មួយដែលខ្មែរជាទូទៅស្រឡាញ់ជាតិតែមិនមានទម្លាប់ប្រមូលផ្ដុំត្រកូលទេ។

មុននឹងបែកគ្នាត្រឡប់មកឡូវែលវិញ យើងបានថតរូបអនុស្សាវរីយ៍មួយដែលនៅក្នុងនោះបង្ហាញជាគ្រួសារត្រកូល"ពិន"ដែលកំពុងតែបន្តដំច្រើនហើយច្រើនជំនាន់ទៅមុខនៅ"ឡុងប៊ិច"តែមួយកន្លែងយ៉ាងគួរឱ្យភ្ញាក់ផ្អើល ហើយមិនបានគ្រប់គ្នាផង ។ ទាំងនេះជាសញ្ញានៃចំណងមនុស្សតាមរយៈគ្រួសារដែលពីកន្លែងនេះទៅគ្រួសារនឹងបង្កើតចំណងវប្បធម៌នឹងសេដ្ឋកិច្ចកាន់តែរីកចំរើនធំឡើងដែល"សូបិន"បានចងដៃទុកឱ្យប៊ុណ្ណារ៉ូ និងបងប្អូនគេក្នុងភារៈកិច្ចជាម្ដាយនៃកូនប្រុសច្បងរបស់ខ្លួន ។

ផ្ទុយទៅវិញ បើមិនធ្វើដំណើរនេះទេ ឬបើគ្មានបំណងរបៀបនេះទេ គ្រួសារ "ពិន"នឹងចេះតែរួញទៅៗ ដោយមិនដឹងខ្លួន រីឯមាតាបីតា នឹងមានឈ្មោះថា "មិនបានជួយពង្រីកសមត្ថភាពប៊ុណ្ណារ៉ូ សម្រាប់បង្កើនប្រព័ន្ធជ្រោមជ្រែងគ្នាតាំងពីតូចទៅឱ្យគ្នាទេ"៕ **(នៅមានត)**



គ្រួសារ"ពិន"នៅឡុងប៊ិច ជប់លៀងមុននឹងលាគ្នាត្រឡប់មកឡូវែលវិញ

តមកទំព័រទី ៨

## "ច្បាប់" ឈ្នានីស និងរើសអើង...

ទល់មុខការលូកដៃចូលរបស់យួនឬទេ ? បើចង់ដឹងច្បាស់ត្រូវពិនិត្យមើលសន្ធិសញ្ញាវវាងខ្មែរនិងយួនស្ដីអំពីព្រំប្រទល់ដែនស្ដីពីជនជាតិយួនមករស់នៅស្រុកខ្មែរស្ដីពីសេដ្ឋកិច្ចរវាងខ្មែរនឹងយួន ។ល ។ បើគេពិចារណាពីរឿងអស់នេះយើងនឹងយល់តើហ៊ុនសែនការពារអី ។

សមាជិកគណបក្សប្រជាជនកម្ពុជាក៏ធ្លាប់ធ្វើសេចក្ដីព្រាងច្បាប់មួយចំនួនដើម្បីរឹតត្បិតលើអ្នកនយោបាយមាននិន្នាការប្រឆាំងរដ្ឋាភិបាល ។ កាលពីឆ្នាំ២០០៦តំណាងរាស្ត្រគណបក្សប្រជាជនកម្ពុជាធ្វើច្បាប់ឯកពន្ធភាពដើម្បីដាក់សម្ពាធទៅលើព្រះអង្គម្ចាស់នរោត្ដមរណឬទ្ធិ ។ក្រោយពីច្បាប់នេះចូលជាធរមានព្រះអង្គម្ចាស់នរោត្ដមរណឬទ្ធិបានលាលែងពីប្រធានរដ្ឋសភា។

ហើយកាលពីឆ្នាំ២០១៣តំណាងរាស្ត្រគណបក្សកាន់អំណាចក៏បានផ្ដើមធ្វើច្បាប់ប្រឆាំងអ្នកមិនទទួលស្គាល់របបខ្មែរក្រហមក៏ដើម្បីដាក់គំនាបនយោបាយប្រឆាំងនឹងមេដឹកនាំគណបក្សសង្គ្រោះជាតិ ។ តែយើងសង្ឃឹមថា ទៅអនាគតរដ្ឋាភិបាលខ្មែរថ្មីមួយនឹងយកច្បាប់នេះមកសិក្សារហើយបន្ថែមថាជនណាមួយចូលរួមដៃជាមួយពួកខ្មែរក្នុងរយៈពេល១៩៧៥ ទៅ ១៩៧៩ ត្រូវមកឆ្លើយចំពោះតុលាការពីសកម្មភាពរបស់ខ្លួនមិនមែនត្រឹមតែទទួលស្គាល់របបខ្មែរក្រហមនោះទេ ។

**លិម គិមយ៉ា**

**តំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិនៅខេត្តកំពង់ធំ**

# CLASSIFIED ADS




រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10




របាំបុរាណខ្មែរ ដោយសាគូ សាមុត
តម្លៃ $10




រឿងរាមកេរ្តិ៍ ដោយសាគូ សាមុត
តម្លៃ $10




ក្រុងភ្នំពេញមុនឆ្នាំ១៩៥៤
តម្លៃ $10




CAMBODGE
តម្លៃ $5




អង្គការជានរណា?
បភាគ តម្លៃ $5/1

| Name | Phone # |
|---|---|
| Shipping Address | Email |
| City, State, Zip | Book Title(s) |

## BOOK ORDER FORM

Checks or Money Order Payable to KhmerPost USA, LLC
**អាចទិញនៅអាស័យដ្ឋាន៖** 45 Merrimack St., Suite 218A, Lowell, MA 01852



Our 2014 Publishing Dates កាលវិភាគបោះពុម្ព

| | |
|---|---|
| January 10th & 24th | July 11th & 25th |
| February 7th & 21st | August 8th & 22nd |
| March 7th & 21st | September 5th & 19th |
| April 4th & 25th | October 10th & 24th |
| May 9th & 23rd | November 7th & 21st |
| June 6th & 20th | December 5th & 19th |

*all ad materials are due one week prior to publishing date.
រាល់គំរូពាណិជ្ជកម្មត្រូវបញ្ជូនមួយសប្តាហ៍មុនថ្ងៃបោះពុម្ព

Call or Visit our Sales Office
45 Merrimack Street. Suite 218A. Lowell, MA 01852
Tel: 978.677.7163. Cell: 978. 656.8141 Fax: 978.677.7092
Email: sobenpin@khmerpost.us or KhmerPostUSA@gmail.com
www.khmerpost.us | www.facebook.com/KhmerPostUSA

## "Help Wanted

ដំណឹងជ្រើសរើសបុគ្គលិក

Dianna's Hair Salon and Spa is seeking an experience Nail Technician withexperiences of pedicure, manicure, and nail callus.

ដាយអាណា សាឡន និងស្ប៉ា ត្រូវការជាងធ្វើក្រចកមានបទពិសោធន៍ទាំងលាប និងម៉្យៅ
Compensation is communication or salary.

ប្រាក់ខែអាចចរចាបាន
Please call Dianna at 978-495-6652 for interview"
សូមទូរស័ព្ទ 978 495 6652 ដាយអាណាដើម្បីសម្ភាសន៍

តមកពីទំព័រទី ១

# សកលវិទ្យាល័យអូហៃយ៉ូ ក្រុងអាតែន...

ហៅកាត់ថា ឌី ស៊ី ខេម រូម មានលោក ប៊ូលី លោកតារា និស្សិតនារីឈ្មោះ សម្ផស្ស និង ហ្វារីណា បច្ចុប្បន្នជានិស្សិតនៅសាកលវិទ្យាល័យ យូម៉ាស ព្រមទាំងបណ្ដាឯកឧត្ដមអ្នកមុខ អ្នកការ មកពីសាកលវិទ្យាល័យអាមេរិកាំងនៃទីក្រុង ភ្នំពេញ រួមមានបណ្ឌិត ជា វណ្ណ ដេត លោក ខេមរិទ្ធ វិសិទ្ធ ទីប្រឹក្សា ពុយគា និងប្រតិភូអចិន្ត្រៃយ៍នៃ ព្រះរាជាណាចក្រកម្ពុជាប្រចាំអង្គការយូណេស ស្កូនៅទីក្រុងប៉ារីស ប្រទេសបារាំង អគ្គរដ្ឋទូត កេត សុភណ្ឌ ព្រមទាំងឯកអគ្គរដ្ឋទូតនៃព្រះរាជា ណាចក្រកម្ពុជាប្រចាំសហរដ្ឋអាមេរិក ឯកឧត្ដម ហែម ហេង។

រីឯវាគ្មិនពីសហរដ្ឋអាមេរិករួមមានជាអាទិ៍ បណ្ឌិត អាឡិន ឡៃមែន បណ្ឌិត អៀ សុផល លោក ទុងយ៉ាប ផលិតកររឿងខ្ញុំនៅតែព្យាយាម អាដាំ ហ្វិកហ្គារ បណ្ឌិតចន្ទ ហាំហ្វ្រី អញ្ជើញមកពី សាកលវិទ្យាល័យហាវ៉ៃ អ្នកច្រៀងរ៉ាប លី ប្រាជ្ញ អ្នកស្រី លីនដា សុភណ្ឌ វិចិត្រករ អរញ្ញា អ្នក សារព័ត៌មានសម្លេង សហរដ្ឋអាមេរិក លោក អ៊ឹម សុធារិទ្ធ និងលោក ស៊ឹង សុផាត អ្នកស្រីបណ្ឌិត ផៃរី កែប តាន់ មកពីសមាគមសុខាភិបាលខ្មែរ ព្រមទាំង និងនិស្សិតចិត្រា និង ទ្រី ដែលជានិស្សិត នៅសាលកវិទ្យាល័យ អូហៃ យ៉ូស្រាប់ និងវាគ្មិន មួយរូបទៀតដែលអញ្ជើញមកពីប្រទេសកាណាដា គឺលោក បៀល ហ្វ្រីវស៍ នាយកកម្មវិធីស្ថាបត្យ កម្មវណ្ណ ម៉ូលីវណ្ណ។

កម្មវិធីសន្និសីទខ្មែរលើកទី៦ ប្រព្រឹត្តទៅ រយៈពេលបីថ្ងៃដោយមានការបើកកម្មវិធីក្រោម អធិបតីភាពឯកអគ្គរាជទូតនៃព្រះរាជាណាចក្រក ម្ពុជា ប្រចាំសហរដ្ឋអាមរិកឯកឧត្ដម ហែម ហេង បន្ទាប់ មកគឺបទបង្ហាញដោយលោក បៀល ហ្វ្រីវស៍ នាយកកម្មវិធីស្ថាបត្យកម្មវណ្ណ ម៉ូលីវណ្ណ និងបទ បង្ហាញដោយនិស្សិតនារីស្ដីពីយេនឌ័ និងជនជាតិ ភាគតិច ដោយនិស្សិត សូ ហ្វារីណា លីមហ៊ាង ហេង និង និស្សិតសម្ផស្ស។ លុះចូលដល់ថ្ងៃត្រង់ គឺការបង្ហាញវត្ថុសិល្បៈដោយវិចិត្រករលីនដា សុភណ្ឌ និងអរញ្ញា បន្ទាប់មក គឺបទបង្ហាញអំពី ការពង្រឹងភាពជាអ្នកដឹកនាំដល់ស្ត្រីខ្មែរដោយ បណ្ឌិត អាឡិន ឡៃមែន។ ក្រោយមកទៀត គឺការ បញ្ចាំងភាពយន្តដែលមានចំណងជើងថា ខ្ញុំនៅតែ ព្យាយាម ដោយផលិតករអាដាំ ហ្វិកហ្គារ។

ចូលដល់ថ្ងៃទីពីរ គឺបទបង្ហាញអំពីនយោបាយ សុខាភិបាលវិស័យសារព័ត៌មាន និងវប្បធម៌ ការ អប់រំ ដោយមានវាគ្មិនដូចជាបណ្ឌិត អៀវ សុផល អ្នកស្រីបណ្ឌិត ផៃរី កែប តាន់ លោក ភូ សុចនា និងនិស្សិត ទ្រីនៃសាលកលវិទ្យាល័យ អូហៃយ៉ូ ក្នុង ប្រធានបទនយោបាយប្រទេសខ្មែរ។ ក្រុមពិភាក្សា អំពីផ្នែកសារព័ត៌មានមានលោក ស៊ឹង សុផាត លោក អ៊ឹម សុធារិទ្ធ និងនិស្សិតចិត្រានៃសាលកលវិទ្យា ល័យអូហៃយ៉ូ។ ក្រុមទីបីមានវាគ្មិន ដូចជាសាលកល វិទ្យាធិការប្រចាំសាកលវិទ្យាល័យបាត់ដំបង ស្ថាបនិកកម្មវិធីសាមគ្គី (SAMAKI PROJECT) ឈ្មោះ រដ្ឋា ឈួន (Ratha Chuon, MPA) និង ប្រតិភូអចិន្ត្រៃនៃព្រះរាជាណាចក្រកម្ពុជាប្រចាំ ទីក្រុងប៉ារីសអគ្គរាជទូត កេត សុភណ្ឌ។ នៅពេល ល្ងាចមានការបញ្ចាំងកុនសុបិន្តលើវាលស្រែ ស្ដីអំពីក្រុមបេសបលខ្មែរផលិតដោយលោក ដើរិន កែ (Daron Ker)។

ថ្ងៃទីបីគឺកិច្ចពិភាក្សាអំពីដំណើរការសាលា ក្ដីខ្មែរក្រហមខ្លឹមសារពីមជ្ឈមណ្ឌលឯកសារកម្ពុជា ការអប់រំ និងអក្សរសាស្ត្រខ្មែរ និងបិទកម្មវិធី ដោយ ប្រាជ្ញ លី ដែលជាអ្នកចម្រៀងច្រៀងរ៉ាប។ កម្មវិធីនេះរៀបចំឡើង និងប្រព្រឹត្តទៅដោយ ជោគជ័យក្រៃលែងក្រោមការខិតខំប្រឹងប្រែងនៃ បុគ្គលដ៏សំខាន់គឺបណ្ឌិត គ្រីសស្ទីន ស៊ូ (Dr. Christine Su) ជានាយកការិយាល័យកម្មវិធី សិក្សាតំបន់អាស៊ីអាគ្នេយ៍នៃសាកលវិទ្យាល័យ អូហៃយ៉ូ៕


ក្រុមវាគ្មិនអំពីអក្សរសាស្ត្រខ្មែរ


ឯកអគ្គរដ្ឋទូតព្រះរាជាណាចក្រកម្ពុជា ឯកឧត្ដម ហែម ហេង


បណ្ឌិត ចាននី ហាំហ្វ្រី និងសកលវិទ្យាធិការ នៃសកលកវិទ្យាល័យបាត់ដំបង សៀង ឯមទ័ម


ក្រុមវាគ្មិនពិភាក្សាអំពីនយោបាយ


បណ្ឌិត អៀ សុផល


បណ្ឌិត ផារី តាន់


បណ្ឌិត អាឡិន ឡៃមែន


និស្សិត គុយ ទ្រី បណ្ឌិត ស៊ូ និង លោក វិសិទ្ធ ខេមរិទ្ធ


ភ្ញៀវកិត្តិយសជាតិ និងអន្តរជាតិចូលរួម សន្និសីទខ្មែរលើកទី៦


អ្នកចំរៀងរ៉ាប ប្រាជ្ញ លី បណ្ឌិត លិនដា សុភ័ណ្ឌ និងវិចិត្រករ អរញ្ញា


ផលិតករ ដារិន និងភ្ញៀវចូលរួមទស្សនាភាពយន្តបេសបលខ្មែរ

តមកទំព័រទី ១៣

# បក្សប្រជាជនផ្តោតលើអព្យាក្រឹត...

លោកបានមានប្រសាសន៍បន្ថែមទៀតថា "ដូច្នេះហើយយើងត្រូវសរសេរក្នុងច្បាប់អំពីការតម្រូវឱ្យអង្គការសង្គមស៊ីវិលទទួលខុសត្រូវ ចំពោះមុខច្បាប់ ប្រសិនបើការអះអាងរបស់ពួកគេបង្កឱ្យមានបញ្ហាជាមួយការបោះឆ្នោត"។

អង្គការសង្គមស៊ីវិលមួយក្រុមមានចំនួន១២អង្គការ ដែលមានឈ្មោះថា សម្ព័ន្ធកែទម្រង់ការបោះឆ្នោត កាលពីខែធ្នូបានចេញរបាយការណ៍រួមស្តីអំពីការបោះឆ្នោតនៅកម្ពុជាឆ្នាំ២០១៣ ជារបាយការណ៍វិភាគដ៏ទូលំទូលាយបំផុតអំពីការបោះឆ្នោតជាតិដែលមានទំនាស់ច្រើនកាលពីខែកក្កដានេះ។

របាយការណ៍ដែលប្រើព័ត៌មានចងក្រងដោយអង្គការឃ្លាំមើលការបោះឆ្នោតចំនួនប្រាំមួយបានបង្ហាញថា ភាពមិនប្រក្រតីជាច្រើននៅក្នុងការបោះឆ្នោតនេះរួមទាំងបញ្ជីឈ្មោះបោះឆ្នោតមិនត្រឹមត្រូវ និងការចេញប័ណ្ណបញ្ជាក់អត្តសញ្ញាណបណ្តោះអាសន្នជាច្រើន បានធ្វើឱ្យគណបក្សប្រជាជនកម្ពុជាទទួលបានផលប្រយោជន៍ និងបានឈ្នះការបោះឆ្នោតនេះជាផ្លូវការចំនួន៦៨អាសនៈ ក្នុងចំណោមអាសនៈរដ្ឋសភាចំនួន១២៣។

គណបក្សសង្គ្រោះជាតិបានធ្វើពហិការមិនចូលរដ្ឋសភាចាប់តាំងពីរដ្ឋសភាបានកោះប្រជុំកាលពីខែកញ្ញា ហើយបានទាមទារឱ្យគណបក្សប្រជាជនកម្ពុជាព្រមព្រៀងលើការស៊ើបអង្កេតក្នុងការបោះឆ្នោតនេះ ឬរៀបចំការបោះឆ្នោតថ្មីមុនឆ្នាំ២០១៨។

នៅពេលដែលគណបក្សប្រជាជនកម្ពុជាជំទាស់នឹងការអះអាងរបស់គណបក្សប្រឆាំងដែលថារដ្ឋាភិបាលរបស់ខ្លួនខុសច្បាប់ដោយសារការបោះឆ្នោតមិនត្រឹមត្រូវរបាយការណ៍របស់សម្ព័ន្ធកែទម្រង់ការបោះឆ្នោត និងអ្នកសរសេររបាយការណ៍នេះត្រូវបានបន្ទោសចំពោះជម្លោះនយោបាយដែលកំពុងកើតមាននៅកម្ពុជា។

នៅក្នុងរបាយការណ៍ឆ្លើយតបចំនួន៦០ទំព័រទៅនឹងរបាយការណ៍របស់អង្គការសម្ព័ន្ធកែទម្រង់ការបោះឆ្នោតកាលពីខែមករា ទីស្តីការគណៈរដ្ឋមន្ត្រីបានអះអាងថា អង្គការសង្គមស៊ីវិលនៅពីក្រោយរឿងនេះរួមទាំងអង្គការជាច្រើនក្នុងចំណោមអង្គការឃ្លាំមើលការបោះឆ្នោត ហើយអង្គការសិទ្ធិមនុស្សធំៗនៅកម្ពុជាបានសហការជាមួយគណបក្សសង្គ្រោះជាតិ។

ទីស្តីការគណៈរដ្ឋមន្ត្រីបានឆ្លើយតបថា "របាយការណ៍រួមដែលចងក្រងឡើងផ្អែកតាមការស្រាវជ្រាវរបស់អង្គការឯករាជ្យផ្សេងៗដែលចាត់ទុកអង្គការរបស់ខ្លួនថា ឯករាជ្យដែរនោះមិនបង្ហាញពីការប្រកាន់ខ្ជាប់ទៅនឹងគោលការណ៍ទាំងនោះ និងមិនបង្ហាញពីសកម្មភាពបច្ចុប្បន្នរបស់អង្គការទាំងនេះនៅកម្ពុជាទេ"។

របាយការណ៍ឆ្លើយតបនេះលើកឡើងថា ការប្រឹងប្រែងក្រោយការបោះឆ្នោតរបស់គណបក្សសង្គ្រោះជាតិដើម្បីធ្វើឱ្យលែងមានទំនុកចិត្តលើការបោះឆ្នោតកាលពីខែកក្កដានេះត្រូវបានរៀបចំ និងបង្កើតឡើងដោយមានការសហការជិតស្និទ្ធជាមួយអង្គការមិនមែនរដ្ឋាភិបាលជាច្រើនដែលមានទំនាក់ទំនងជាមួយគណបក្សសង្គ្រោះជាតិ និងបានទទួលការគាំទ្រផ្នែកបច្ចេកទេសហិរញ្ញវត្ថុ និងនយោបាយពីក្រៅប្រទេស។

លោក គល់ បញ្ញា នាយកប្រតិបត្តិគណៈកម្មាធិការដើម្បីការបោះឆ្នោតដោយសេរី និងយុត្តិធម៌នៅកម្ពុជាជាអ្នកចូលរួមម្នាក់នៅក្នុងការធ្វើរបាយការណ៍របស់សម្ព័ន្ធកែទម្រង់ការបោះឆ្នោតនេះបានមានប្រសាសន៍ថា ទោះបីជារដ្ឋាភិបាលដែលទើបបង្កើតថ្មីរបស់គណបក្សប្រជាជនកម្ពុជាបានសន្យាធ្វើកំណែទម្រង់ស៊ីជម្រៅក៏ដោយក៏រដ្ឋាភិបាលនេះនៅតែគិតខុសចំពោះការរិះគន់របស់គណបក្សប្រឆាំង។

លោក គល់ បញ្ញា បានមានប្រសាសន៍ថា "គណបក្សប្រជាជនកម្ពុជាមិនចង់បានរបាយការណ៍ណាមួយអំពីភាពមិនប្រក្រតីក្នុងការបោះឆ្នោតទេ។ ពួកគេចង់ឃើញលទ្ធផលបោះឆ្នោតស្របច្បាប់។ ពួកគេចង់និយាយថា អ្វីៗគ្រប់យ៉ាងល្អឥតខ្ចោះ និងថា ការបោះឆ្នោតនេះសេរី និងយុត្តិធម៌ ហើយអ្វីៗសុទ្ធតែល្អទាំងអស់"។ លោកបានបន្តទៀតថា "ប៉ុន្តែមានពាក្យបណ្តឹងពីប្រជាជន ដូច្នេះពួកគេគួរតែដោះស្រាយបញ្ហានេះ។ ពួកគេគួរទទួលស្គាល់បញ្ហានេះ ហើយបោះជំហានទៅមុខ បើ មិនដូច្នេះទេតើពួកគេអាចកែទម្រង់ដោយវិធីណា"។

លោកស្រី ជា វណ្ណាត អ្នកវិភាគនយោបាយ និងជាអតីតប្រធានមជ្ឈមណ្ឌលអភិវឌ្ឍន៍សង្គម បានមានប្រសាសន៍ថា ភាពតានតឹងរវាងគណបក្សកំពុងកាន់អំណាច និងអង្គការសង្គមស៊ីវិល គឺដោយសារការបដិសេធរបស់គណបក្សប្រជាជនកម្ពុជាមិនប្រកាន់តាមគោលការណ៍លទ្ធិប្រជាធិបតេយ្យ ដូចមានចែងនៅក្នុងរដ្ឋធម្មនុញ្ញ។

លោកស្រីបានមានប្រសាសន៍ថា "អព្យាក្រឹតភាពឱ្យរបស់អង្គការសង្គមស៊ីវិល គឺដើម្បីនិយាយអ្វីដែលយើងចង់និយាយផ្អែកតាមលទ្ធិ-ប្រជាធិបតេយ្យអភិបាលកិច្ចល្អតម្លាភាព និងគណនេយ្យភាពមិនមែនដោយសារការលម្អៀងផ្នែកនយោបាយទេ"។ លោកស្រីបានបន្ថែមថា តាមទស្សនរបស់គណបក្សកាន់អំណាច អ្វីៗទាំងអស់សុទ្ធតែលម្អៀង"។

លោក ធន សារាយ ប្រធានអង្គការលីកាដូ បានមានប្រសាសន៍ថា ការគ្មានស្ថាប័នរៀបចំការបោះឆ្នោតឯករាជ្យនៅក្នុងរដ្ឋាភិបាល តួនាទីរបស់អង្គការសង្គមស៊ីវិលក្នុងនាមជាអ្នកត្រួតពិនិត្យអំណាចរបស់គណបក្សកាន់អំណាចនោះ គឺជាការសំខាន់។

លោកបានមានប្រសាសន៍ថា "អង្គការសង្គមស៊ីវិលត្រូវតែអព្យាក្រឹត និងឯករាជ្យពីគណបក្សទាំងពីរ ប៉ុន្តែនៅពេលដែលយើងឃើញដីព្យាយាមជាន់កណ្តុរ យើងមិនអាចនៅស្ងៀមបានទេ"។ លោកបានបន្ថែមថា "យើងត្រូវនិយាយនៅពេលយើងមើលឃើញភាពអយុត្តិធម៌ ឬភាពមិនត្រឹមត្រូវ។ ប្រសិនបើយើងចេះតែនៅស្ងៀមយើងនឹងមិនអព្យាក្រឹតទៀតទេ យើងជាអ្នកគាំទ្រដី"។ **គីមហៀន**

# តួអក្សរខ្មែរផ្ទៀបនឹង រូបតួអង្គរឿងរាមកេរ្តិ៍

គំនូរតួអង្គនៃរឿងរាមកេរ្តិ៍ គូរនៅឆ្នាំ១៩៣៨
គូរដោយជាងតឹក ជាងព្រះរាជបណ្ណាល័យ
ចំណាំងជើងដោយព្រះមហាពិទូរក្រសេម

Vay Rab

RamaLaks

Sovann Maccha

Singe blane : Hanuman

Laks (Laksmana)

Vayo Pheak

103

Virul Mukh

Angkut

104

Indrajit

Rithyicar

Eysei

Achenei : cheval

105

Onnareach

Onnakan

106

Altié de Rab

Bali

107

Continued from page 18

## Ruling CPP Sees Threat..

with the CNRP, which have received technical, financial and political support from abroad."

Although the newly formed CPP government has promised deep reforms, it has continued to confuse criticism with political opposition, said Koul Panha, executive director of the Committee for Free and Fair Elections in Cambodia, a contributor to the ERA report.

"[The CPP] doesn't want any report regarding election irregularities," Mr Panha said. "They want to see a legitimate [election] outcome. They want to say 'Everything is perfect. The election is free and fair and everything is fine.'"

"But there have been complaints from the public, so they should deal with that," he continued. "They should recognize the problem and then move forward, otherwise how can they reform?"

Chea Vannath, a political analyst and former president of the Center for Social Development, said that the tension between the ruling party and civil society groups is a function of the CPP's refusal to embrace democratic principles enshrined in the Constitution.

"Neutrality [among civil society groups] is to say what you are supposed to say based on democracy, good governance, transparency and accountability, not because of political bias," she said.

"From the ruling party's point of view…all that is considered biased," she added.

Thun Saray, president of local rights group Adhoc, said that, in the absence of independent electoral institutions within the government, the role of civil society groups as a check on the ruling party's power was critical.

"Civil society has to be neutral and independent from both parties, but when we see the elephant try to step on the mouse we cannot keep silent," Mr. Saray said.

"We have to speak when we see injustice or unfairness," he added. "If we keep silent we are not neutral anymore, we are on the side of the elephant."

# មាតាបិតាគួរធ្វើដូចម្តេច ទើបកូនឆាប់ចេះវារ?

ឪពុកម្តាយដែលទើបតែមានកូនដំបូងអ្នកខ្លះមានចម្ងល់ថា ហេតុអ្វីបានជាកូនមិនព្រមវារ ? ដូច្នេះវិធីខាងក្រោមនេះ នឹងជួយធ្វើឱ្យឪពុកម្តាយអាចឈ្វេងយល់ដឹងអំពីវិធីជួយធ្វើឱ្យកូនតូចរបស់អ្នកឆាប់ចេះវារបាន...។

**-ការលូតលាស់យឺតយ៉ាវ:** ការលូតលាស់នេះ គឺអាស្រ័យតាមក្មេងនីមួយៗ ដូចនេះឪពុកម្តាយមិនចាំបាច់បារម្ភពេកនោះទេ ។ អ្នកគួរដឹងថា ក្មេងអាយុ៧-៨ខែ ទើបមានសាច់ដុំដៃរឹងមាំ និងអាចធ្វើចលនាលូន ឬវារទៅមុខបាន ។ ក្មេងខ្លះអាចវារបានតាំងពីអាយុ៦-៧ខែ តែក្មេងខ្លះទើបតែចេះវារនៅអាយុ១០ខែ ។ តែក្នុងករណីដែលកូនលូតលាស់យឺតជាងធម្មតាអ្នកជាឪពុកម្តាយគួរនាំកូនទៅពិគ្រោះជាមួយគ្រូពេទ្យ ។

**-ការមើលថែទាំ:** ការវារ គឺជាដំណាក់កាលពិបាកមួយសម្រាប់កុមារ ព្រោះត្រូវប្រើសាច់ដុំយ៉ាងខ្លាំង ។ ពេលខ្លះភាពយឺតយ៉ាវនៃការវាររបស់កុមារ ក៏អាស្រ័យទៅតាមការចិញ្ចឹមថែទាំផងដែរ ។ ឪពុកម្តាយខ្លះកូនដួលក៏រត់ទៅឱបដូចនេះអ្នកគួរបណ្តោយកូនខ្លះ ដើម្បីឱ្យកូនមានឱកាសប្រើសាច់ដុំដៃជើង និងខ្នងឱ្យបានញឹកញាប់ ។

**- ជំរុញម្តងបន្តិចៗ :** អ្នកគួរសង្កេតមើលពីសាច់ដុំដៃជើង និងដងខ្លួនរបស់កូនតូច ។ ប្រសិនបើឃើញថា សាច់ដុំមានសភាពរឹងមាំ ប៉ុន្តែកូនមិនព្រមវារអ្នកគួររកវត្ថុមកជំនួយដូចជាតុក្កតាដែលមានពណ៌ស្រស់ៗ ឬវត្ថុដែលនឹងមានចលនាដើម្បីឱ្យកូនវារទៅរក ឬវារតាមវត្ថុនោះ ដោយចម្ងាយខ្លីៗម្តងបន្តិចៗក្រៅពីនេះអ្វីដែលអ្នកមិនគួរភ្លេច គឺការសរសើរគ្រប់ពេល ដើម្បីឱ្យកូនសប្បាយ និងព្យាយាមកាន់តែខ្លាំងជាងមុន ។

**-កូនវារក្នុងផ្ទះ ត្រូវមានសុវត្ថិភាព :** អ្នកគួរឱន និងពិនិត្យមើលវត្ថុនៅជុំវិញខ្លួនរបស់កូនដូចជាយកវត្ថុតូចៗ ដូចជាកាក់ ឬគ្រាប់ឃ្លីតូចៗ ឬគ្រាប់ថ្នាំចេញឱ្យឆ្ងាយ ឬទុកឱ្យផុតពីដៃក្មេង និងគួររៀបចំខ្សែផ្សេងៗឱ្យមានរបៀបរៀបរយ ។ ប្រយ័ត្នជាងនេះទៀតនោះ គួររកវត្ថុអ្វីមួយមកបិទឌុយភ្លើង ដើម្បីការពារកុំឱ្យកូនលូកដៃចូល ។

-រកវត្ថុអ្វីមកបាំងកាំជណ្តើរទាំងផ្នែកខាងលើ និងខាងក្រោម ដើម្បីការពារកុំឱ្យកូនឡើងឬចុះដែលអាចបណ្តាលឱ្យមានគ្រោះថ្នាក់បាន ។

-រៀបចំផ្ទះឱ្យមានរបៀបរៀបរយទូលាយងាយស្រួលកូនធ្វើចលនា ៕

## តមកពីទំព័រទី ៥ បាត់យន្តហោះម៉ាឡេស៊ី....

ជាមានគេធ្វើដោយចេតនាជាមិនខាន ។ ក្នុងការបាត់រកយន្តហោះមិនឃើញពីមុនៗមក



ក៏ធ្លាប់មានដូចគ្នានេះដែរ គឺបាត់ត្រឹមតែ៥ថ្ងៃ ប៉ុណ្ណោះលើកនេះបាត់មួយអាទិត្យទៅហើយនៅតែរកមិនឃើញ ។ មកដល់ថ្ងៃចន្ទទី១៧នេះ សេចក្តីសន្និដ្ឋានថ្មីរួមគ្នានឹងសម្លេងចុងក្រោយដែលទាញយកចេញបានពីវិទ្យុទទួលសម្លេងផ្កាយរណបបានបញ្ជាក់ថា ស្ថានភាពក្នុងយន្តហោះពុំមានភាពគ្រោះថ្នាក់ឬគម្រាមណាមួយទេ ជាហេតុធ្វើឱ្យក្រុមអ្នកស៊ើបអង្កេតងាកមកស្រាវជ្រាវក្នុងចំណោមអ្នកដំណើរបុគ្គលិកនឹងអ្នកបើកទាំងអស់វិញថា "នាវិកអាចនឹងពង្វាងយន្តហោះដោយខ្លួនឯង"។ គេប៉ាន់ថា "យន្តហោះប៊ូអ៊ីង៧៧៧មានសាំងគ្រប់គ្រាន់នឹងហោះហើរបាន៣០០០មាយល៍អាចនៅលើផ្លូវទៅដល់ប៉ាគីស្ថាន ឬអាហ្វហ្គានីស្ថានដែលជាជង្រុក "អាលខៃដា"បាន ៕

## តមកពីទំព័រទី ៥ ប្រទេសយូក្រែន...

បើទោះជា"យូក្រែន"ត្រូវបោះឆ្នោតធ្វើប្រជាមតិក៏ដោយក្តីក៏តម្រូវឱ្យរុស្ស៊ីថយចេញពីយូក្រែនឱ្យអស់ជាមុនសិនដែរ ។ លោកប្រធានាធិបតី ស.រ.អា. បារ៉ាក់ អូបាម៉ា ក្នុងសប្តាហ៍មុន ហាក់ដូចជាបានបន្ធូរឥរិយាបទមិនតឹងតែងចំពោះការដកទ័ពថយរបស់រុស្ស៊ីដូចពេលមុននោះឡើយនេះបើតាមការវិភាគរបស់អ្នកកាសែតមួយចំនួន ប៉ុន្តែនៅសប្តាហ៍នេះបានចេញបញ្ជាឱ្យធ្វើការដាក់ទណ្ឌកម្មចំពោះការរំលោភអធិបតេយ្យភាពនេះ ហើយថា "ការបោះឆ្នោតណាមួយនៅយូក្រែននឹងមិនមានការទទួលស្គាល់ពីសហគមន៍អន្តរជាតិឡើយ" ៕





# ជោគជតារាសីលោកអ្នក ទាំង១២ ប្រចាំឆ្នាំរោង



## ឆ្នាំជូត

រាល់ការស្មុគស្មាញដែលធ្លាប់កើតមានលើលោកអ្នកក្នុងពេលនេះ នឹងត្រូវអហោសិកម្មទាំងអស់ ហើយទ្រព្យដែលរបូតចេញពីដៃទៅនឹងវិលត្រឡប់មកវិញយ៉ាងគ្រប់គ្រាន់ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ ត្រូវគិតគូរឱ្យបានច្បាស់លាស់មុននឹងដាក់ទុនថ្មី ទើបមិនខាតបង់រាល់ការចំណាយទាំងនោះ ។ រីឯបញ្ហាស្នេហាត្រូវចេះពូនជ្រោយចំណងស្នេហាដោយមានភាពផ្អែមល្ហែមទើបជាការប្រសើរ ៕



## ឆ្នាំឆ្លូវ

អាចពោលបានថា លោកអ្នកមានសេចក្ដីសុខក្នុងជីវិត និងការងារ ព្រោះវិបត្តិ និងភាពស្មុគស្មាញដែលមានកន្លងមកក៏បានធូរស្រាលឡើងវិញមួយកម្រិតផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ ទោះបីជាចេញទៅជួញដូរនៅទីណាក្ដី គួរចៀសវាងការដាក់ទុនថ្មី ព្រោះអាចនាំឱ្យខាតបង់ ។ រីឯបញ្ហាស្នេហាគូស្នេហ៍ច្រើនប្រចណ្ឌខុសរឿង ៕



## ឆ្នាំខាល

ក្នុងរយៈពេលនេះលោកអ្នកជួបនឹងបញ្ហាខាងផ្លូវចិត្តមិនសូវជាសប្បាយរីករាយប៉ុន្មាននោះទេ តែប្រសិនបើចង់ទទួលផលពីការងារនោះ ចូរធ្វើចិត្តឱ្យត្រជាក់ ទើបបានសម្រេចដូចបំណង ។ បើជាអ្នកប្រកបរបររកស៊ីជួញដូរវិញ គឺមានការប្រទាំងប្រទើសជាមួយអ្នកមានមុខរបរដូចគ្នា ដូច្នេះគួរបើកចិត្តឱ្យទូលាយ ។ រីឯបញ្ហាស្នេហាមានការកាំចិត្ត ព្រោះតែម្នាក់ៗចង់ចាញ់ឈ្នះគ្នានោះឯង ៕



## ឆ្នាំថោះ

នៅក្នុងរយៈពេលនេះ លោកអ្នកទទួលលាភសក្ការៈពីសាច់ញាតិបងប្អូនដែលជិតស្និទ្ធ ។ ក្រៅពីនោះក៏នៅទទួលបានដំណឹងល្អដែលមានប្រយោជន៍ដល់ជាតិ និងការងាររបស់លោកអ្នកតទៅអនាគតទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញផលកម្រៃទទួលបានកាក់កបគ្រាន់បើតែហាមកុំជួញដូរផ្លូវឆ្ងាយប្រយ័ត្នមានបញ្ហាដល់ខ្លួន ។ រីឯបញ្ហាស្នេហាគូស្នេហ៍អាចមានការរកាំរកូសគ្នាខ្លះ ប៉ុន្តែមិនធ្ងន់ធ្ងរនោះទេ ៕



## ឆ្នាំរោង

លោកអ្នកគួរប្រុងប្រយ័ត្នចំពោះការនិយាយស្ដីបន្តិច ពីព្រោះអាចនឹងមានគូសត្រូវចាំចាប់ទោសកំហុសមួលបង្កាច់បង្ខូចកេរ្ដិ៍ឈ្មោះរបស់លោកអ្នកឱ្យប្រែក្លាយទៅជាស្មុយអសោចិ៍ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញមានក្រុមមនុស្សតាមឈ្នានីសច្រើន ដូចច្នេះត្រូវប្រយ័ត្នបន្តិចចៀសវាងការបរាជ័យ ។ រីឯបញ្ហាស្នេហាមានភាពចម្រូងចម្រាសដាក់គ្នាបន្តិចបន្តួច ៕



## ឆ្នាំម្សាញ់

រាល់ការបំពេញការងារទាំងឡាយលោកអ្នកមិនមានបញ្ហាអ្វីចោទនោះទេ ប៉ុន្តែក្នុងនោះ សូមប្រយ័ត្នកុំយកអាសាមនុស្សសម្បុរសឱ្យសោះ ព្រោះនាំឱ្យកើតរឿងសៅហ្មងទៅថ្ងៃក្រោយ ។ សម្រាប់អ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចសន្សំទុកបានខ្លះ ។ រីឯបញ្ហាស្នេហាចូរកុំយកភាពមានះចង់ចាញ់ឈ្នះប្រយ័ត្នកើតមានជម្លោះវិវាទឈានដល់ការប្រេះស្រាំ ៕



## ឆ្នាំមមី

រាល់កិច្ចការសព្វបែបយ៉ាងលោកអ្នកអាចជួបនឹងបញ្ហាខ្លះៗ នាគ្រាដំបូង ប៉ុន្តែក្រោយមកមិនមានអ្វីជាឧបសគ្គរារាំងទៀតឡើយ ។ ចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ មានការទិញចូលលក់ចេញគ្រាន់ បើអាចរកផលកម្រៃត្រឡប់មកផ្ទះវិញ យ៉ាងត្រជាក់ចិត្ត ។ រីឯបញ្ហាស្នេហាមានភាពផ្អែមល្ហែម និងស្រស់ស្រាយប្រៀប ដូចត្រីក្នុងទឹកនារដូវខែវស្សាដូច្នេះដែរ ៕



## ឆ្នាំមមែ

រាល់កិច្ចការដែលលោកអ្នកប៉ងប្រាថ្នា ជាយូរមក ហើយនោះក្នុងរយៈពេលនេះ គឺបានសមដូចបំណង ហើយគ្មានអ្វីមករារាំងនោះទេ ហើយរាល់ការប៉ងយាយីពីមនុស្សដែលមានបំណងមិនល្អមកលើលោកអ្នកនោះក៏មិនបានសម្រេចដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញអាចពង្រីកអាជីវកម្មឱ្យធំបន្ថែមទៀតបាន ។ ឯបញ្ហាស្នេហាគូស្វាមីភរិយាមានភាពសុខដុមរមនាគ្មានផលរមាស់អ្វីឡើយ ៕



## ឆ្នាំវក

លោកអ្នកមានភ័ព្វសំណាងល្អក្នុងការងារទទួលរឿងឡើងតួនាទី ឬប្រាក់បៀវត្សរ៍បន្ថែម ។ ជាងនេះទៀតនោះប្រសិនបើចង់ពឹងពាក់អ្នកមានយសស័ក្តិខ្ពង់ខ្ពស់ក្នុងរឿងអ្វីមួយនឹងបាន ដូចបំណងផងដែរ ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ អាចរកប្រាក់ចំណូលចិញ្ចឹមគ្រួសារបានដោយស្រួលទេ មិនមានអ្វីមករាំងស្ទះឡើយ ។ រីឯបញ្ហាស្នេហាគូស្នេហ៍រមែងចេះអត់ឱនឱ្យគ្នា ៕



## ឆ្នាំរកា

រាល់ការបំពេញការងាររបស់លោកអ្នកក្នុងរយៈពេលនេះសុទ្ធតែផ្ដល់នូវអត្ថប្រយោជន៍ គួរឱ្យជាទីពេញចិត្តទាំងអស់គ្មានអ្វីមករាំងស្ទះឡើយ ហើយជាងនេះទៀត នោះគម្រោងការដែលបានត្រៀមទុកជាយូរមក ហើយក៏នឹងបានសម្រេចផងដែរ ។ បើជាអាជីវកររកស៊ីវិញ មានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ រីឯបញ្ហាគូស្នេហ៍ច្រើនយល់ចិត្តគ្នា និងនឹករលឹកគ្នា បើនៅឆ្ងាយ ៕



## ឆ្នាំច

លោកអ្នកអាចនឹងមានអារម្មណ៍ច្របូកច្របល់បន្តិចនៅក្នុងរយៈពេលនេះ ព្រោះកិច្ចការដែលថា នឹងទទួលបានផលល្អនោះ វាអាចមានការប្រែប្រួលដោយសារតែមានការរំខានពីអ្នកដទៃ ។ បើចំពោះអ្នកប្រកបមុខរបររកស៊ីជួញដូរវិញ អាចរកផលកម្រៃគ្រាន់ បើគួរជាទីគាប់ប្រសើរជាងមុន ។ រីឯបញ្ហាស្នេហាពុំមានផលរមាស់អ្វីនោះឡើយ ៕



## ឆ្នាំកុរ

លោកអ្នកនឹងទទួលបាននូវលាភសក្ការៈពីភាគហ៊ុនរកស៊ី និងមិត្តរួមការងារយ៉ាងច្រើនគួរឱ្យពេញចិត្ត ។ លើសពីនេះទៅទៀតគម្រោងការដែលបានត្រៀមទុកនឹងបានសម្រេចដូចបំណងទៀតផង ។ បើជាអ្នកប្រកបមុខរបររកស៊ីវិញ គួរជួញដូរនៅទីជិតៗ ទើបសមប្រកប ។ រីឯបញ្ហាស្នេហាគូស្នេហ៍ចេះស្ដាប់ឱវាទគ្នា ៕

តមកពីទំព័រទី ១

## ទស្សនៈប្រចាំថ្ងៃ...

ឱ្យគង់វង្សទើបល្អជាង"។ ស្រាប់តែនៅអឺរ៉ុបខាងកើតនាប្រទេស"យូក្រែន"រុស្ស៊ីបានយកដីភាគខាងត្បូង គឺតំបន់"គ្រេមីញ៉ា"តែមួយប៉ប្រិចភ្នែកបាន ដោយគ្មានបង្ហូរឈាមដោយមានការបញ្ចុះបញ្ចូល បញ្ជូនពលរដ្ឋគេមកក្នុងប្រទេស"យូក្រែន"កាន់តែច្រើន ដោយទិញយកថ្នាក់ដឹកនាំកំពូលឱ្យបំរើផលប្រយោជន៍បរទេសផ្ទុយពីវត្ថុបំណងពលរដ្ឋខ្លួនឯង ។ ព្រឹត្តិការណ៍កើតលឿនពេក សូម្បីតែសហគមន៍បរទេសគាំទ្រពលរដ្ឋ"យូក្រែន"ពេញទំហឹងក៏ហក់មកជួយមិនទាន់។

ព្រឹត្តិការណ៍"យូក្រែន"បានកន្ត្រាក់ស្មារតីខ្ញុំនាពេលនេះថា "ចុម! អាសន្នមកដល់កម្ពុជាហើយទេតើ?" ពីព្រោះរឿងដូចគ្នានេះកំពុងតែមានដំណើរនៅកម្ពុជាគ្មានខុសពី "គ្រេមីញ៉ានៃប្រទេសយូក្រែន" អ្វីបន្តិចទេ ប្រទេសខ្មែរជឿនលឿនសម្រាប់តែមនុស្សភាគតិចនឹងបរទេស រីឯមនុស្សភាគច្រើនត្រូវគេបំផ្លាញធ្វើបាបគ្រប់គ្រងប្រទេសឱ្យមានឈ្មោះអាក្រក់ផុតលេខខ្មែរកាន់តែច្រើនរស់នៅក្នុងប្រទេសខ្លួនឯងមិនបានបរទេសវៀតណាមទាំងក្រទាំងមានហូរចូលកម្ពុជាដូចទឹកជ្រោះ...។ល។ ប្រជាពលរដ្ឋខ្មែរសព្វថ្ងៃមើលពីចម្ងាយ ហាក់ដូចជានៅរស់នៅក្នុងសេរីភាពនៅឡើយ តែតាមពិតទៅ "ក្បាលនៅក្នុងម៉ាស៊ីនកាត់ក"រួចទៅហើយរង់ចាំតែកាំបិតធ្លាក់មកតែប៉ុណ្ណោះ... ពេលនោះទើបខ្ញុំដឹងថា "បងប្អូនកម្ពុជាកំពុងតែរស់ដូចស្លាប់ទៅហើយទេតើ!" ដែលជាបុព្វហេតុធ្វើឱ្យគ្នារើបំរះតាម "ធម្មជាតិជាអ្នកគ្មានសង្ឃឹមអ្វីក្រៅតែពីការតស៊ូដើម្បីជីវិតជាទីកចុងក្រោយបង្អស់" នោះសោះជាមួយគ្នានោះគណបក្សសង្គ្រោះជាតិបានកើតឡើង ហើយហុចដៃឱ្យរាស្ត្រខ្មែរតោងឈរ។

ចំណងទំនាក់ទំនងពលរដ្ឋខ្មែរជាមួយគណ-បក្សសង្គ្រោះជាតិមិនមែនដូចទំនាក់ទំនងជាមួយអ្នកនយោបាយពេលមុនៗនោះទេ គឺប្រកបដោយការប្រុងប្រយ័ត្នសម្លឹងទិសដៅដែលខ្លួនចង់បានដើម្បីការពារជីវិត គ្មានដាក់ភ្នែក គ្មានតក់ស្លុតទទួលយកការដឹកនាំពីគណបក្សសង្គ្រោះជាតិពីព្រោះតែជឿលើស្មារតី សម រង្ស៊ី - កឹម សុខា ដែលហ៊ានយកជីវិតតស៊ូប្តេជ្ញាចិត្តដូចគ្នាគ្មានប្តូរតាំងពីយូរមកហើយជាកម្លាំងជួយស្មើភាពគ្នាទៅវិញទៅមកពុំមែនដូចរណបនៃអ្នកធំ ឬចូលរួមជាចំនួនច្រើននោះទេ។ ស្មារតី "ការពារជីវិតរួមគ្នាដោយទុកចិត្តលើប្រាជ្ញាខ្លួនឯង"នេះមិនដែលកើតមានពីមុនមកទេ ហើយក៏កំពុងរីកចំរើនយ៉ាងល្អប្រសើរថែមទាំងដឹកនាំឆន្ទៈនឹងគោលដៅនៃអ្នកនយោបាយបានទៀតផង ។ មកដល់ត្រង់នេះ កង្វល់ក៏បានធូរស្រាលដោយបងប្អូនខ្មែរជារាស្ត្រ"តូចតាច"នៅឯស្រុកយើងកំពុងធ្វើសកម្មភាព"មហាសាមគ្គី" ដោយដឹងច្បាស់ថាខ្លួនចង់បានអ្វីជាសំណាងល្អនៅមានគណបក្សសង្គ្រោះជាតិនៅក្បែរជាអ្នកជួយត្រួសត្រាយឧបសគ្គនយោបាយ និងទង្វើទុច្ចរិតនានា ដើម្បីឱ្យរាស្ត្រដើរបានដល់គោលបំណងដ៏សុខសាន្តរបស់ខ្លួន...នេះគឺទស្សនៈ"ប្រជាធិបតេយ្យពិតប្រាកដ"បានកើតឡើងហើយ ប្រាកដណាស់រាស្ត្រប្រជាខ្មែរកំពុងបង្រៀនយើងពីវិជ្ជាធ្វើនយោបាយបែបថ្មីនេះ!។

**២-កង្វល់ពីសាមគ្គីខ្មែរក្នុងសហគមន៍:** ខ្ញុំក៏បានឮគេនិយាយដែរថា "សាមគ្គីក្នុងសហគមន៍ខ្មែរនៅបែកជាជម្រាកតូចៗ" នេះច្បាស់ជាជម្ងឺរ៉ាំរ៉ៃរបស់យើងដែលខ្ញុំមានអារម្មណ៍ប៉ះទង្គិចតាំងពីខ្ញុំមកតាំងទីនៅឡូវែលការពី២-៣ឆ្នាំមុនមកម្លេះ។ យើងបានតាំងខ្លួនជាអ្នកគ្រាន់បើចេះជួយយកអាសារខ្មែរនៅកម្ពុជាតែមិនចេះសាមគ្គីដូចអ្នកកម្ពុជាសព្វថ្ងៃនេះទេ។ ឥឡូវនៅឡូវែលនេះគេនាំគ្នាធ្វើបុណ្យផ្កានៅក្រៅវត្តជារៀងរាល់សប្តាហ៍ដោយសារគ្មានវត្តធ្វើបុណ្យ ដូចពេលមុនទៀតទេ ។ ថ្នាក់ដឹកនាំវត្តមួយចំនួនធំ គឺជាជម្រកចិញ្ចឹមទំនាស់ធំៗដែលជ្រៀកពលរដ្ឋឱ្យបែកបាក់ក្នុងសហគមន៍ដោយធ្វើឱ្យមានការកាន់ជើងវត្តនេះ ឬវត្តនោះ ហើយមកឈ្លោះអ្នកភូមិផងរបងជាប់គ្នាយ៉ាងទ្រហ៊ឹងអឹងកង... តាមពិតបុណ្យផ្កាទាំងនោះមាន សញ្ញាជាផលប្រយោជន៍ផ្ទាល់ក្រុមខុសៗគ្នាជាបក្ខពួកមនុស្សធ្វើបុណ្យចូលគ្នាមិនបានសោះ ពេលខ្លះបបួលគ្នាទៅសំពះលោកដែលគ្មានសីលនាំគេឱ្យចុះនរកច្រើនគ្នាថែមទៀត... តែទោះជាយ៉ាងនេះក្តីក៏នៅមានម្ចាស់ហាង "សាទីជា-សំពៅ មាស" ដែរ ដែលឡើងឋានសួគ៌តែម្នាក់ឯង ដោយខ្ញុំបានឮថា "បានផ្តល់ទីកន្លែងធំទូលាយឱ្យគ្រប់ក្រុមធ្វើបុណ្យបានដោយមិនយកប្រាក់ចំណេញទេ"នេះ គឺជាការបង្រៀន "ឱ្យមនុស្សចេះធ្វើបុណ្យពីក្នុងចិត្ត"រួបរួមស្រឡាញ់គ្នាជាក្រុមកាន់តែធំជាការធ្វើបុណ្យដោយមិនចាំបាច់សំពះលោកដែលភាពបរិសុទ្ធនៅមានមន្ទិលសង្ស័យនៅឡើយ។

កង្វល់ខ្ញុំចុងក្រោយនេះ ទំនងជាបានធូរស្បើយនៅពេលឃើញគំរូមនុស្សនិយាយតិចតែស្គាល់អំពើបុណ្យនឹងបាបដាក់ទានបានច្រើន ហើយមិនអួតអាងថា ចង់"ដឹកនាំ" នរណា ឬសង្គមណានោះនៅឡើយទេ ៕

# ខ្មែរអ្នកជាតិនិយម

**តពីលេខមុន**

និពន្ធដោយ **ឡឹក សំអឿន** ហៅ "ថ្នាយព្រឹក"

តាមការស្ទង់មើលទៅអ្នកតែងរដ្ឋធម្មនុញ្ញខ្មែរឆ្នាំ១៩៤៧នោះ ទំនងជាអ្នកមានគំនិតស្រពេចស្រពិលខ្វះការពិសោធន៍បានជាតែងច្បាប់រដ្ឋធម្មនុញ្ញស្រកេកស្រកាកយ៉ាងហ្នឹង ។ លោក តឹង តុន បានធ្វើការកត់សម្គាល់នៅក្នុងនិក្ខេបបទមួយរបស់លោកថា រដ្ឋធម្មនុញ្ញខ្មែរឆ្នាំ១៩៤៧ ជាស្នាដៃនៃវណ្ណៈគហបតីជាតិខ្មែរ (Bourgeosie Nationale) ដែលបានឡើងកាន់អំណាច ហើយឆ្លៀតឱកាសពេលចប់សង្គ្រាមលោកលើកទី២ ដើម្បីរៀបរៀងព្រាងច្បាប់រដ្ឋធម្មនុញ្ញមួយសម្រាប់បំរើវណ្ណៈរបស់ខ្លួន ។ ដូច្នេះរបបប្រជាធិបតេយ្យអាស្រ័យរដ្ឋធម្មនុញ្ញខ្មែរគ្រាន់តែជារបបដែលមានសភាទទួលស្គាល់ជាផ្លូវការ និងជួយការពារយកប្រៀប និងអភ័យឯកសិទ្ធិដែលយកបានដោយវណ្ណៈអ្នកមានភ័ព្វវាសនាតែប៉ុណ្ណោះ ។ រដ្ឋធម្មនុញ្ញខ្មែរនេះទោះបីយកតាមគំរូប្រជាធិបតេយ្យមួយនៅអឺរ៉ុបក៏ដោយ ក៏មិនឃើញផ្ដល់អធិបតេយ្យទៅឱ្យប្រជារាស្ត្រច្បាស់លាស់ ដូចដែលប្រទេសទាំងឡាយនៅអាស៊ីអគ្នេយ៍បានផ្ដល់សិទ្ធិសេរីភាពទៅឱ្យប្រជាជនរបស់គេទេ ។ តួយ៉ាងដូចរដ្ឋធម្មនុញ្ញសៀមឆ្នាំ១៩៤៩ មាត្រាពាចែងថា អំណាចជាអធិបតេយ្យចេញមកពីប្រជាជនថៃ. ព្រះរាជាក្នុងឋានៈជាប្រមុខរដ្ឋប្រើអំណាចនោះតាមសេចក្ដីចែងក្នុងរដ្ឋធម្មនុញ្ញ ។ ឯរដ្ឋធម្មនុញ្ញលាវ ឆ្នាំ១៩៤៧ ត្រង់មាត្រា៣ ក៏ដូចគ្នានឹងរដ្ឋធម្មនុញ្ញសៀមដែរ ដែលចែងថា អធិបតេយ្យជាតិចេញមកពីប្រជាជនលាវទាំងមូល ។

ថ្ងៃទី៨ កក្កដា ១៩៤៧ ទ្រង់យុត្តិវង្ស បានសុគតយ៉ាងចម្លែកនៅមាត់សមុទ្រកែប ដែលមានពាក្យចចាមអារាមថា ទ្រង់សុគតដោយគេធ្វើគត់ ។ ទោះជាដូច្នោះ ការបោះឆ្នោតត្រឹមត្រូវពេញលក្ខណៈបានត្រូវធ្វើឡើងនៅខែវិច្ឆិកា ឆ្នាំ១៩៤៧ ។ ពេលនោះក៏ដូចជាពេលណាស្ដេចសីហនុ បានត្រូវពួកអ្នកលុតក្រាបអែបអបឡែមឡឺមផ្ដុំត្រចៀកថា គណបក្សប្រជាធិបតេយ្យជាគណបក្សក្រុម សឺន ង៉ុកថាន់ ។ ដូច្នេះ ស្ដេចសីហនុ ក៏បាននាំគ្នារៀបចំគម្រោងការយកឈ្នះលើគណបក្សប្រជាធិបតេយ្យ ក្នុងពេលបោះឆ្នោតខែវិច្ឆិកា ឆ្នាំ១៩៤៧ ។ លើកនេះ ពួកអ្នកលុតក្រាបស្ដេចបានប្រើកល្បិចបង្កើតគណបក្សថ្មី២ទៀត គឺ **១**-គណបក្សខេមរបុណ្ណការដឹកនាំដោយលោក ញឹក ជូឡុង ក្រោយមកប្រគល់ទៅឱ្យលោក លន់ នល់. **២**-គណបក្សរួបរួមជាតិដឹកនាំដោយលោក ឃឹម ទិត ។ នេះជាកល្បិចដើម្បីបំបែកសម្លេងយកកៅអីនៅក្នុងរដ្ឋសភា ប៉ុន្តែនៅតែយកឈ្នះលើគណបក្សប្រជាធិបតេយ្យពុំបានទៀត ត្បិតក្នុងចំនួនកៅអីទាំងអស់ ៧៥ ក្នុងរដ្ឋសភានោះ គណបក្សប្រជាធិបតេយ្យបានទទួល៥៨កៅអី និងគណបក្សសេរីភាពបាន ២១ កៅអី ។

នៅថ្ងៃទី១១ កុម្ភៈ ១៩៤៨ លោក ឈាន ម៉ម ជាអគ្គលេខាធិការនៃគណបក្សប្រជាធិបតេយ្យ ត្រូវទទួលភារៈដឹកនាំគណៈរដ្ឋមន្ត្រី ។ ក្នុងពេលដែលគណបក្សនយោបាយខ្មែរកំពុងច្បាំងគ្នានៅឯភ្នំពេញ អសន្តិសុខក៏បានកើតឡើងពេញផ្ទៃប្រទេស ។ កងកម្លាំងសហភាពបារាំងនៅកម្ពុជាបានត្រូវបារាំងបញ្ជូនឱ្យទៅច្បាំងទល់និងយៀកមិញ នៅឯកូសាំងស៊ីន ។ នៅប៉ែកខាងជើងប្រទេសខ្មែរ ចលនាឥស្សរៈឥតមេឥតកោយបានកាន់កាប់ទឹកដីមួយចំនួនធំ ។ ឯប៉ែកខាងត្បូង និងខាងកើតប្រទេស ពួកយួនយៀកមិញបានចាប់ផ្ដើមចូលមករាត្បាត តាំងទីនៅក្នុងទឹកដីខ្មែរត្រង់ណាដែលមិនសូវមានទីតាំងកងកម្លាំងបារាំង ។ ពួកយៀកមិញបានបង្កើតកងទ័ពប្រជាជនខ្មែររំដោះមួយ ដែលមានបណ្ដាជនខ្មែរកម្ពុជាក្រោមជាស្នូល (ពួកនេះចាញ់កលល្បិចយួនយៀកមិញដែលបោកបញ្ឆោតថា គេនឹងប្រគល់ស្វ័យភាពយ៉ាងទូលំទូលាយឱ្យខ្មែរនៅពេលណាដែលគេប្រយុទ្ធឈ្នះបារាំង) ។

ដោយក្ដីព្រួយបារម្ភនឹងអសន្តិសុខ ដែលចេះតែរាលដាលខ្លាំងឡើង ហើយគ្មានអំណាចលើកងទ័ព ម្យ៉ាងទៀតត្រូវពួកប្រជាធិបតេយ្យទិទៀនថា ព្រះអង្គស្លូតពេកក្នុងការទាមទារយកឯករាជ្យពីបារាំងនោះ សីហនុ ក៏សម្រេចចិត្តស្នើសុំឱ្យបារាំងពិនិត្យឡើងវិញ នូវទំនាក់ទំនងបារាំង - ខ្មែរ ។ ក្នុងរាជសារលិខិតមួយចុះថ្ងៃទី៧ វិច្ឆិកា ១៩៤៨ ដែលផ្ញើទៅរដ្ឋាភិបាលបារាំង ទ្រង់បានទាមទារយកអំណាចត្រួតត្រាលើកងទ័ពឱ្យកាន់តែមាំខ្លាំងឡើង ព្រមទាំងឱ្យមានស្វ័យភាពកាន់តែធំឡើងដើម្បីការពារសន្តិសុខក្នុងប្រទេសកម្ពុជា។

**ត្រឡប់មកនិយាយពីប្រទេសយួនវិញ :** ឧត្តមនាវី ដាសង់ឌិយើរ អគ្គស្នងការបារាំងប្រចាំឥណ្ឌូចិនដែលប្រើសន្ទឹកបៀវវៀតណាមផ្សេង កូសាំងស៊ីនផ្សេងនោះ **តទៅលេខក្រោយ**



# តើគួរធ្វើយ៉ាងណាទើបកូនគេងលក់ស្កប់ស្កល់

**- សម្លៀកបំពាក់ :** ដើម្បីឱ្យកូនគេងលក់ស្រួល មាតាបិតាគួរស្លៀកពាក់ឱ្យកូនមានភាពទន់ល្មើយ មិនណែនចង្អៀត មិនរលុងពេក ឬមិនត្រូវស្លៀកពាក់ច្រើនជាន់ពេកទេ សំខាន់ឱ្យកូនពាក់ហើយមានអារម្មណ៍ស្រួលខ្លួន ។

**- ដណ្តប់ខ្លួន :** ចំពោះទារកទើបសម្រាលក្រោយពីស្លៀកពាក់ឱ្យស្រួលខ្លួន ការគ្របដណ្តប់ខ្លួនកូនដោយកន្សែងពោះគោ ឬភួយទន់ៗពេលចូលគេងជួយឱ្យទារកតូចៗមានអារម្មណ៍កក់ក្តៅ ដូចកាលនៅក្នុងផ្ទៃម្តាយ ធ្វើឱ្យកូនគេងលក់ស្កប់ស្កល់ ។

**- បៅឆ្អែត :** ការឱ្យកូនបានបៅយ៉ាងគ្រប់គ្រាន់នៅពេលថ្ងៃ និងមុនចូលគេងពេលយប់ រមែងគេងលក់បានយូរ ។ ប៉ុន្តែកូនអាចភ្ញាក់ដឹងឡើងមកបៅដោះពេលយប់ខ្លះៗដែលម្តាយត្រូវដោះស្រាយសន្សឹមៗទៅតាមវ័យរបស់កូន និងគួរព្យាយាមបញ្ឈប់បៅពេលយប់បន្ថយបរិមាណទឹកដោះដែលឱ្យបៅក្នុងមួយលើកៗ ឬឱ្យកូនបៅនៅមុនពេលគេងឱ្យឆ្អែតទើបកូនមិនភ្ញាក់រកបៅទាំងកណ្តាលយប់ ។

**-សាងបរិយាកាស :** មុនគេងអាចបើកបទចម្រៀងបំពេតិចៗ ដើម្បីឱ្យកូនមានអារម្មណ៍ថាម្តាយនៅក្បែរមិនតែប៉ុណ្ណោះសភាពបរិយាកាសរបស់បន្ទប់គេងត្រូវស្អាតគ្មានពន្លឺ ឬសំឡេងរំខានខ្យល់អាកាសចេញចូលស្រួល ហើយសីតុណ្ហភាពបន្ទប់មិនក្តៅ ឬត្រជាក់ពេក ។



**-សុខភាពកូន :** ត្រូវពិនិត្យមើលថា កូនស្រួលខ្លួនហើយ ឬនៅកំណាត់កន្ទប ឬខោទឹកនោមដែលស្លៀកសើមទទឹកឬអត់ ? បើសើមម្តាយ គួរផ្លាស់ប្តូរថ្មីឱ្យកូនស្ងួតខ្លួនមិនមានអារម្មណ៍ស្អិតខ្លួន ទើបកូនគេងលក់ស្រួល និងបានយូរ ៕

# កោះប៉ែន ប្រែមុខមាត់ថ្មី










កោះប៉ែនជាកោះដ៏ធំមួយដែលស្ថិតនៅទល់មុខ និងវត្តបទុមរតនៈដីដុះហៅខ្លីថាវត្តដីដុះ។ តាំងពីខ្ញុំធំដឹងក្តីមកខ្ញុំឃើញកោះនេះស្ថិតនៅចំកណ្តាលទន្លេមេគង្គដ៏ធំមហិមារទាំងខួបប្រាំងខួបវស្សាមិនដែលខួបខ្លាចអំណាចទឹកទន្លេដ៏អស្ចារ្យនេះម្តងណាទេ។ មួយរយៈក្រោយនេះប្រហែលជាក្នុងកំឡុងខែមិនា លោកអភិបាលខេត្តកំពង់ចាមបានអញ្ជើញជាអធិបតីក្នុងការបើករមណីយដ្ឋានមួយនៅឆ្នេរខ្សាច់ឯក្បាលកោះ។ ទឹកនៅទីនោះគឺថ្លាហើយត្រជាក់ស្អាតហើយសុវត្ថិភាព ក៏អាចទុកចិត្តបានលោកអ្នកអាចជួលអាវពោងពាក់ដើម្បីសុវត្ថិភាព ហើយម៉្យាងទៀតគេ ក៏បានបោះបង្គោលសម្គាល់ជម្រៅទឹកផងដែរ ដូច្នេះបើលោកអ្នកមិនទៅហួសពីកន្លែងដែលគេហាមឃាត់ពិតជាគ្មានបញ្ហាអ្វីកើតឡើងនោះទេ។

រមណីយដ្ឋាននេះមានតូបប្រក់ស្លឹកប្រហែលជា១៥ ហើយមានម៉ាស៊ីនធាក់ដោយជើង (ប៉េដាយឡូ) ប្រហែលជា២០។ តម្លៃអាហារ និងភេសជ្ជៈគឺសមរម្យ (លើសទីផ្សារត្រឹមតែ ៥០០៛ ទៅ១០០០៛តែប៉ុណ្ណោះ) ប៉ុន្តែលោកអ្នកក៏អាចខ្ចប់យកអាហារពីផ្ទះទៅដែរ ។ ឯការធ្វើដំណើរទៅកាន់ទីនោះវិញ គឺលោកអ្នកអាចដើរឆ្លងកាត់ប្រជីសឫស្សីចម្ងាយប្រហែល១គ.ម ឬក៏ជិះទូកក៏បាន។ ជាទូទៅមនុស្សម្នាក់ចំនាយ ១៥០០៛ក្នុងការចូលទៅលេង និងដើរឆ្លងប្រជីសទៅវិញទៅមកឯការជិះទូកទៅមក គឺចំនាយអស់១០០០៛តែប៉ុណ្ណោះ។ ប្រជីសគឺស្ថិតនៅមុខវត្តតែម្តង ប៉ុន្តែទូកចម្លងលោកអ្នកត្រូវធ្វើដំនើរទៅដល់មុខបឋមសិក្សា-វិទ្យាល័យដីដុះដែលស្ថិតនៅជិតស្ពានគីហ្សូណាដែលមានចម្ងាយប្រហែល១គ.មពីស្ពានប្រជីសឫស្សី។ រមណីយដ្ឋាននេះ គឺទទួលភ្ញៀវបានតែខែប្រាំងទេ ឯខែវស្សាគឺតំបន់ឆ្នេរខ្សាច់នេះត្រូវទឹកលិចអស់ហើយ។

ប្រជីសគឺជាសរសៃដ៏សំខាន់សម្រាប់ប្រជាជនរស់នៅកោះប៉ែននិងកោះជាប់ៗនោះយ៉ាងសំខាន់ សម្រាប់ដឹកជញ្ជូនទំនិញ មានពោតសណ្តែក ថ្នាំជក់យកមកលកនៅឯទីរួមខេត្ត។ សូមបញ្ជាក់ថា កោះប៉ែនមិនមែនជាតួកោះទាំងមូលនោះទេមានកោះជាច្រើនទៀត កោះទាំងអស់នៅដាច់គ្នានៅពេលខែវស្សា ឯចូលមកខែប្រាំងវិញកោះទាំងនោះក៏ជាប់គ្នាវិញដោយព្រែកដែលហូរពេលទឹកឡើងនោះវាត្រូវរីង។ ជាទូទៅកោះប៉ែនសម្បូរអ្នកទៅលេងណាស់នៅពេលបុណ្យចូលឆ្នាំ ឥឡូវមានរមណីយដ្ឋានមួយនេះទៀត ប្រាកដជាមានភ្ញៀវទេសចរណ៍ទៅលេងច្រើនជាងមុនមិនខាន៕





